# សេចក្តីថ្លែងអំណរគុណ



ខ្ញុំបាទ **ស្រុង ចាន់ណា** ម្ចាស់គេហទំព័រ៥000ឆ្នាំ

សូមគោរពថ្លែងអំណរគុណចំពោះ

**លោកវេជ្ជបណ្ឌិត ខ្មៅ យុនសំរ៉េង** ជាប្រធាន

**មូលនិធិខ្មែរសម្រាប់ការសិក្សា** www.ceefoundation.org

និង **ករុណាខ្មែរ** www.karunacambodia.org

ដែលបានអនុញ្ញាតដល់គេហទំព័រ៥000ឆ្នាំ

យកសៀវភៅនេះមកដាក់ផ្សាយបន្តជាធម្មទាន

សម្រាប់សាធារណជនប្រើប្រាស់ដោយមិនគិតកម្រៃ ។

# កំណើតប្រាសាទអង្គរ

រៀបរៀងដោយ

**ម៉ាវ - បូ**

ធ្វើការនៅក្រសួងអភិរក្សអង្គរសៀមរាប




ការផ្សាយរបស់




ព.ស. ២៥១៣ គ.ស. ១៩៦៩

# បញ្ជីរាយឈ្មោះប្រាសាទ


| លេខរៀង | រាយឈ្មោះប្រាសាទ | ទំព័រ |
|---|---|---|
| ១– | ប្រាសាទអង្គរវត្ត | ១ |
| ២– | ប្រាសាទតាព្រហ្មកិល | ៦២ |
| ៣– | ប្រាសាទបក្សីចាំក្រុង | ៦៤ |
| ៤– | ប្រាសាទភ្នំបាខែង | ៦៩ |
| ៥– | អង្គរធំ, បាយ័ន | ៨៣ |
| ៦– | បាពួន | ១៤៦ |
| ៧– | បរិវេណវាំងស្ដេច (វិមានអាកាស) | ១៦៨ |
| ៨– | ព្រះទេពប្រណម្យ | ១៨៤ |
| ៩– | ព្រះបាលិល័យ | ១៨៧ |
| ១០– | ប្រាសាទព្រះពិធូ | ១៨៧ |
| ១១– | ព្រះរាជលានអង្គរធំ | ១៩០ |

# វង់តូច


| លេខរៀង | ភាយឈ្មោះប្រាសាទ | ទំព័រ |
|---|---|---|
| ១២– | ប្រាសាទជម្ពាននួ | ១៩៣ |
| ១៣– | ប្រាសាទចៅសាយទេវតា | ១៩៦ |
| ១៤– | ប្រាសាទតាកែវ | [illegible] |
| ១៥– | ប្រាសាទតាព្រហ្ម | ២០៣ |
| ១៦– | ប្រាសាទបន្ទាយក្ដី | ២១២ |
| ១៧– | ស្រះស្រង់ | ២១៦ |
| ១៨– | ប្រាសាទក្រវាន់ | ២១៨ |
| ១៩ | ប្រាសាទប្រែរូប | ២១៩ |
| ២០– | ប្រាសាទមេបុណ្យទិសបូព៌ | ២២៦ |
| ២១– | ប្រាសាទនាគព័ន្ធ | ២៣១ |
| ២២– | ប្រាសាទព្រះខ័ន | ២៣៥ |

# ប្រាសាទក្រៅបរិវេណប័ក្សអង្គរ


| លេខរៀង | ភាយឈ្មោះប្រាសាទ | ទំព័រ |
|---|---|---|
| ២៣– | ប្រាសាទលលៃ | ២៤២ |
| ២៤– | ប្រាសាទព្រះគោ | ២៤៧ |
| ២៥– | ប្រាសាទបាគង | ២៥០ |
| ២៦– | ប្រាសាទបន្ទាយសំរែ | ២៥៤ |
| ២៧– | ប្រាសាទបន្ទាយស្រី | ២៥៨ |




# ផែនទីអង្គរ

( រង្វង់ធំ និង រង្វង់តូច )



# បុព្វកថា

ហេតុដែលនាំឲ្យកើតជាសៀវភៅនេះឡើង គឺដោយខ្ញុំធ្លាប់បានស្តាប់ជាញឹកញាប់ នូវការកោតសរសើរពីភ្ញៀវទេសចរណ៍បរទេសជាច្រើន ដែលគេមកទស្សនាប្រទេសយើង គេតែងនិយាយថា ប្រទេសកម្ពុជា ជាប្រទេសរុងរឿងបំផុត សម្បូណ៌ដោយអារ្យធម៌ វប្បធម៌ សិល្បៈយ៉ាងល្អឯក តាំងពីអតីតកាល នៅក្នុងចំណោមប្រទេសទាំងឡាយ ដែលស្ថិតនៅទិសនិរតីនៃទ្វីបអាស៊ី ។ បើយើងមិនបានត្រិះរិះឲ្យបានហ្មត់ចត់ទេ យើងមុខជាយល់ច្រឡំថា ប្រាសាទទាំងឡាយ ជាស្នាដៃនៃទេពនិម្មិតថ្វាយចំពោះព្រះរាជាខេមរជាតិយ៉ាងពិតប្រាកដ ដូចមានពាក្យខ្មែរគាត់ខ្លះថា ប្រាសាទអង្គរព្រះឥន្ទ្រប្រើ ពិស្ណុការមកសាងថ្វាយព្រះកេតុមាលា ។

បើតាមពិត ប្រាសាទទាំងឡាយដែលស្ថិតនៅក្នុងអតីតរាជធានីអង្គរ ជាប្រាសាទសាងដោយស្នាដៃនៃមនុស្សពិតៗ ដែលមានព្រះរាជាជាប្រមុខនៃអារ្យធម៌ វប្បធម៌ និងសិល្បៈយ៉ាងស្កាត់ជំនាញ ។

ដូច្នេះ យុវជនទាំងឡាយ អ្នកត្រូវតែទៅទស្សនាប្រាសាទទាំងនោះកុំឲ្យខាន ពេលអ្នកទៅទស្សនានោះមិនខាតប្រយោជន៍ឡើយ :

១ – អ្នកនឹងបានឃើញប្រាសាទប្រកបដោយក្បាច់ចនា យ៉ាងប្លែក ៗ ពីជើងរហូតដល់កំពូល ។

២ – អ្នកនឹងបានដឹងនូវរឿងប្លែកខ្លះក្នុងប្រាសាទ ។

៣ – អ្នកនឹងបានចេះនូវប្រវត្តិសាស្ត្រ ក្នុងជំនាន់នោះ ។

៤ – អ្នកនឹងមានចិត្តកោតសរសើរ ចំពោះបុព្វបុរសរបស់យើង ដែលទំដឹកជញ្ជូនថ្មសិលាធំ ៗ មកដាប់ផ្ទាក់ជាក់បន្តុបលើគ្នា កជាប្រាង្គប្រាសាទទុកជាកេរ្តិ៍ដំណែលឲ្យកូនចៅជាន់ក្រោយ ។

៥ – អ្នកនឹងបានឃើញនូវរបៀប នៃសាសនាក្នុងជំនាន់នោះ ។

៦ – អ្នកនឹងបានគោរពចំពោះវិញ្ញាណក្ខន្ធបុព្វបុរសយើង ដែលទុកជាបូជនីយស្ថានដ៏ប្រសើរ ។

៧ — អ្នកនឹងបានគោរពបូជាចំពោះព្រះបដិមាករ "ព្រះពុទ្ធរូប" ។

ហេតុដូច្នេះហើយ បានជាខ្ញុំប្រមូលឯកសារផ្សេងៗ មករៀបរៀងជាសៀវភៅនេះឡើង ឲ្យឈ្មោះថា "កំណើតប្រាសាទអង្គរ" ដើម្បីទុកជាសតិបញ្ញាស្មារតី ដល់យុវជនគ្រប់រូបដែលប្រាថ្នាទៅទស្សនាបុរាណវត្ថុរបស់យើង គ្រាន់បានជាមិត្រជាប់នៅដៃជួយព្រោលបំភ្លឺផ្លូវ ។

ទីបំផុត សូមអ្នកចាំឲ្យជាក់ថា ប្រាសាទនិមួយៗ សុទ្ធតែមានក្បាច់របនាល្អប្លែកៗ ដូចនេះតាក់ក្បាច់កំ នេះនិយាយស្តី នេះសើចញញឹមព្រាយ នេះច្រៀងបំពេរអារម្មណ៍អស់លោកអ្នក ដែលបានអញ្ជើញទៅទស្សនាបុរាណប្រាសាទរបស់យើងៗ អ្នកដែលបានទៅទស្សនាបុរាណប្រាសាទ ទុកជាមានភ័ព្វសនាយ៉ាងប្រសើរខ្ពង់ខ្ពស់ អ្នកដែលមិនបានទស្សនាបុរាណប្រាសាទ ទុកដូចជាមនុស្សគ្មានភ័ព្វសនាសោះឡើយ ។

ការទស្សនាបុរាណប្រាសាទនោះទៀតសោត សូមកុំតែមើលទទេ ៗ ត្រូវមើលពិនិត្យពិច័យឲ្យបានហ្មត់ចត់ថា បុរាណប្រាសាទដ៏ធំសម្បើមអស្ចារ្យនេះ ពិតជាស្នាដៃនៃបុព្វបុរសរបស់យើងជាអ្នកកសាងដោយពិតប្រាកដ ព្រោះគេឃើញមានស្នាមពន្លាកដែកជាប់ជាប់នៅរហូតសព្វថ្ងៃនេះ មិនមែនព្រះឥន្ទ្រទេវតា ព្រះពិស្ណុការក្នុងជំនាន់នោះ ប៉ុន្មានឹងពាក្យថា វិស្វករក្នុងជំនាន់សព្វថ្ងៃនេះដែរ គេគ្រាន់តែលើកតំកើងវិស្វករដែលមានស្នាដៃយ៉ាងចំណាន ៗ ក្នុងកាលនោះ ឲ្យមានឋានៈជាព្រះពិស្ណុការ ជាជាអ្នកបេះរចនាកសាងប្រាសាទយ៉ាងល្អចំញ្ចាច ហាក់ដូចជាទើបផុះលេចឡើងពីគពផែនដីមក នៅក្នុងអាស៊ីអាគ្នេយ៍នេះ ។

ម៉ាវ - ប៊ូ

# ប្រាសាទអង្គរវត្ត

ប្រាសាទអង្គរវត្តជាបុរីឬជាទីក្រុង ហើយថែមទាំងជាវិហារឬក៏ជាចេតិយទៀតផង ។ ប្រាសាទនេះ សាងឡើងនៅពាក់កណ្ដាលសតវត្សទី ១១ ដោយស្នាព្រះហស្តព្រះបាទ "សុរិយាវរ្ម័នទី ២" ដែលទ្រង់មានព្រះបរមនាមក្រោយទិវង្គតថា "ព្រះបរមវិស្ណុលោក" ។ សាសនានៅសម័យនោះ គឺព្រហ្មញ្ញសាសនា មានការគោរពបូជាព្រះនារាយណ៍ជាដើម ។ ក្រោយមកក្នុងគ្រិស្តសករាជ ១៩០៨ ក្រសួងអភិរក្សអង្គរ បានកាប់ឆ្ការព្រៃសំអាតក្នុងប្រាសាទ រហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទអង្គរវត្តមានសណ្ឋានទ្រង់ទ្រាយកង ៤ ជ្រុងទ្រវែង ដែលមានបណ្ដោយប្រវែងប្រមាណ ១៥០០ ម៉ែត្រ ទទឹងប្រមាណ ១៣០០ ម៉ែត្រ ។ ផ្ទៃដីទាំងមូលនៃប្រាសាទ រួមបញ្ចូលសារុបទាំងស្រះពោក្ខរណី ទទឹង៨០០ម៉ែត្រផង មានទំហំផ្ទៃទាំងអស់២០០ហិកតារ ។

2 ទាំងក្នុងស្រះ ដីដែលមានជញ្ជាំងជាកំពែងចន្ទ្រាយក្រៀមព័ទ្ធជុំវិញនោះ

មានបណ្ដោយប្រវែង ១០៦៨ ម៉ែត្រ ទទឹង ៨០០ ម៉ែត្រ ។ បើគិតជាទំហំផ្ទៃដីវិញមាន ៨២ ហិកតារ ។ ដូច្នេះប្រាសាទនេះមានទំហំធំជាងគេបង្អស់ ក្នុងចំណោមប្រាសាទនានានៅក្រុងអង្គរធំ ។

ប្រាសាទអង្គរវត្តតាំងនៅខាងត្បូងកផធាទីអង្គរធំ ហើយស្ថិតនៅក្នុងលង្វែកប៉ែកខាងត្បូង ឆៀងខាងកើតនៃអតីតបុរីអង្គរ „យសោធរបុរៈ„ ។ ក្រុងយសោធរបុរៈនេះសាងឡើងដោយស្នាព្រះហស្ដព្រះបាទ "យសោវរ្ម័នទី ១" ហើយមជ្ឈមណ្ឌលសម័យនោះតាំងនៅលើភ្នំបាខែង ។ ព្រំប្រទល់នៃបុរីអង្គរក្នុងគ្រានោះ ខាងកើតទល់នឹងស្ទឹងសៀមរាប ខាងលិចទល់នឹងទំនប់ខ្នងបារាយណ៍ ។ អាស្រ័យហេតុដូច្នេះ ព្រះវិហារអង្គរវត្តស្ថិតនៅតាំងសងខាងមាត់ប្រកផ្លូវធំចូលទៅអង្គរធំ ជាការប្រសើរបំផុត ។ បើគេយកសំគាល់នៃស្ថានលេខាមកពិចារណាដោះស្រាយវិញ បុព្វហេតុដែលនាំឲ្យប្រាសាទនេះបែរគ្រឈមទៅរកទិសបស្ចិមនោះ គឺមកពីការងាយស្រួលក្នុងការដឹកនាំផ្ទាំងសិលា តាមផ្លូវទឹក ពីភ្នំគូលែន ហើយ

និងការធ្វើដំណើរបានរហ័សដោយនៅជិតស៊ីនសៀមពបផង ។

ដោយការសង្កេតពិនិត្យ អ្នកទស្សនាតាំងឡាយក៏អាចយល់ច្បាស់ថា ប្រាសាទអង្គរវត្តបានចាប់ផ្តើមសាងឡើងពីទិសបស្ចិមមកមុនគេបង្អស់ ព្រោះយើងបានឃើញយ៉ាងច្បាស់លាស់ នៅផ្នែកខាងកើតមានភាគច្រើនមិនទាន់ឆ្លាក់រចនារូបនៅឡើយ ៗ តាមធម្មតាគេតែងធ្វើអ្វីពីចម្ងាយមកមុន ហើយគ្រាក្រោយបំផុតទើបទីជិតក្រោយគេបង្អស់ ៗ ក្បាច់ក្បូរចម្លាក់ភាគច្រើន នៅខាងលិចសឹងរួចស្រេចទាំងអស់ តែជាអកុសលឯផ្នែកខាងកើតវិញ ឃើញហាក់ដូចជាមិនទាន់ហើយ ម្យ៉ាងទៀតភាពក្បាច់ហាក់ដូចជាធ្វើឡើងដោយប្រញាប់ប្រញាល់ផង ៗ នៅផ្នែកដដែលនេះ បើយើងចូលតាមក្លោងទ្វារខាងកើតមកវិញ យើងនឹងជួបប្រទះថ្មគំនរដ៏ខ្ពស់ ៗ មិនទាន់បានស្លាចនាអ្វីពីលើនៅឡើយ ៗ ការមិនហើយស្រេច ការធ្វើដោយបន្ទាន់ និងគំនរដ៏មិនទាន់បានប្រើការអ្វីសោះនោះ តាំងនេះជាហេតុបណ្ដាលមកពីសង្គ្រាមដ៏កាចសាហាវយង់ឃ្នង់នៃប្រទេសជិតខាងដែលចូលមកលុកលុយ ៗ

អ្នកប្រាជ្ញដោះស្រាយបែបនេះ ពិតជាមិនអាចទទឹងសន្មតថាគ្រប់គ្រាន់បានការនៅឡើយ ហើយគេមិនអាចលះបង់នូវច្បាប់ក្បួនប្រពៃណីដោយឥតយកមកដោះស្រាយបានដែរ ។ ដូច្នេះតាមប្រពៃណីវិញ មូលហេតុដែលបណ្ដាលឲ្យមានការបំបែរមុខប្រាសាទទៅបស្ចិមទិសប្លែកខុសពីប្រក្រតីយ៉ាងដូច្នេះនោះ គឺដើម្បីសម្របឲ្យស្របតាមទ្រឹស្ដីនៃលទ្ធិព្រហ្មញ្ញសាសនា “ សាសនាព្រាហ្មណ៍ ” តែប៉ុណ្ណោះ ដោយអាស្រ័យទៅលើការស្រាវជ្រាវរបស់លោក ហ្វីណូត៍ , លោក សេដែស និង លោក ព្រសឺលុស្គី ហើយនិងលោកវេជ្ជបណ្ឌិត បូសហ៍ ដែលជានាយកគម្រូតនៃក្រសួងបុរាណវត្ថុនៃប្រទេសឥណ្ឌា លោក គើតឡើងដែរ បានពន្យល់ថា ប្រាសាទអង្គរវត្តជាព្រះវិហារឬជាចេតិយសម្រាប់រំលឹកដល់ព្រះអង្គ សម្រាប់ជានិម្មិតរូបនៃព្រះវិញ្ញាណក្ខន្ធរបស់ព្រះរាជាដែលយាងចូលទិវង្គត ទៅកាន់បរលោកនាយតែប៉ុណ្ណោះ ។ សេចក្ដីបន្ថែមទៀតថា ព្រះវិហារអង្គរវត្តជាគំរូផល់ប្រាសាទទាំងឡាយដែលសម្រាប់រំលឹកដល់ព្រះអង្គនៃព្រះរាជា ៗ ព្រះអង្គ “ សុរិយាវរ្ម័នទី២ ”



ប្រាសាទអង្គរវត្ត

មើលពីជ្រុងខាងលិចខាងជើង

ទ្រង់បានសាងប្រាសាទនេះឡើង កាលព្រះអង្គទ្រង់គង់ព្រះជន្មនៅឡើយ ដើម្បីទុកឲ្យគេគោរពបូជាព្រះអង្គដែលជានិមិត្តរូបនៃព្រះអាទិទេព ហើយជាពិសេស ដើម្បីទុកដំកល់ព្រះអដ្ឋិនៃព្រះអង្គផង ។ លោកវេជ្ជបណ្ឌិត ប៊ូសហ៍ បានពោលបញ្ជាក់ទៀតថា ប្រាសាទអង្គរវត្តបែរកក្រោទៅរកទិសបស្ចិម មិនខុសពីប្រាសាទនានានៅប្រទេសជ្វា ដែលជាប្រាសាទមានមុខបែរផ្សេងគ្នាស្រឡះពីប្រាសាទសម្រាប់ទុកទទួលបូជាថ្វាយព្រះអាទិទេព ។ ម្យ៉ាងទៀត បើតាមបទបញ្ញត្តិគន្ថទ្រឹស្តីព្រហ្មញ្ញសាសនា ក្បួនហែព័ទ្ធជុំវិញបាំធាដើម្បីធ្វើឈាបនកិច្ច ត្រូវធ្វើឡើងមិនដូចប្រក្រតីឡើយ ។ ៦
ដូច្នេះរូបភាពឆ្លាក់ទាំងឡាយ ក្នុងរោងថែវនៃប្រាសាទអង្គរវត្តបង្ហាញឲ្យយើងឃើញច្បាស់នូវក្បួនហែទាំងឡាយដែរ ដូចជាក្បួនហែនៃពិធីបុណ្យខ្មោចជាអាទិ ; ក្បួនហែនៃពិធីបុណ្យឈាបនកិច្ចនេះធ្វើឡើងមិនដូចក្បួនច្បាប់ប្រពៃណីបុរាណធម្មតា គឺតាមវិថីគោចរព្រះ-អាទិត្យ ពីខាងស្តាំវត្តុឡើយ ( ប្រទក្សិណា ) គេប្រតិបត្តិបញ្ច្រាស

វិធីគោរពព្រះអាទិត្យទៅវិញ ។ ចុងក្រោយបង្អស់លោកសេដែស បានថ្លែងបញ្ជាក់ថា គ្មានព្រះអាទិទេពអង្គណាឡើយក្រៅពីព្រះបាទ « សុរិយាវរ្ម័ន ទី ២ ទេ » ដែលបានសាងប្រាសាទអង្គរវត្តសម្រាប់ជា វិមានស្តេចទេវតា ឬទេវរាជ « គឺព្រះបាទ សុរិយាវរ្ម័ន ទី ២ នេះឯង » ដោយបង្កើតឲ្យមានរូបមូលស្ថាបនាជាព្រះនារាយណ៍ ហើយតាំងព្រះអង្គឯងជាព្រះឥសូរ ដោយពុំបង្កើតឲ្យមានលិង្គដូចបុព្វការីមុនៗទេ ជាពិសេសទ្រង់តាំងព្រះអង្គជាព្រះនារាយណ៍ផង ដែលមានសមាគមសឹងភ្ជាប់ខ្លួនទាក់ទងទៅនឹងបស្ចិមប្រទេស « ប្រទេសឥណ្ឌា » យ៉ាងសុខសាទ ។ អាស្រ័យហេតុដូច្នេះបានជាព្រះអង្គបង្កើតឲ្យមានរូបការបែរមុខប្រាសាទបែបដូច្នេះ ។

នៅចុងសតវត្សទី ១៣ អ្នកដំណើរជាតិចិនម្នាក់ឈ្មោះលោក ជីវ-តាក្វាន់ បានបញ្ជាក់ថា ផ្នូរខ្មោច « លូប៉ាន់ » ដែលស្ថិតនៅខាងត្បូងរាជធានី ហើយមានដីខែប្រាង្គ ១០ នោះ មានលក្ខណៈដូចគ្នានឹងប្រាសាទអង្គរវត្តដែរ ។ ហេតុដូច្នេះចាប់តាំងពីសម័យនោះមក

ប្រាសាទអង្គរវត្តមានលក្ខណៈកាន់តែច្បាស់ណាស់ ជាទីសម្រាប់ដំកល់ព្រះអដ្ឋិ ។ ម្យ៉ាងទៀតរឿងព្រេងខ្មែរប៉ុកណាមួយនិទានពីព្រះកេតុមាលា ដែលព្រះឥន្ទ្រាធិរាជទ្រង់ត្រាស់បញ្ជា សូមឱ្យយាងចុះមកយោនយកកំណើតជាមនុស្សលោក ។ លុះដល់ព្រះរាជកុមារមានវ័យចំរើនឡើង ទើបព្រះឥន្ទ្រាធិរាជត្រាស់ប្រើឱ្យទេវបុត្រ "វិស្សុកម្ម ពិស្ណុការ" មកនិម្មិតជាប្រាសាទអង្គរវត្តទុកជាព័ន្ធស្ដួចដែលប្រកបដោយលក្ខណៈ សណ្ឋានទ្រង់ទ្រាយដូចគ្នាសុទ្ធសាធនឹងស្ថានសួគ៌ "តាវតឹង្សឋាន ៣៣ ជាន់" ដើម្បីជាវិសេសដ្ឋានថ្វាយដល់ព្រះកេតុមាលា ហើយនឹងសម្រាប់តំកល់ព្រះរូបនៃព្រះអង្គ ដែលគេទុកជាព្រះកេទ៍ទេព ឬ ទេវរាជ ក្រោយពេលព្រះអង្គចូលទិវង្គត ។ 8

## ពិពណ៌នា

ប្រាសាទអង្គរវត្ត ស្ថិតនៅលើទីតាំងដ៏ប្រសើរជាងពួកប្រាសាទឯទៀត ហើយជាប់ខាងក្នុងពាំព្រៃព្រឹក្សាលតាវល្លិ៍ ដោយមានស្រះបោក្ខរណីពីក្រៅ ដែលជាហេតុញាំងឱ្យប្រាសាទនេះប្រាសផុតពីគ្រោះកាច

អន្តរាយ ដែលកើតឡើងពីការរុករានទន្ទ្រាននៃរុក្ខជាតិធំនានា ។ ប្រាសាទនេះ ស្ថិតនៅជាបូជនីយដ្ឋានរបស់ប្រជាពលរដ្ឋខ្មែរគ្រប់កាលវេលា ៖ នៅក្នុងបរិវេណប្រាសាទមានវត្តជាច្រើនដែលស្ថាបនាឡើងតាំងពីយុគនៃព្រះពុទ្ធសាសនា ថែបហើនបានតបកកើតមានឡើងម៉្លេះ ។ អាគារទាំងនេះកាលជំនាន់ដើមសង់នៅលើដីលានធំមួយផ្នែកមុខប្រាសាទ ហើយក្រោយមក គេបានរំកិលបន្តិចទៅនៅចំហៀងបន្តិច ដើម្បីកុំឲ្យខូចខូវនេត្រាទស្សនៈរបស់ប្រាសាទ ។

ក្នុងការរៀបចំប្រាសាទនេះ គេបានបំពេញបេសកកម្មក្នុងកិច្ចប្រតិបត្តិការចាប់គាស់ផ្កាព្រៃលតាវល្លិរុញព្រាន ពង្រាបដីទាំងគំនរៗជាច្រើនម៉ែត្រត្រីគុណ ដើម្បីរកវិធីដោះស្រាយធ្វើយ៉ាងដូចម្តេចឲ្យប្រាសាទបានជាប់មាំទាំដាយូរអង្វែង ហើយនិងការរៀបចំដាក់ឲ្យមានសណ្តាប់ធ្នាប់ឡើងវិញ នូវទ្រុងផ្តល់ស័ក្យដែលចូលទៅកាន់ប្រាសាទ ។

ប្រាសាទអង្គរវត្តជាវិមានមួយ ដែលអាចយកទៅប្រៀបធៀប

និងអច្ឆរិយវត្ថុដែលមនុស្សប្រឌិតដ៏ធំ ៗ ល្អ ៗ ជាងគេក្នុងសាកលលោក ដោយប្រាសាទនេះមានលក្ខណៈធំទូលាយ នៅគង់វង់ល្អជាងវិមានទាំងឡាយ ជាពិសេស ដោយមានលក្ខណៈនៃថាវរភាពស្ថាបត្យកម្មល្អធើតផ្ដាច់គេទាំងអស់ ។ ម្យ៉ាងទៀត ប្រាសាទអង្គរវត្តអាចចាត់ទុកជាសិល្បត្ដាភិវុឌ្ឍិ ដោយសំអាងទៅលើខ្នាតផែនទីសំអិតសំអាងត្រឹមត្រូវសមសួនក្រៃលែង ទៅលើសហមាត្រដែលមានសុខដុមរមនានិងការបរិសុទ្ធនៃរេខាស្ថាបត្យកម្មយ៉ាងកម្រ ដែលខ្មែរយើងពុំសូវបានជួបប្រទះផងឡើយ ។ ភាពពិបាកសាំញ៉ាំស្មុគ្រស្មាញនៃសិល្បៈវិស័យនៃការឆ្លាក់ប្រកបនូវភាពរហ័សយ៉ាងបំណាន ដែលមានវិស័យហាក់ដូចជាមិនបានផ្ចិតផ្ចង់ទេ ទាំងអស់នេះអាចចាត់ទុកជាទីស្ញើចសរសើរក្រៃពេកណាស់ ។

ព្រះវិហារអង្គរវត្ត អាស្រ័យនៅលើអ័ក្សទាំងឡាយដែលកើតមានឡើង អាចទុកជាវិមានមួយប្រកបដោយការតាក់តែងយ៉ាងជិតស្និទ្ធទៅនឹងទស្សនទាន “ ឡូកាំង ,, ដែលសំអាងទៅលើឯកភាពនិង

សណ្ដាប់ធ្នាប់បុរាណ ដែលកើតមកពីសម័យមុនៗ អាស្រ័យហេតុដូច្នេះ ប្រាសាទអង្គរវត្តសឲ្យឃើញនូវថ្វីដៃនៃពលានុភាពនិងវិចារណញ្ញាណរបស់ខ្មែរយើងសម័យបុរាណ ។

តាំងពី គ.ស. ១៨៦៦ មក លោក ជំសុន ជាតិអង់គ្លេស បានសង្កេតឃើញថា ប្រាសាទអង្គរវត្តជានិមិត្តរូបនៃភ្នំព្រះសុមេរុ ដែលជាមជ្ឈមណ្ឌលនៃសកលទ្វីប ។ អ្នកស្រី កូពល រេមុសត៍ បានបញ្ជាក់ស្របនឹងលោក ជំសុន ថាមណ្ឌលទាំង ៧ នៃប្រាសាទកណ្ដាលមានលក្ខណៈដូចគ្នានឹងមណ្ឌលទាំង ៧ នៃថ្នាំងសិលាខ្ពស់ ១ នៃភ្នំព្រះសុមេរុ ពនលានទាំងបីនៃប្រាសាទដូចគ្នានឹងឋានទាំង ៣ ជាន់នៃដី ទឹក ភ្លើង ខ្យល់ ហើយនៅឋានទាំង ៣ នេះមានភ្នំព្រះ-សុមេរុ ហើយទីបំផុតស្រះដែលពេញទៅដោយទឹក មានលក្ខណៈដូចគ្នានឹងមហាសមុទ្រ ។

ចំពោះផែនទីអង្គរវត្ត សឹងមានការដោះស្រាយជាមជ្ឈត្តិកភាព បញ្ចូលនូវរូបមន្តនៃសាជីជ្រុងប្រកបទៅដោយថ្នាក់ ហើយទិសព្រះ-

នឹងអច្ឆរិយវត្ថុដែលមនុស្សប្រឌិតដ៏ធំ ៗ ល្អ ៗ ជាងគេក្នុងសាកលលោក ដោយប្រាសាទនេះមានលក្ខណៈធំទូលាយ នៅគង់វង្សល្អជាងវិមានទាំងឡាយ ជាពិសេស ដោយមានលក្ខណៈនៃថាវរភាពស្ថាបត្យកម្មល្អលេចផ្តាច់គេទាំងអស់ ៗ ម្យ៉ាងទៀត ប្រាសាទអង្គរវត្តអាចចាត់ទុកជាសិល្បត្ថាភិវុឌ្ឍិ ដោយសំអាងទៅលើខ្នាតផែនទីសំអិតសំអាងត្រឹមត្រូវសមសួនក្រៃលែង ទៅលើសហមាត្រដែលមានសុខុមមេធា និងការបរិសុទ្ធនៃរេខាស្ថាបត្យកម្មយ៉ាងកម្រ ដែលខ្មែរយើងពុំសូវបានជួបប្រទះផងឡើយ ៗ ភាពពិបាកសាំញ៉ាំស្មុគ្រស្មាញនៃសិល្បៈវិស័យនៃការឆ្លាក់ប្រកបនូវភាពរហ័សយ៉ាងចំណាន ដែលមានវិស័យហាក់ដូចជាមិនបានផ្ចិតផ្ចង់ទេ ទាំងអស់នេះអាចចាត់ទុកជាទីស្ងើចសរសើរក្រៃពេកណាស់ ៗ

ព្រះវិហារអង្គរវត្ត អាស្រ័យនៅលើអ័ក្សទាំងឡាយដែលកើតមានឡើង អាចទុកជាវិមានមួយប្រកបដោយការពាក់ព័ន្ធយ៉ាងជិតស្និទ្ធទៅនឹងទស្សនទាន « ឡូតាំង » ដែលសំអាងទៅលើឯកភាពនិង

សណ្ដាប់ធ្នាប់បុរាណ ដែលកើតមកពីសមប្យមាណ ។ អាស្រ័យហេតុដូច្នេះ ប្រាសាទអង្គរវត្តសឲ្យឃើញនូវថ្វីដៃនៃពលានុភាពនិងវិចារណញ្ញាណរបស់ខ្មែរយើងសម័យបុរាណ ។

តាំងពី គ.ស. ១៨៦៦ មក លោក ជំសុន ជាតិអង់គ្លេស បានសង្កេតឃើញថា ប្រាសាទអង្គរវត្តជានិម្មិតរូបនៃភ្នំព្រះសុមេរុ ដែលជាមជ្ឈមណ្ឌលនៃសកលទ្វីប ។ អ្នកស្រី កូពល រេមុសត៍ បានបញ្ជាក់ស្របទឹងលោក ជំសុន ថាមណ្ឌលថាំង ៧ នៃប្រាសាទកណ្ដាលមានលក្ខណៈដូចគ្នានឹងមណ្ឌលថាំង ៧ នៃថ្នាំងសិលាខ្ពស់ ។ នៃភ្នំព្រះសុមេរុ រានហានថាំងបីនៃប្រាសាទដូចគ្នានឹងហានថាំង ៣ ជាន់នៃដី ទឹក ភ្លើង ខ្យល់ ហើយនៅហានថាំង ៣ នេះមានភ្នំព្រះ-សុមេរុ ហើយទីបំផុតស្រះដែលពេញទៅដោយទឹក មានលក្ខណៈដូចគ្នានឹងមហាសមុទ្រ ។

ចំពោះផែនទីអង្គរវត្ត សឹងមានការដោះស្រាយជាមជ្ឈត្តិកភាពបញ្ចូលនូវរូបមន្តនៃសាជីជ្រុងប្រកបទៅដោយថ្នាក់ ហើយនិងព្រះ-

វិហារនៅទិសេដ្ឋា ដែលផ្សំគ្នាជាអាគារសន្ធឹងបណ្ដោយទៅតាមទ្វារ ក្រៅខាងកើតនិងខាងលិច ។ ដូច្នេះប្រាសាទអង្គរវត្តជាសាជី៣ជាន់ ដែលនៅជាន់និមួយៗ មានកំណត់ព្រំដែននឹងរោងថែវទាំងឡាយ ដែលមានទ្វារធំៗបួន ហើយនិងបណ្ដុលមុខ ។ លានខាងលើ មានភាគ ៤ ជ្រុងស្មើផ្សំបង្កើតជាប្រាសាទបញ្ចសូល៍ “ គឺមានបណ្ដាប មួយខ្ពស់នៅកណ្ដាល, ៤ ទៀតនៅខាងមុមទាំង ៤ ” ។ មានពីរ ទៀត សហទាគី ពីខាងមុខទាំង ៣ នៃលាន មានសណ្ឋានទ្រង់ ក្រោយកង ៤ ជ្រុងទ្រវែង បណ្ដោយទៅខាងលិច ។ លានទាំងពីរ ដែលមានសណ្ឋានដូច្នេះ បើតាមការយល់ គឺដើម្បីទុកសម្រាប់ ស្ដាប់នានៅជាន់ទី ២ នូវប្រាសាទបណ្ណាល័យ នៅជាន់ទីមួយមាន អគារពីរទៀតករជាប្រាសាទ នៅអមអាគារដែលខ្វែងគ្នាជាកាកបាទ ដោយថែវទាំងឡាយ ។

## ស្រះបោក្ខរណី

ពីខាងក្រៅបរិវេណនៃកំពែងប្រាសាទអង្គរវត្ត “ កំពែង ទី ៤

ដោយរាប់ពីកណ្ដាលមក ,, មានស្រះបោក្ខរណីព័ទ្ធជុំវិញ ៗ ស្រះនេះមានជៀនថ្មជាថ្នាក់ ៗ ដូចកាំជណ្ដើរ ហើយរចនាជាក្បាច់ជើងទៀនព័ទ្ធជុំវិញបរិវេណស្រះទាំងអស់ មានប្រមាណ ៤ គីឡូម៉ែត្រ៤០០ ៗ ស្រះនេះនៅជាប់គ្នាពីមួយទៅមួយ ដែលកាលសម័យបុរាណគេទុកសម្រាប់ដឹកជញ្ជូនសិលាសម្ភារៈដែលយកមកតាមស្ទឹង ។ ឯខាងលិចវិញ ជាប់គ្នាដោយស្រទន់ថ្មល់ក្រាលថ្មដែលមានបណ្ដោយ២០០ម៉ែត្រ ទទឹង ១២ ម៉ែត្រ ស្រទន់ថ្មល់ចូលកាន់ប្រាសាទនេះ ត្រូវតុបតែងលំអដោយសសរធំ ៗ ទ្រស់ស្រឡះ ដែលនៅខាងចុងមានក្បាច់រចនាដ៏ល្អវិចិត្រ ។ ក្នុងពពួកសសរទាំងនេះ មានសសរខ្លះមាននៅសល់នៅឡើយ ជាពិសេសសសរបញ្ឈរនៅតាមជៀនទាំងសងខាងជណ្ដើរដែលចុះទៅក្នុងផ្ទៃទឹកស្រះ ។ ភ្ជាប់ចន្លោះពីខាងមុខស្រទន់ថ្មល់ធំចូលទៅកាន់ប្រាសាទ , បែកខាងផ្លូវឆ្មូតា គេឃើញមានលាន ១ កងជាកាកបាទ ។ នៅអមសងខាងផ្លូវថ្មល់ចូលទាំងពីរមានបង្កាន់ដៃនាគដែលមានជើងទៀនរចនាជាក្បាច់យ៉ាងល្អសុក្ខសាល ។

# កំពែងក្រៅ

កំពែងក្រៅប្រាសាទអង្គរវត្ត ធ្វើពីថ្មបាយក្រៀម ហើយបិត
នៅជាប់ឆ្ងាយពីមាត់ស្រះដោយទីឆ្ងាមួយ ប្រវែងទទឹងប្រមាណជា
៣០ ម៉ែត្រ នៅចំពីក្រៅប្រាសាទ ជាប់នឹងកំពែងនេះ មានពេងថែវ
ទទឹងក្លោងទ្វារមួយប្រវែងប្រមាណជា ២៣៥ ម៉ែត្រ ។ នៅក្នុងពេង
ថែវទទឹងក្លោងទ្វារនេះ មានក្លោងទ្វារមួយយ៉ាងធំហៅ "គោបុរៈ" ប្រកប
ដោយកំពូលប្រាង្គ ៣ និងទ្វារចូលពាំងថែវ ធ្វើពន្លឺជាគុហាជាកាកបាទ,
ព្រះពន្លាខាងចុងពីរ សម្រាប់ឡើងជិះលើខ្នងដំរី និងពេងថែវបន្តភ្ជាប់
គ្នាជាច្រើន ។

ចំណែកឯផ្លូវខាងចុងពេងថែវទទឹងក្លោងទ្វារវិញនោះ សឹងបិទ
នៅគ្រង់គ្រឡែងរៃគងល្អែងមុខទឹងហោជាង ។ ប៉ុន្តែដែលបែរទៅរក
ទៅរកពេងថែវ ត្រូវបិទជិតដោយទ្វារបញ្ឆោតជាច្រើនដែលតុបតែង
យ៉ាងល្អវិសេស ។ ទ្វារទាំង ៣ នៃក្លោងទ្វារធំចូលទៅកាន់ប្រាសាទ
អង្គរវត្តនេះ អាចផ្តល់ឲ្យមានផ្លូវចរាចរណ៍ចេញចូលបានដោយងាយ

ហើយសុទ្ធសឹងតែមានកំពូលប្រាង្គមួយពីលើតាំងអស់ តែកំពូលប្រាង្គតាំងនោះត្រូវបាក់កំបុតតាំងអស់ ៗ ជាន់លើខ្វះដែលមានស្នាមសណ្ដាកថ្មជាបន្ទប់ផ្ទាប់គ្នានោះ ឥឡូវនេះរលើវិនាសបាត់បង់គ្មានសល់ៗ ពេនថែវតាំងឡាយ ផ្នែកដែលបែរឆ្ពោះទៅរកប្រាសាទ មានជញ្ជាំងជិតឥតបង្អួច បិទយ៉ាងជិតស្និទ ថែមតាំងគុបតែងរចនាជាក្បាច់ក្បាំងក្បាលជញ្ជាំងនិងចំរឹងរូបទេពអប្សរពាច ៗ ជារបៀបក្បាច់វិចិត្រសិល្បៈគ្រឿងព្រំ ៗ ពេនថែវតាំងនេះបង្អៀតណាស់ មានទទឹងតែ ២ ម៉ែត្រ ២០ ហើយមានព្រំដែនខាងក្រៅកំណត់តែត្រឹមជួរសសរ ៤ ជ្រុងស្មើមួយជួរ ដែលមានល្វែងចំហៀងទ្រង់ទ្រាយជាពងក្ដោងតែពាក់កណ្ដាល ពីលើសសរតាំងនេះ នៅអមសងខាងពេនថែវ ៗ ឯស្នាមដំណែលនៃល្វែងចំហៀងនេះ នៅសល់តែបន្តិចបន្តួចប៉ុណ្ណោះៗ ការបាត់បង់នូវល្វែងចំហៀងនេះ អាចបំបាត់ពោលស្រឡះនូវភាគផ្សំផ្ដេកណាមួយនៃសសរតាំងនោះ ហើយថែមតាំងធ្វើឲ្យខូចខាតនូវសហមាត្រតាំងស្រុងនៃក្លោងទ្វារធំនេះ ៗ

បើទស្សនាកំពែងតាំងមូលចំពីមុខ ហាក់ដូចជារបាំងអ្វីមួយគ្របដណ្ដប់បាំងបិទប្រាសាទតាំងមូល ឲ្យឃ្លាតចាកការពិនិត្យនៃអ្នកដំណើរ ដែលចូលចិត្តមើលនូវរូបភាពខ្លះទៅនៃប្រាសាទដោយមាត្រាសាស្ត្រ ។

នៅចំអែកខ្លះនៃល្វែងខាងលិចដែលនៅជ្រុងខាងជើង មាននាគ ១ ធំសំបើមអស្ចារ្យ បញ្ជាក់ឲ្យយើងយល់ច្បាស់នូវគុណសម្បត្តិដ៏វិសេសវិសាលក្រៃលែងនៃក្បាច់រចនាអង្គរវត្ត ។

ក្បាច់ក្បាលសសរនិងក្បាច់លើធ្នឹម សឹងប្រកបដោយភាពចំហៀងដ៏បរិសុទ្ធ ដូចគ្នានឹងក្បាច់សិល្បៈនៃប្រទេសក្រិកដែរ ។ ឯចំណែកសសរ ៤ ជ្រុង ដែលផ្គាប់ជាប់ទៅនឹងជញ្ជាំងដូចជាមេទ្វារខាងលើដែលនៅគង់វង់ល្អគ្រាន់បើ ដូចជាក្លោងទ្វារខាងកើតជាដើម សឹងតែមានសុខុមាលភាពយ៉ាងចំណាន ។

មុខខាងកើតនៃពេងថៃទាំងឡាយ បញ្ជាក់ឲ្យកាន់តែច្បាស់លាស់ទៅទៀត នូវភាពនៃការចាប់ករណ៏ដោះស្រាយដ៏ល្អផុត

ដែរ , បង្អួចទាំងឡាយសឹងប្រកបដោយកូនសសរ ជើងទៀនក្រឡឹងយ៉ាងស្អាត ហើយមានចម្រឹងឆ្លាក់ជារូបសត្វគ្រប់យ៉ាងដាក់បន្តើតពីលើ នៅអមសងខាងរូបទេពធីតាទាំងឡាយ ។ រូបទេពធីតាទាំងនោះ នៅគង់វង់ល្អនៅឡើយ ហើយជួនកាលនៅផ្តុំគ្នាជាក្រុមពីរ ឬបី ។ ម្យ៉ាងទៀតរូបទេពកញ្ញានេះក៏ចាត់ទុកជារូបដ៏ល្អមួយផ្នែកក្នុងពពួករូបទេពធីតាទាំងឡាយនៃប្រាសាទអង្គរវត្តដែរ ។

តពីនេះទៅយើងនឹងនាំចក្ខុនៃអស់លោកអ្នក ទៅទស្សនាគ្រួស ៗ នូវក្លោងទ្វារធំ ៗ ទាំងឡាយ នៅកំពែងទី ៤ នៃអ័ក្សបន្ទាប់បន្សំទាំងបី ព្រោះថាមិនសូវមាននរណាទៅទស្សនាឡើយ ។ នៅកន្លែងខ្លះមានសហមាត្រដ៏ឧត្តមតែមិនទាន់ហើយនៅឡើយ ជាពិសេសប៉ែកខាងក្នុងនៃក្លោងទ្វារ , ក្លោងទ្វារទាំងនោះមានរាងបួនជ្រុងទ្រវែង គ្រប់គ្រឿងនៃកែងល្អក៏មុខទិនល្អងបំហៀង ហើយថែមទាំងតូចជាងក្លោងទ្វារខាងលិចជាច្រើនផង ។ គេដើរឆ្ពោះទៅកាន់ព្រះវិហារកណ្តាលបានដែរ ដោយផ្លូវដើរដែលគ្រាយក្នុងក្តោតព្រៃជា

ព្រឹក ហើយទិដ្ឋភាពពីក្លោងទ្វារខាងជើងទៅលើស្រះទឹកភ្នំបាខែង ជាទីចេតនាក្រៃលែង ។

## ប្រាសាទអង្គរវត្ត

ក្នុងខណៈដែលដើរក្រោមម្លប់ដ៏ត្រជាក់នៃក្លោងទ្វារទិសបស្ចិម អ្នកទស្សនាទាំងឡាយអាចក្រឡេកមើលតាមរន្ធនៃក្លោងទ្វារធំ នូវ-សូរ្យសែងនៃព្រះអាទិត្យ ដែលជះចាំងមកលើទ្រូងថ្នល់និងតួប្រាសាទអង្គរវត្តដ៏ល្អល្អាញ លើសលប់ពេញសាកលលោក ។ ទ្រូងថ្នល់នេះសង់លើដីលើកមួយផ្នែកមានបណ្តោយ ៣៥០ ម៉ែត្រ ទទឹង៩ម៉ែត្រ ៤០ ចន្លោះសម្រាប់ដើរ ៨ ម៉ែត្រ ហើយនៅខ្ពស់ផុតពីដីធម្មតា ចំនួន ១ ម៉ែត្រផង ។ នៅអមសងខាងទ្រូងថ្នល់ មានសំអិតសំអាងទៅនោះដោយបង្កាន់ដៃរូបនាគ ដែលមានជាជើងទៀនទ្រពីក្រោមយ៉ាងគួរលើសលប់ ។ នៅពេលដែលព្រះអាទិត្យជះកាំរស្មីមកលើពន្លឺដែលលោតចេញតាមដងខ្លួនជើងទៀនបង្កាន់ដៃនាគនោះ មានលំអហាក់ដូចជាក្បាច់រលោង ។ នៅសងខាងទ្រូងថ្នល់ដដែលនេះ

មានជណ្តើរប្រាំមួយប្រកបដោយក្បាលនាគបើកពារផ្សេងៗជាផ្ចិត ។ តាមការពិនិត្យសង្កេត ជណ្តើរទាំងប្រាំមួយនេះ មានលក្ខណៈហាក់ដូចជាជួយជ្រែងកុំឲ្យថ្នល់ទាំងមូលទ្រេតរលំ ជាពិសេសធ្វើឲ្យទ្រូងថ្នល់នេះកុំឲ្យមានសភាពជដែល ១ ផង ។

នៅចំពាក់កណ្តាលថ្នល់ ខាងឆ្វេងនិងខាងស្តាំ គេឃើញមានប្រាសាទតូចៗពីរបែរមុខឈមគ្នាតាមបណ្តោយទ្រូងថ្នល់ ប្រាសាទតូចនេះ គេហៅថា ប្រាសាទបណ្ណាល័យ បើតាមពាក្យចាស់ទុំធ្លាប់ហៅថា “ ក្រយាចំអិន ” តែតាមការសង្កេតទូទៅ ប្រៀបបាននឹងវត្តធំតូចក្នុងសម័យបុរាណ ។ ប្រាសាទតូចៗនេះ មានលក្ខណៈដូចជាសាលាសំណាក់ សម្រាប់ឲ្យអ្នកចូលទៅកាន់វត្តផ្លាស់សំលៀកបំពាក់ចាស់ចោលហើយស្លៀកពាក់ជាថ្មី មុននឹងចូលទៅកាន់វត្ត អាស្រ័យហេតុនេះហើយបានជាមានស្រះពីរនៅជិតនោះ ដែលមានវិស័យហាក់ដូចជាអណ្តូងនៅជិតសាលាដូច្នោះដែរ ។

ក្រៅពីនេះទីតាំងនៃប្រាសាទបណ្ណាល័យនេះ ដែលស្ថិតនៅក្នុង

ផ្នែកប្រាសាទសម័យដើមបែបវ្ជុះ ជាការប្រសើរម្យ៉ាងដែលអាចឲ្យសាសនិកជនទាំងឡាយ ឈៀងចូលទៅមើលក្បួនច្បាប់ផ្សេង ៗ បានដោយងាយផង ។ ប្រាសាទនេះមានសណ្ឋានទ្រង់ទ្រាយតាមបន្ទប់ ហើយមានសភាពប្រហែលគ្នានឹងក្លោងទ្វារទាំង ៤ នៃប្រាសាទអង្គរវត្តដែរ ។ ទីតាំងក្នុងផ្នែកមួយនៃអង្គរវត្ត និងសហមាត្រជំទាប លក្ខណៈទាំងពីរនេះបើតាមការពិចារណា ជាភាពវិសេសរបស់ប្រាសាទបណ្ណាល័យនេះ ដែលប្លែកខុសស្រឡះពីភាពប្រក្រតីនៃប្រាសាទទាំងឡាយ ៗ យើងនឹងឃើញតទៅទៀត នៅក្នុងប្រាសាទអង្គរវត្តក៏ដូចជានៅក្នុងកាលសម័យឥឡូវនេះដែរ ទូរសាលសម្រាប់ប្រជុំសាធារណជនឬសាសនិកជនទាំងឡាយ ៗ នៅអមថ្នល់ដែលយើងចូលទៅកាន់ប្រាសាទមានស្រះពីររាង ៤ ជ្រុងស្មើ ស្រះទាំងពីរនេះមានកែក្រោះម្ខាងៗ ដែលមានមាត់ប្រាំងព្រោះថ្មហើយមានទឹកពេញជានិច្ច ។ បើតាមការរកឃើញរបស់គេទើបពីមុខខាងជើងឈៀងខាងលិចស្រះនេះ នោះនៅត្រង់ប្រាសាទ នៃប្រក្នុ យើងនឹងបានជួប

ប្រទះឱ្យស្រមោលប្រាសាទតាំងមូលដ៏ល្អក្រៃលែង ពោលះទៅក្នុងទឹក នឹងថ្កុល់ដូចផ្ទាំងកញ្ចក់ ទីនេះហើយដែលទេសចររមែងចូលចិត្តថតរូបរបស់គេទុកជាអនុស្សាវរីយ ។

ឯតួប្រាសាទវិញ សាងឡើងខ្ពស់ពីដីលានរាបស្មើធំធេងមួយ ប្រកបទៅដោយកំរាលតិណជាតិខៀវខ្ចី ហើយមានដើមត្នោតជាច្រើនដុះរួតលាស់ទៅលើអាកាស ហាក់ដូចជាចង់ប្រកួតប្រជែងនឹងកំពស់ប្រាសាទ ។ នៅជុំវិញប្រាសាទមានដើមស្វាយធំ ៗ ជាច្រើន ពោលម្លប់ត្រឈឹងត្រឈៃក្រាលមកលើទីលាន ធ្វើឱ្យមានសភាពត្រជាក់ល្ហឹមជានិច្ច ។

នៅមុខផ្លូវចូលទៅកាន់ព្រះវិហារ មានព្រះលានមួយខ្ពស់ចែកជាពីរថ្នាក់ សណ្ឋានទ្រង់ទ្រាយរាងកាកបាទ ដែលគេហៅថាព្រះលានកិត្តិយស នៅពេលបុណ្យទានពេលហែក្បួនទាំងឡាយនាសម័យបុរាណ ព្រះលាននេះអាចក្លាយទៅជាវេទិកាមួយសម្រាប់ព្រះមហាក្សត្រគង់ប្រថាប់ ហើយនៅវេលាយប់ជាទីតាកសម្រាប់របាំព្រះរាជទ្រព្យ

ផង ។ ក្បាច់ក្បាលជញ្ជាំងប្រកបដោយក្បាច់រចនាល្អវិចិត្រ មាន សសរជាច្រើនទ្រពីក្រោមប្រកាន់ដៃរូបនាគ ដែលមានលំអយ៉ាង ស្រួសភាព ។

✓ នៅខាងណោះ គេឃើញមានកាពង្រ្ដក្មួយនៃជាន់ទី ១ នៃ សាជីជ្រុងបីថ្នាក់ ជាន់និមួយ ៗ មានកេងថែវព័ទ្ធជុំវិញ ដែលមាន ប្រវែងទាំងអស់ ១២០០ ម៉ែត្រ ✓។ កេងថែវទាំងនេះបង្អៀតណាស់ ហើយមានសណ្ឋានទ្រង់ទ្រាយជាកំពែង យ៉ាងម៉ាំព័ទ្ធជុំវិញព្រះវិហារ កណ្ដាល ។ នៅក្នុងព្រះវិហារកណ្ដាលមានព្រះភគវទេព អាសន សាលាមួយ ដែលមានជ្រុងនីមួយ ៗ ប្រវែងមិនលើសពី ៥ ម៉ែត្រ 22
ឡើយ ។

ការខ្វះភាពសំបូលាយគ្រប់គ្រឿងដែលមានសារៈប្រយោជន៍ ជា ចារិតលក្ខណៈមួយក្នុងពួកចារិតលក្ខណៈនានា នៃស្ថាបត្យកម្មរបស់ ប្រាសាទអង្គរវត្ត ម្យ៉ាងទៀតទស្សនវិស័យបែបនេះហាក់ដូចជាធ្វើឲ្យ យើងយល់ឃើញច្បាស់ថា ជាស្នាដៃនៃមនុស្សស្ថាបនាឡើយ ។

✓ ផែរខាងក្រោម ប្រកបដោយចម្លាក់យ៉ាងល្បីល្បាញជាងគេ
ដែលអ្នកទេសចរចូលចិត្តមើលនោះ មានទទឹងប្រវែង ១៨៧ ម៉ែត្រ
និងបណ្តោយប្រវែង ២១៥ ម៉ែត្រ ។ ក្លោងទ្វារឬគោបុរៈសឹងមាន
តួប្រាសាទពីរ ហើយភ្ជាប់គ្នាត្រង់ត្រៀងកែងនៃល្វែងមុខ នៅទីង
កេងទងមុម ដែលមានជណ្តើរឡើងចុះ ដោយកូនប្រកតូចមួយបោកង
ក្តោងជាត្របកផ្កាឈូក ទទឹង ២ ម៉ែត្រ ៤៥ ✓ ។ ផ្នែកដែលបែរ
ឆ្ពោះទៅរកប្រាសាទ គ្មានបង្អួចទេ មានតែជញ្ជាំងជិតស្និទ ។
ឯចំណែកដែលឈមមកខាងក្រៅវិញនោះ គ្មានជញ្ជាំងទេ មានតែ
សសរជ្រុង ៗ ជាច្រើនតែប៉ុណ្ណោះ ។ នៅផ្នែកខាងក្រៅនេះ មាន
23 ល្វែងបំហៀងពីរខ្នង រាងក្តោងពាក់កណ្តាលបន្តើតទម្រេតពីលើសសរ
ទាំងនេះ ។ ដំបូលពេងផែរទាំងអស់មានពណ៌ប្រផេះធ្វើពីថ្មសណ្ឋាន
ជាក្បឿងប្រក់ពីលើគ្នា ។

មើលពីចម្ងាយគេឃើញកំពូលប្រាង្គទាំងឡាយនៅមុំនៃបរិវេណ
ទី ២ ដែលបាក់កំពុតខ្លះ និងកំពូលទាំងឡាយនៃប្រាសាទកណ្តាល

ទេវអាវាសហាក់ដូចជាផុសអណ្ដែតលេចចេញឡើងលើអាកាសវេហាស៍ៗ កំពូលប្រាសាទមានសណ្ឋានរៀវមូលស្រួចទៅលើ ហាក់ដូចជាផ្កាឈូកក្រពុំទើបនឹងលេចចេញពីទង ហើយប្រកបដោយក្បាច់រចនាយ៉ាងល្អពិចិត្រ ។

✓កំពូលប្រាសាទនិមួយ ៗ ចែកជា ៤ ថ្នាក់ បន្ទប់ ទីតតម្រួត ពីលើគ្នា ៗ នៅថ្នាក់និមួយ ៗ មានរូបស្រីទេពអប្សរកាន់ទន់ភ្លន់ ក្រួតលៃល្អឈរទន្ទ្រាំ វិស័យហាក់ដូចជាពេញជីវិតរស់រវើក ហើយមិនមានក្បាលនាគបើកពពារពើងកាចសាហាវ ឈមមុខទៅគ្រប់ទិសទាំង ៤ ។ នៅកំពូលប្រាសាទមានត្របកផ្កាឈូក ៣ ស្រទាប់ទ្រក្រោមកំពូល ៗ តាមរូបចម្លាក់គង់ប្រាសាទបាយ័នបានបញ្ជាក់ថា នៅលើកំពូលទាំងនេះ មានកំពូលតុំបន្ថែមទៀតធ្វើពីសំរិទ្ធជារបៀបលំពែង✓ត្រីសូល ។

✓រោងថែវនៃបរិវេណទី ២ មានបណ្ដោយ ១១៥ ម៉ែត្រ ទទឹង ១០០ ម៉ែត្រ ភ្ជាប់គ្នានឹងរោងថែវនៃបរិវេណទី ៣ ត្រង់ជ្រុងខាងលិច

ដែលមានសណ្ឋានជាកាកបាទ មានសភាពដូចគ្នានឹងប្រាសាទ « បឹងមាលា » ដែលជាប្រាសាទមួយប្រកបដោយបែបផែនមិនខុសគ្នាពីប្រាសាទអង្គរវត្តឡើយ ។ វិសាលភាពទាំងនេះផ្សំកើតឡើងពីច្រកសម្រាប់ដើរ ឬ ពនហាលមានដំបូលមួយដែលភ្ជាប់ទៅនឹងគោបុរៈទាំងពីរ និងច្រកកាត់ទទឹងមួយទៀត ដូច្នេះសភាពវិសាលនេះមានរាងជាកាកបាទ ។ តាមការពិនិត្យ វិសាលភាពនេះស្ថិតនៅអមសងខាងថ្នាក់ទី ១ និងទី ២ នៃសាជីជ្រុង ។ បើគេដើរតាមវិសាលភាពនេះឆ្ពោះទៅរកជាន់ខាងលើបង្អស់ គេនឹងស្ងើចសរសើរដល់ស្នាដៃនៃស្ថាបត្យករជាមិនខាន ព្រោះថា មានតែកន្លែងត្រង់នេះហើយដែលប្លែកខុសពីកន្លែងឯទៀត ។ បើគេដើរពីខាងកើតឡើងមកប្រាសាទកណ្ដាលវិញនោះ នៅកន្លែងត្រង់នោះគ្មានវត្ថុអ្វីជាបម្លែកឡើយ ។ តាមការវិនិច្ឆ័យគេសន្មតថា ប្រាសាទអង្គរវត្តមានលក្ខណៈល្អវិសេសជាងគេ ព្រោះជាប្រាសាទប្រកបដោយភាពហាក់ដូចជាស្រាលបំផុត អាចផ្តល់ឲ្យមានការស្ថាបនាបានខ្ពស់ប្រៀបដូចជា

អណ្តូងត្រសែកនៅលើភាគាសហោស៍ ។

✓ ឯចំណែករានថែវទាំងពីរនៅចុងខាងជើងនិងខាងត្បូងវិញ មានទទឹងប្រវែង ២ ម៉ែត្រ ៩០ ✓ ។ ផ្នែកខាងក្រោមមានជញ្ជាំងជិត ប៉ុន្តែចំណែកដែលឈមទៅរកទីលានវិញ មានសសរពីរជួរ តែគ្មានជញ្ជាំងឡើង ។

✓ ស្ពានទាំងពីរដែលខ្វែងគ្នាជារាងកាកបាទនោះ មានភាពធំទូលាយជាងគេ ស្ពានកណ្តាលមានទទឹង ៣ ម៉ែត្រ ១៤ ។ រួមជាមួយនឹងស្ពានទាំងពីរផងមានប្រវែង ៧ ម៉ែត្រ ៧០ ✓។ នៅជ្រុងទាំងឡាយនៃត្រឡែងកែងមានផ្ទៃទំនេររាងជាអាងទឹកឬជាលាន ដែលមានផ្នែកខាងក្រោមប្រកបដោយក្បាច់ចម្លាក់ជាច្រើន ហើយមានជណ្តើរតែមួយសម្រាប់ចុះទៅក្នុងអាងទឹក ។ នៅរដូវវស្សាអាងនោះសឹងពេញដោយទឹក ប៉ុន្តែផ្ទៃទឹកមានកំរិតមិនហួសពីកាំជណ្តើរខាងលើគេនោះឡើយ ។ ដំបូលធំ ៗ ដែលខ្វែងគ្នាជាកាកបាទនោះ កាលពីសម័យបុរាណ មានពិតានឈើឆ្លាក់ក្បាច់ផកចន្ទ ។

ឯពិតានទោះ សព្វថ្ងៃមានទៅសល់ខ្លះនៅឡើយ តពីនោះទៅ នៅក្រោនកណ្តាលនៃល្វែងចំហៀង គេឃើញមានពិតានថ្មសុទ្ធ ៗ ដែលឆ្លាក់ក្បាច់ក្រឡាសមានពន្លឺភ្លឺផ្លេក ៗ នៅតាមក្បាច់ ក្រោនទ្វារគេឃើញរូបព្រះនារាយណ៍ ជាជំនួយដល់ការកូរសមុទ្រ ទឹកដោះ ទីនព្រះកាទំទេពមួយអង្គដុំលើនាគរាជឈ្មោះ « វាសុគ្គី » ជាពិសេសនៅតាមជើងសសរ មានរូបមហាឥសីអង្គុយពត់ក្ពួន ការទាជម៌ ដែលតាំងពីរប្រណាម្យសំពះទៅមុខ ៗ ជាប់បន្តពីកន្លែង នេះមក អ្នកទស្សនាតាំងឡាយនឹងមានមានោសញ្ចេតនា ស្ងើចសរ- សើរក្បាច់ទេនា នៃស្រីទេពអប្សរដែលមានកក្រៀញញឹមប្រិមប្រិយ ហាក់ដូចជារីករាយនឹងទទួលទស្សនិកជន ព្រមទាំងស្ងើចសរសើរ ដល់ថ្វីដៃនៃស្ថាបត្យករ ដែលចេះក្រឡឹងជើងទៀនបង្អួចឲ្យមានក្បាច់ ក្បូរមូលក្រឡឹង មានវិស័យដូចជាក្រឡឹងឈើធម្មតា ៗ ✓ ជញ្ជាំង កេនថែវតាំងឡាយ សឹងប្រកបដោយក្បាច់ទេនា ដែលឆ្លាក់បំផុស លើផ្ទាំងសិលាយ៉ាងល្អចេតនាយ ដែលស្ថិតនៅផុតពីការអន្តរាយ

ដោយទឹកភ្លៀង ។ ម្យ៉ាងទៀតអ្នកត្រូវអញ្ជើញចូលទៅកាន់ថែវទី២ អ្នកនឹងឃើញព្រះបដិមាករជាច្រើនអង្គ ដែលគេហៅថា "ព្រះពាន់" នៅពីស្តាំដៃនៃទ្វារចូល ។ ព្រះពុទ្ធរូបទាំងអស់នេះ គេបាននាំយកពីកន្លែងផ្សេង ៗ មកដំកល់ទុកនៅទីនេះ តាំងពីសម័យក្រោយអង្គរវត្តម្ល៉េះ ។ បើបានទស្សនាព្រះពុទ្ធរូបរួចហើយ សូមអញ្ជើញដើរតាមផ្លូវខាងជើងនៃថែវទីង អ្នកនឹងបានដល់កន្លែងមួយហៅថា "កន្លែងគក់ទ្រូង" ព្រោះនៅកន្លែងនេះកាលណាគេគក់ទ្រូងទៅ គេនឹងឮសំឡេងលាន់ខ្ទរមកវិញជាមិនខាន ។ ផុតពីកន្លែងនេះទៅមានជម្ពូទ្វីរមួយនៅខាងជើង ហើយនឹងមានជម្ពូទ្វីរមួយទៀតនៅខាងត្បូងព្រះពាន់ ។ ឡើងផុតពីទីនេះមួយថ្នាក់ទៅ អ្នកនឹងបានឃើញប្រាសាទកំពូលប្រាំ ដែលគេធ្លាប់ហៅថាប្រាសាទ "បាកាន" ដែលនៅខ្ពស់ជាងគេហើយមានជណ្តើរ ៣៧ កាំ ។

ចំណែកឯទីធ្លា ដែលនៅអមបរិវេណទី ២ និងទី ៣ ពុំសូវមានវត្ថុអ្វីចំឡែកទេ មានតែរានហាលវែង ៗ តែប៉ុណ្ណោះ ។

នៅក្នុងទីធ្លានេះមានបណ្ណាល័យធំ ១ ពីរ ប្រកបដោយក្ងានទ្វារពីរ ព្រមទាំងមានចម្រឹងចម្លាក់ជាច្រើន នៅល្វែងខាងមុខ ។

ក្រៅពីនេះ យើងត្រឡប់មកកាន់ពេទៃវខាងជើងវិញនៅមុខព្រះពាន់ យើងនឹងបានជួបប្រទះផ្ទាំងសិលាចារឹកមួយផ្ទាំង ដែលសាងឡើងក្រោយសម័យអង្គរវត្ត រួចយើងត្រូវត្រឡប់បែរមកខាងត្បូងឡើងតាមជណ្ដើរស៊ីម៉ងត៍ ដែលមិនមែនដូចជណ្ដើរនៅអង្គរកណ្ដាលហើយដើរតម្រង់ទៅថ្នាក់ទី ៣ ។

ពេទៃវនៃបរិវេណទី ៣ មានទទឹង ២ ម៉ែត្រ ៤៥ ផ្នែកខាងក្រៅមានជញ្ជាំង ផ្នែកខាងទីធ្លាមានចម្លាក់ចម្រឹងជាច្រើន ។ ថែវនេះគ្មានពានហាលទេ មានតែរូបទេពកញ្ញាជាច្រើនដែលមានសក់គុបតែងលំអប្លែក ១ គ្នាជាអនេក ។ ទិដ្ឋភាពពីជើងបន្ទប់មុខខាងជើង ឆៀងខាងលិច នៅវេលាថ្ងៃទេរ និងពីមុខខាងជើងឆៀងខាងកើត នៅវេលាយប់ខែភ្លឺស្រឡះចាំងផ្ទះលើវិមានកណ្ដាល អាចផ្ដល់ដល់យើងនូវការចាប់អារម្មណ៍មួយយ៉ាងអស្ចារ្យ ដែលមិនអាច

បំភ្លឺបាន ។ នៅផ្នែកខាងក្រោមប្រាសាទវិញ មានភាពមាំ ទូលាយអស្ចារ្យបែកជាពីរជាន់ កំពស់ទាំងអស់១៣ម៉ែត្រ រាង ៤ ជ្រុង ស្មើដូចគ្នាទឹងបញ្ចាស្ចូលដែលមានជ្រុងនិមួយ ៗ ប្រវែង ៦០ ម៉ែត្រ ។ ដំណើរទាំងអស់ដែលសម្រាប់ឡើងទៅកាន់ប្រាសាទ សឹងប្រកប ដោយកាំជាជាន់ជាថ្នាក់ សណ្ឋានទ្រង់ល្វយទៅមុខនៅពីលើផ្លូវផ្នែក ខាងក្រោមនេះបន្តិច ៗ ដំណើរទាំងនេះចោត ៗ ណាស់ ខ្លះមាន ជម្រាលដល់ទៅ ៧០ អង្សា ហើយមានបង្អួចតែមួយផង ។ នៅពីលើ ផ្នែកខាងក្រោមនេះ គេជួបប្រទះរោងវែងជាច្រើន ៗ រោងវែង និមួយ ៗ មានគោបុរៈជាស័ក្ស ប្រកបដោយមុខក្លោងទ្វារមានសសរ ជាច្រើន ។ ក្នុងតួប្រាសាទទាំងមូលបានតែរោងវែងទាំងនេះទេ ដែលត្រូវកាំរស្មីនៃព្រះអាទិត្យបាំងចូលទាំងសងខាង ទាំងព្រឹក ទាំងល្ងាច ។ ពន្លឺអាចចូលទៅបំភ្លឺក្នុងរោងវែងទាំងនេះបាន អាស្រ័យ ដោយបង្អួចចម្រឹងនៅតាមជញ្ជាំង និងប្រឡោះសសរពីរជួរនៃល្វែង ខាងដំបូង ៗ ។ នៅចំកណ្តាល មានតួប្រាង្គធំសួបមួយធំជាងគេ

កំពស់ ៤២ ម៉ែត្រ ផុសលេចចេញពីទ្រនុងទាំងបួននៃដំបូល ដែលខ្វែងគ្នាជាកាកបាទ ប្រកបដោយហោណាំងពីរជាន់ ៗ ប្រាង្គនេះមានកំពស់ពីទ្រូងថ្នល់ខាងមុខចំនួន៦៥ ម៉ែត្រ ហេតុដូច្នេះប្រាង្គនេះខ្ពស់ផ្តាច់គេ ✓ៗ

ក្នុងខណៈដែលយើងដើរវង់តាមលានដែលព័ទ្ធជុំវិញជាន់ទី ២ យើងនឹងបានឃើញក្បាច់លំអ នៃក្លោងទ្វារចូលទាំងឡាយនៃរោងថែវបរិវេណប្រាសាទ ហើយជាពិសេសយើងនឹងបានឃើញក្បាច់ក្លោងទ្វារខាងកើតនៃរោងថែវខាងជើង និងក្បាច់ក្លោងទ្វារចូលកណ្តាលនៃរោងថែវខាងត្បូង ។ ឆ្ងាយពីទីនេះបន្តិចមក យើងនឹងបានជួបប្រទះគេទៅទៀត នូវក្បាច់ក្លោងទ្វារនៃប្រាង្គមុមទាំងឡាយនៃក្រុមប្រាសាទកណ្តាល ដែលនៅក្នុងចំណោមក្លោងទ្វារទាំងនេះមានតែក្បាច់ក្លោងទ្វារខាងជើងឆៀងខាងកើតទេ ដែលមានឆាកចំបាំងទាំងឡាយដ៏ច្រើន ហើយជាពិសេសនៅគង់វង់ល្អជាងគេ ៗ នៅមុខខាងលិច គមសងខាងសក្យផងនោះ មានបណ្ណាល័យតូច ៗ ពីរ

ប្រកបដោយទ្វារពីរនឹងបង្អួចបញ្ឆោតជាច្រើន ។

បណ្ណាល័យនេះ មានទ្រូងថ្នល់មួយពងជាកាកបាទ ហើយមានសសរខ្ទី ៗ ជាច្រើនសម្រាប់ទល់ទ្រផង ។ ជណ្តើរចុះមកជាន់ទី ៣ មិនសូវចោតដូចជណ្តើរតាំង ១១ ឯទៀត ៗ ទេ ជម្រាលប្រហែល ៤០ អង្សាតែប៉ុណ្ណោះ ។ ប៉ុន្តែអ្នកទស្សនាចូលចិត្តចុះតាមជណ្តើរអ័ក្សខាងត្បូងជាង ព្រោះជាជណ្តើរមានការជួសជុលធ្វើដោយស៊ីម៉ងត៍ជាថ្មី ហើយមានបង្កាន់ដៃដែកមួយផង ដែលអាចឲ្យឡើងចុះបានយ៉ាងស្រួល គ្មានភ័យព្រួយនឹងរអិលធ្លាក់ឡើយ ។

រានថែវជាបរិវេណខាងលើគេបង្អស់ មានទំហំតែ ២ ម៉ែត្រទេ ហើយត្រូវបែងចែកជាផ្លាតូច ៗ បួន ដោយរានថែវដែលមានអ័ក្សទទឹង ២ ម៉ែត្រ ៤០ និងវែងពីរផង ។ អ្នកទស្សនាកាលបានមកដល់ទីនេះហើយ សូមកុំភ្លេច ត្រាច់ចរមើលរានថែវខាងលើនេះឡើយ ហើយសូមកុំភ្លេចចោលភ្នែក មើលដំបូលនៃរានថែវខាងក្រោមតាំង-ឡាយ និងទៅលើភូមិស្រុក ឬទេសភាពព័ទ្ធជុំវិញប្រាសាទ អ្នកនឹង

បានឃើញផ្លូវបាញ់ត្រង់សំដៅទៅចំណតយន្តហោះ ហើយមិនខ្វនក្ន បារែន ជាពិសេស សូមកុំភ្លេចពិនិត្យនូវទ្រូងថ្មលំទិសត្បូងប្រាសាទកណ្តាលឲ្យសោះ ។

តាមការពិនិត្យគ្រប់ថែបយ៉ាងទៅលើក្បាច់ចម្លាក់ លើស្នាមទឹកមាសដែលជិតនៅសល់ដោយកន្លែងខ្លះៗនោះ យើងអាចសន្មតបានថា ប្រាសាទអង្គរវត្តទាំងមូលសិងលាបថ្នាំពណ៌ លាបទឹកមាសទាំងអស់ ។ តាមការសង្កេតទូទៅ នៅលើប្រាសាទកណ្តាល គេអាចដឹងថាក្នុងសម័យបុរាណបាន មានរូបទេវភពជាដំណាក់ព្រះនារាយណ៍ នៅគ្រប់មុខប្រាង្គទាំងបួន ។ ដល់ក្រោយមក ពុទ្ធសាសនិកជនទាំងឡាយមានព្រះរាជាជាដើម បានយករូបទេវភពទាំងនោះចេញហើយដាក់ថ្មបំពេញធកទាំង ៤ ជាទ្វារខ្វង ហើយឆ្លាក់ព្រះពុទ្ធរូបទ្រង់ឈរជាជំនួសវិញ ។ ក្នុងឆ្នាំ ១៩០៨ លោក កុម្ម៉យ ក៏បានចំលុះបើកទ្វារខាងត្បូងធ្វើជាព្រះធម្មតាវិញ ហើយថែមទាំងបានរកឃើញអណ្តូងមួយផង ។ ក្រោយមក ក្នុងឆ្នាំ១៩៣៤ លោកហ្សកទ្រូវេ

បានធ្វើប្រតិបត្តិការក្នុងអណ្ដូងនោះ ។ អណ្ដូងកណ្ដាលបានជីកក្នុងដីទាបជម្រៅ ២៤ ម៉ែត្រ ស្មើនឹងផ្ទៃដីនៃបរិវេណខាងក្រៅធម្មតា ។ កាលដែលចុះទៅក្នុងអណ្ដូងនោះ គេមិនបានប្រទះឃើញកំណប់អ្វីជាដុំៗ ចំឡែកឡើយ ព្រោះតាមការពិត កំណប់នោះត្រូវបានគេលួចយកទៅអស់តាំងពីបុរាណណាស់ទៅហើយ តែគេបានរកឃើញក្នុងជម្រៅ ២៣ ម៉ែត្រ នូវយ័ន្តពីរសន្លឹកនៃគ្រឹះរាងមូល ធ្វើអំពីមាសដែលមានទំហំ ០,១៨ម. និងទម្ងន់ ៦៥ ក្រាម សិតបញ្ចូលទៅក្នុងផ្ទាំងថ្មបាយក្រៀម ។

យើងសូមទាញសតិអារម្មណ៍លោកអ្នកទស្សនាទាំងឡាយថាព្រះសង្ឃខ្មែរយើងកាលពីសម័យបុរាណ បានជួយប្រតិបត្តិការរៀបចំជួសជុលប្រាសាទឲ្យបានស្អាតល្អដែរ តែគួរឲ្យស្ដាយទៅវិញព្រោះអង្គៈបានផ្លាស់ប្ដូរជំនួសមេក្លោងទ្វារខ្លះ ដែលខូចខាតបាក់បែកដោយយកសសរ ពីផ្នែកផ្សេងៗទៀតនៃប្រាសាទនោះ មកជំនួសនាំឲ្យខូចភាពដើម និងបាត់បង់ភាគផ្សេងៗខ្លះនៃប្រាសាទទៅវិញ ។

# រូបចម្លាក់

ផ្ទាំងសិលាជាជញ្ជាំងពេញថែវនៃបរិវេណទី ៣ សឹងប្រកបដោយ
រូបចម្លាក់ជាច្រើនអនេក ដែលមានកំពស់ ២ ម៉ែត្រ និងផ្ទៃក្រឡា
ទំហំពីរគីឡូម៉ែត្រទ្វេគុណ ដោយឥតរួមបញ្ចូលមណ្ឌបពីរខាងក្នុង
ផង ។ រូបចម្លាក់ទាំងនេះ និទានអំពីរឿងព្រេងនិងពាក
ប្រវត្តិសាស្ត្រ ។ តាមការសង្កេតពិនិត្យយ៉ាងម៉ត់ចត់ ក្បាច់ចម្លាក់ទាំង
ឡាយមិនមែនធ្លាក់ជ្រៅទៅក្នុងថ្មប៉ុន្មានទេ ហើយច្បាស់ជាថ្វីដៃដ៏
បរិសុទ្ធរបស់វិចិត្រករដោយពិតប្រាកដ ព្រោះសម័យនោះអ្នកធ្លាក់
35 គ្រាន់តែធ្វើតាមលំនាំស្នាមគំនូសនៃអ្នកគូរតែប៉ុណ្ណោះ ។ លោកគ្រូ
ដែលបានពោលបញ្ជាក់ថា ក្បាច់ក្បូរនិងរូបចម្លាក់ទាំងអស់មិនមែនជា
ស្នាដៃរបស់ជាងធ្លាក់តែមួយរូបឡើយ គឺជាស្នាដៃរបស់វិចិត្រករ
ច្រើនរូបរាប់មិនអស់ ។ ព្រោះគេបានសង្កេតឃើញថា
រូបចម្លាក់ខ្លះមានភាពយ៉ាងប្រណីតល្អជាងគេ ដែលជាស្នាដៃសិល្បករ
ស្ទាត់ជំនាញ ហើយយល់ច្បាស់នូវទម្រង់រូបដែលត្រូវគូរ រូបខ្លះ

ទៀតមានភាពអន់ថយណាស់គេ ដោយអ្នកថ្នាក់មិនសូវយល់ច្បាស់លាស់នូវទម្រង់រូប ហើយក៏បណ្ដោយឲ្យមានភាពមិនដូចគេឯង ដូនកាលរាងមូលក្រឡុចហួស ដូនកាលរាងស្គមស្ដើងហួសក៏សឹងមាន ៗ តាមធម្មតា អ្នកទស្សនាដែលមកមើលជាបន្ទាន់ ច្រើនតែចូលចិត្តទៅគន់ពិនិត្យរូបចម្លាក់ក្នុងរានថែវ ដែលនៅខាងត្បូងអាគ្នេយ៍នៃប្រាសាទ ទិសភាគបន្ថែមនៃរានថែវដែលនៅខាងត្បូង រហូតទៅទល់គ្នានឹងមណ្ឌបមុខខាងជើងឆៀងខាងលិច ។ រានថែវនេះប្រកបដោយរូបចម្លាក់ល្អបំប្លែក ៗ ម្យ៉ាងទៀត ក្រៅពីនេះនៅក្នុងផ្នែក ១/៤ នៃរានថែវខាងជើងឆៀងខាងកើត រូបចម្លាក់មានភាពអន់ថយជាងគេ ព្រោះក្នុងនេះ ហាក់ដូចជាធ្វើឡើងដោយប្រញាប់ប្រញាល់មិនសូវផ្ចិតផ្ចង់ឡើយ ។ លោក គោឡូប៊ែរ បានពិនិត្យយ៉ាងច្បាស់លាស់នូវលក្ខណៈនៃក្បាច់និងរូបចម្លាក់ ហើយបានធ្វើសេចក្ដីអធិប្បាយថា ព្រោះជាមានអន្តរាគមន៍នៃអ្នកប្រតិបត្តិការជាតិចិនមកជួយបង្ហើយជាបន្ទាន់ នូវកិច្ចការដែលបានគ្រោងទុកជាមុន



អង្គរវត្ត

មើលនៅលើថ្នាក់ទី ៣ កំពូលខាងលិចជ្រុងខាងជើង

ហើយដែលមិនទាន់ហើយនៅឡើយ ។ ក្នុងការរៀបចំផ្ទាំងរូបចម្លាក់ គេបានជួបប្រទះឃើញភាពផ្សេងៗគ្នាពីរ ផ្ទាំងគំនូរទី ១ ប្រកបដោយសមាសភាពតែ ១ ដែលពោរពេញទៅដោយឆាកចំបាំងកាំងផល់មួយធំ , ផ្ទាំងរូបឯទៀតៗ សឹងប្រកបដោយរូបជាជាន់ជាថ្នាក់តាមរបៀបជារូបចម្លាក់ដ៏ថ្លៃថ្នូរ នៃសម័យពាក់កណ្ដាលសតវត្សទី ១១ ។ បើតាមការពិនិត្យពិចារណារបស់លោក សេដែស សឹងតែទាំងអស់នោះ អ្នកទស្សនាត្រូវដើរមើលរូបចម្លាក់ ចាប់ពីក្លោងទ្វារចូលខាងលិចទៅខាងត្បូង តាមទិសហៃឡាច មិនត្រូវដើរមើលពីកើត ទៅជើងតាមទ្រឹស្ដីប្រមាណរបស់លោក បូស ដែលយកមូលដ្ឋានកាលសម័យនៃព្រឹត្តិការណ៍ដែលបញ្ជាក់ពីរជ្ជកាលនៃព្រះទេវរាជឡើយ ។

ក្រៅពីនេះ រឿងរ៉ាវ·នៅផ្ទាំងផ្ទាំងនៃរោងទងសឹងតាក់ទងនឹងរឿងព្រះនារាយណ៍ស្ទើរតែទាំងអស់ ។

## រោងទងខាងលិច ផ្នែកខាងត្បូងអ័ក្ស

នៅតាមរោងទងខាងលិចផ្នែកខាងត្បូង មានរឿងចំបាំង

នៃក្សត្រ កុរុ រវាងពួកខាងស្ដាំកៅរវៈ ខាងឆ្វេង បាណ្ឌវៈ ។ ក្នុងផ្ទៃរឿងព្រេងហិណ្ឌូនេះគេចែកជា ៤ សន្លាក់ដូចតទៅនេះ ។

ជំបូងបង្អស់ នៅខាងចុងតាំងពីរ មានក្បួនហែមួយ ដែលគេឃើញមានអ្នកក្សត្រី និងកងទ័ពថ្មើរជើងប្រកបដោយគ្រឿងអាវុធយុទ្ធភណ្ឌសម្រាប់ចូលប្រយុទ្ធ ។ គេឃើញមេទ័ពធំ ១ ជិះដំរី និងរទេះសេះ នៅលើផ្នែកកណ្ដាលមានការប្រយុទ្ធយ៉ាងឃោរឃៅ ដូចជាមានសេះត្រូវព្រួញនិងមនុស្សត្រូវស្លាប់ គួរឲ្យអាណោចអាធម្មជាងខ្លាំង ។ ក្នុងផ្ទៃចំបាំងគេឃើញមេទ័ពខាងកៅរវៈ ឈ្មោះ ភិស្មៈ ត្រូវព្រួញដួលដេកស្លាប់នៅកណ្ដាលចំណោមក្រុមគ្រួសារ ដោយបញ្ចេញទឹកមុខញញឹម ឥតតក់ស្លុតដល់សេចក្ដីស្លាប់ ហើយនិងព្រោណៈដែលមានសក់ចួនទៅក្រោយតាមរបៀបព្រាហ្មណ៍ ដោយគ្មានពាក់មកុដឡើយ ។ នៅខាងស្ដាំ គេឃើញមេទ័ពឈ្មោះ អជិនៈ ជិះលើរថដែលមានសារថីដៃ ៤ ជាអ្នកបររថ ។ អជិនៈនេះ ជាអវតារនៃព្រះនារាយណ៍ កាឡាខ្លួនផងហើយជាមេទ័ពពួក បាណ្ឌវៈផង ។

ដោយការស្លាប់អន្តិមនៃទសរថនិងជនប្រិយយោធានិនាក់ រូប-ចម្លាក់ខ្លះឡើងលោងស្រិលវិស័យដូចជាសំរិទ្ធ ហើយតាំងស្មើគ្នាផុត លេចពីផ្ទាំងក្បាច់គួរឲ្យស្ញប់ស្ញែងក្រៃលែង ។

## មណ្ឌបមុមខាងត្បូង ឆៀងខាងលិច

ត្រៃឡែងកែងនៃសាខាតាំង ៤ ជ្រុងខាងត្បូង ឆៀងខាងលិច មានក្បាច់ក្បូរចម្លាក់ជាច្រើន តែក្បាច់ខ្លះត្រូវខូចខាតអន្តរាយអស់ជាច្រើនអន្លើ ដោយហេតុមកពីត្រូវទឹកភ្លៀងដែលជ្រាបចូលតាមគ្រោងដំបូលដែលបិទមិនជិតល្អ ។

ទី ១.– នៅលើទ្វារខាងជើង : « រឿងរាមកេរ្តិ៍ » : ព្រះរាមទ្រង់ 4
ដេញបាញ់ពិឃាដប្រើសមាស ដែលយក្សឈ្មោះ មារិច មកនិម្មិតខ្លួន បញ្ឆោតព្រះរាមនិងព្រះនាង សីតា ជាឧបាយកលឲ្យក្រុងរាពណ៍លបលួចយកព្រះនាងសីតា ។

ទី ២.– នៅសាខាខាងជើង, ផ្ទាំងខាងកើត : « ក្រឹស្នៈនិងព្រះនាង សត្យភាមា ជាអគ្គមហេសី » : ក្រឹស្នៈទ្រង់ទ្រគំ គោវទ្ធនៈ

ដែលមានរាងជាចតុរស្ស ឬ បួនជ្រុងញ្ញាយុ ហើយជានិមិត្តរូបនៃការជួយ
ការពារដល់ក្រុមគង្វាលគោទាំងឡាយ ឲ្យរលាកផុតពីគ្រោះថ្នាក់អន្តរាយ
នៃព្យុះសង្ឃរា ដែលកើតឡើងដោយឥន្ទ្រាធិរាជ (កំហឹងនៃព្រះឥន្ទ្រ)។

ទី ៣.– សាខាខាងជើង ផ្ទាំងខាងលិច នៅលើបង្អួច :
„ រឿងទាញនាគកូរទឹកសមុទ្រ „ : ពួកទេវតាម្ខាងនិងពួកអសុរ
ម្ខាង ទំទាញនាគដែលធ្វើជាព្រ័ត្រកូរកទឹកសមុទ្រ ដើម្បីដណ្ដើម
យកទឹកអម្រឹត ។ ទីបំផុតជ័យជំនះត្រូវបានដល់ទេវតា ដែលត្រូវបាន
ទឹកអម្រឹតគឺ „ ទឹកដែលផឹកទៅមិនចេះស្លាប់ „ ។ នៅខាងលើ
វង់ចក្រពីរ គឺជាឋានព្រះអាទិត្យនិងព្រះចន្ទ្រ ។

ទី ៤.– សាខាខាងលិច ផ្ទាំងខាងជើង នៅលើបង្អួច :
ក្រុងរាពណ៍ក្លាយខ្លួនជាសត្វតុកកែ ដើម្បីចូលទៅក្នុងក្រឡាបន្ទំព្រះ
ជាយានៃព្រះឥន្ទ្រាធិរាជ ។

ទី ៥.– នៅលើទ្វារខាងលិច : ព្រះពាលកុមារក្រឹស្ណៈ ទំប្រឹង
ទាញត្បាល់ថ្មសិលា ដែលព្រះមាតាយកទៅចងភ្ជាប់នឹងដើមឈើ

ឈ្មោះ អរជុន បណ្ដាលឲ្យលំរលើនដើមអរជុន អស់ពីរដើម ។

ទី ៦.– សាខាខាងលិច ផ្ចាំងខាងត្បូង នៅលើបដ្ឋ : ក្រុងពពណ៍សម្ដែងឫទ្ធិនិមិត្តខ្លួនជាមុខ ១០ ដៃ ២០ ចាប់អង្រួនក្អែក-លាស់ ដើម្បីនាំរំខានដល់ព្រះឥសូរ ទិនព្រះនាង ឧមាភគវតី ជាព្រះអគ្គមហេសីនៃព្រះអង្គ ។

ទី ៧.– សាខាខាងត្បូង ផ្ចាំងខាងលិច នៅលើបដ្ឋ : ព្រះឥសូរគង់ផ្ទឹសមាធិលើក្អែកលាស់ ព្រះនាងឧមាភគវតី និមិត្តខ្លួនជាក្សត្រមួយអង្គចូលទៅអង្គុយគាល់ ។ ព្រះកាមៈ " កាមទេពនៃសេចក្ដីស្នេហា " យិតកោងធ្នូសរកក់កែវបាញ់ជម្រង់ព្រះឥសូរ ។ ដោយបាញ់ឫទ្ធិព្រះឥសូរ ព្រះកាមៈ ក៏ចូលទីវន្តតខ្លួនឯងក្នុងរន្ធង់ព្រះហស្តតាំងទេ្វ នៃព្រះអគ្គមហេសីព្រះនាមរតិ ។

ទី ៨.– នៅលើមាត់ទ្វារខាងត្បូង : មានកម្មនៃព្រះលមព និងការលត់អគ្គិភ័យដោយព្រះក្រិស្ណៈ ។

ទី ៩.– សាខាខាងត្បូង ផ្ចាំងខាងកើត នៅលើបដ្ឋ :

រឿងរាមកេរ្តិ៍ត្រង់ក្រុង ពាលី និង សុគ្រីព ច្បាំងគ្នា ហើយព្រះរាមជួយសុគ្រីពដោយយកកោទណ្ឌបាញ់សម្លាប់ក្រុង ពាលី ។ នៅផ្នែកក្រោមគេឃើញស្តេចស្វាឈ្មោះ ពាលី ពាក់មកុដត្រីសូល៍លើក្បាល ចូលទិវង្គតលើទ្រូងព្រះហស្តនៃព្រះនាង តារា ជាអគ្គមហេសី ហើយមានពួកពលស្វា កំពុងយំសោកសៅអាណិតអាសូរដល់សពក្រុងពាលីជាម្ចាស់នៃខ្លួន ដោយធ្វើទឹកមុខនិងអាកប្បកិរិយាផ្សេងៗគ្នា ។

ទី ១០.– សាខាខាងកើត ផ្ទាំងខាងត្បូង នៅលើបន្ទួប : ផ្ទាំងរូបចម្លាក់នៅកន្លែងនេះ ត្រូវវិនាសខូចខាតអស់ខ្លះទៅហើយ គេមិនអាចសន្និដ្ឋានបានថា ជារឿងអ្វីឡើយ ។ តែគេឃើញមាននៅកណ្តាល នូវរូបបុរសម្នាក់អង្គុយសន្ទនាជាមួយអ្នកឯទៀត ១ ជាប្រើន ។ នៅពីលើរូបនេះ មានរូបមហាឥសី ។

ទី ១១.– លើបន្ទួបខាងកើត : ត្រង់ក្រឹស្ណៈ ទ្រង់ទទួលតង្វាយដែលគេយកមកថ្វាយ ។

ទី ១២.– សាខាខាងកើត ផ្ទាំងខាងកើត : " បុណ្យអុំទូក "

ទ្វារកវត គេឃើញមានសំពៅពីរពោរពេញដោយមនុស្សកុះករ ។ នៅក្នុងទូកខាងលើ មានអ្នកលេងចតុរង្គ ទូកខាងក្រោម មានមនុស្សកំពុងប្រឡែងលេងជាមួយទីងគូន ។ នៅខាងស្តាំ មានមនុស្សប្រជល់មាន់នៅលើទូក ។

## រោងទងខាងត្បូង ផ្នែកខាងលិច

នៅជ្រុងនៃរោងទងនេះ ផ្ទុងបញ្ចាក់ពីប្រវត្តិសាស្ត្រ ដែលមានផ្ទាំងចម្លាក់តែមួយផ្ទាំងប្រវែង ៩០ ម៉ែត្រ គង់ព្រះបាទ សុរិយោ-វរ្ម័នទី ២ ដែលជារាជស្ថាបត្យករនៃប្រាសាទអង្គរវត្ត លុះដល់ក្រោយទិវង្គតគេថ្វាយព្រះនាមថា “ព្រះបរមវិស្ណុលោក” ។

ផ្នែកខាងជ្វេងនៃផ្ទាំងរូបចម្លាក់ ផ្ទុងគង់នាយកម្មបណ្ឌិតយកជញ្ជាយមកថ្វាយស្តេច ព្រះបាទសុរិយោវរ្ម័នទី ២ ដែលទ្រង់ជាអ្នកសាងប្រាសាទអង្គរវត្ត គង់ប្រថាប់ក្រោមស្វេតច្ឆត្រ ដែលលំអដោយរូបនាគរាជ នៅលើភ្នំកំពែង ហើយទ្រង់ប្រជុំនាម៉ឺនសព្វមុខមន្ត្រី ដែលគង់គាល់ជិតស្តេច មានព្រះរាជវង្សានុវង្សរាជបណ្ឌិត ព្រាហ្មណ៍

បុរោហិត និងមន្ត្រីធំម្នាក់ឈ្មោះ ស្រីវធិនៈ អង្គុយប្រណម្យយកដៃម្ខាងដាក់លើដើមទ្រូង បែរមុខឆ្ពោះទៅរកព្រះរាជា ដោយសេចក្ដីគោរពកោតក្រែង ៗ នៅខាងក្រោម ក្បួនហែនៃព្រះអគ្គមហេសីគង់លើអង្រឹងស្នែង ដែលមានពលបរិពារកាន់ សែហែហមហោមរោមយ៉ាងអធឹកអធម ៗ តទៅទៀត ពួកពលសេនាពាក់មួកក្បាលសត្វយាត្រាទ័ពចុះពីលើភ្នំ ដែលមានពួកមេទ័ពជិះដំរីបាំងក្លស់ព្រោងព្រាតឯកងទ័ពថ្មើរជើងវិញ ហែហមដោយកងទ័ពសេះ មានព្រាហ្មណ៍បួនសក់រ៉ាយឈ្មោះ នាយហៅហ្វាយជិះលើអង្រឹងស្នែង និងមានពួកទាហានសែងជើងក្រានភ្លើងសក្តិសិទ្ធិ ដើម្បីបូជាទេព្ដាក្បាលទាហានចំបាំង មានពួកផ្សៃត្រដើរជួរមុខដូចដែលយើងឃើញសព្វថ្ងៃនេះដែរ ៗ

ចាប់ពីធ្នើងមក គេឃើញព្រះបាទសូរិយាវរ្ម័នទី ២ គង់គ្រឿងគ្រោះជាព្រះអង្គប្រមុខនៃកងទ័ព គង់លើដំរីក្បាលពាក់មកុដចមប្រាសាទ បាំងក្លស់ ១៩ ជាន់ ព្រះហស្តកាន់ផ្គាក់ ៗ នៅខាងមុខ ផ្នែកខាងស្ដាំក្បួនហែនៃកងទ័ពសៀម ដែលជាចំណុះជាតិខ្មែរ

ស្មៀកពាក់ប្លែក ៗ ខុសគេ ដោយសំពត់សំឡាយរំសាយ ក្បាលពាក់ស្លាបសត្វ ដូចជាបានដើរទឹក សណ្ឋានជាពួកព្រៃដំកាបសាហាវ ។

## រោងទងខាងត្បូង ផ្នែកខាងកើត

ផ្ទាំងចម្លាក់នៅផ្នែកនេះ ចែកជា ៣ ថ្នាក់ស្របតាមទ្រឹស្តីនៃព្រះពុទ្ធសាសនាគឺ: ១ ស្ថានទេវលោក, ២ ស្ថានមនុស្សលោក, ៣ ស្ថាននរក ដែលផ្ទាំងនេះ គេហៅថាផ្ទាំងនរក មានប្រវែង ៦០ ម៉ែត្រ ។

សេចក្តីអធិប្បាយតាមផ្ទាំងចម្លាក់ : ព្រះយមរាជជាម្ចាស់នៃត្រៃលោកមានព្រះហស្ត ១៨ គង់លើគោទសកកជ ហើយមានលេខាធិការផ្ទាល់ព្រះអង្គម្នាក់ឈ្មោះ ចិត្រគុប្តៈ អង្គុយពីខាងមុខកំពុងវិនិច្ឆ័យទោសចំពោះសត្វដែលធ្វើអំពើអាក្រក់ ៗ តាមសិលាចារឹកប្រាប់ថា «យកធម៌ជាធំ» ។ ចាប់ពីត្រង់មក នៅខាងលើ មានផ្លូវទៅកាន់ស្ថានសួគ៌ទាំង ៣៧ ជាន់ ដែលមានជាវិមានអណ្តែត ហើយពពួកទេវតាបោះលេងកំសាន្តសប្បាយនៅវិមានរ ។ តែផ្លុយទៅវិញ នៅខាងក្រោម មានផ្លូវទៅកាន់ស្ថាននរក ដែលគេឃើញពួកសត្វនរកកំពុង

រងទុក្ខទោសស្រែកថ្ងូរហ៊ឹះ ដោយអំពើអាក្រក់ដែលខ្លួនបានធ្វើ ។ ស្ថាននរកនេះមាន ៣៦ ជាន់ ។

គេឃើញសត្វនរកខ្លះ ត្រូវពស់នាគរាជចាប់ស៊ី ខ្លះត្រូវរមាស ខ្លា ឆ្កែ ចចក ហែកជញ្ជែងទាំងស៊ី ខ្លះត្រូវឃ្មោះឃ្មាងគាបកណ្ដ ខ្លះត្រូវក្របីជល់ ដំរីព្រួចសម្លាប់ ខ្លះត្រូវក្អែកត្មាតចំពុះដែកចឹកចំហែកលលាដ៍ក្បាល ខ្លះឡើងដើមរកាដែកដោយអំពើលបលួចសាហាយស្មន់ប្រពន្ធ ប្ដី កូនគេ ខ្លះត្រូវនាយនិរយបាលបោះដែកគោលធ្លាងដៃជើងភ្ជាប់នឹងជញ្ជាំង ខ្លះទៀត ត្រូវនាយនិរយបាលយកដែកចុងដើមភ្លោតបុកចំលុះពីក្បាលដល់គូថ ពីឆ្វេងទៅស្ដាំ ចាក់ខ្ទាត់ខ្វែងគ្នាយ៉ាងការុណា ។ នៅចន្លោះកណ្ដាលផ្លូវខាងកើតបន្ទិច មានរបាំងដោយរូបគ្រុឌជាច្រើន ដែលជានិមិត្តរូបនៃស្ថានមនុស្សលោក នៅជាកណ្ដាលនៃស្ថាននរក និងស្ថានទេវតា គេឃើញស្រីទេពអប្សរបវរកញ្ញាហោះអណ្ដែតត្រសែតយ៉ាងសប្បាយរីករាយ ។

នៅស្ថាននរកវិញ គេឃើញសុទ្ធតែអំពើបាបនៃពួកសត្វនរក

ដែលនឹងទុក្ខទោសយ៉ាងទារុណ ។ នៅជិតនុ៎ះ មានអក្សរសិលាចារឹកខ្ទី ១ ចំនួន ៣៦ កន្លែង សម្រាប់ពន្យល់នូវការកាត់ទោសចំពោះពួកសត្វដែលបានធ្វើអំពើល្អនិងអាក្រក់ ។ អ្នកធ្វើល្អព្រះធម៌ឲ្យទៅកើតស្ថានសួគ៌ ឬ ស្ថានមនុស្ស អ្នកធ្វើអាក្រក់ស្តេចយមរាជឲ្យចាប់ជើងទម្លាក់ចុះក្រោម បោះបញ្ចូលក្នុងស្ថាននរក ។

## រោងទងខាងកើត ផ្នែកខាងត្បូង

នៅផ្ទាំងនេះ ផ្នែកខាងត្បូង : គងទ័ពខាងពួកអសុរកំពុងត្រៀមខ្លួនចាំមេទ័ព , ផ្នែកខាងជើង : គងទ័ពខាងពួកទេវតាកំពុងត្រៀមខ្លួនចាំមេទ័ពខ្លួនដែរ ដើម្បីចូលប្រយុទ្ធនឹងគ្នាក្នុងការទាញព្រ័ត្រយកជ័យជំនះ ។

នៅចំពាក់កណ្តាលផ្ទាំង ថ្វៃងអំពីរឿងកូរទឹកសមុទ្រដែលមានចែកជាពីរថ្នាក់ : ថ្នាក់លើគេឃើញពួកទេវតា និង ទេពអប្សរហោះហើរលើអាកាស ដែលមានព្រះនាង លក្ខ្មី ហោះចំពីលើពាក់កណ្តាលខ្លួននាគ , ថ្នាក់កណ្តាលគេឃើញពួកទេវតា និង ពួកអសុរកំពុងប្រឡង

ដែនឫទ្ធិគ្នាដោយយកនាគពស់ឈ្មោះវាសុកិ មកធ្វើជាព្រ័ត្រ ថ្នាក់ទី ៣ គេឃើញមានត្រី អណ្ដើក និងសត្វសមុទ្រជាច្រើន នៅថ្នាក់ក្រោមបំផុត គេឃើញតួនាគពស់ឈ្មោះវាសុកិ ។

តាមរឿងនេះ សេចក្ដីបញ្ជាក់ថា : ទេវតានិងអសុរចង់បានទឹកអម្រឹត ដែលជាទឹកផឹកទៅមិនចេះស្លាប់ ទើបបណ្ដាលជាហេតុឲ្យនាំគ្នាកូរទឹកសមុទ្រ ដោយយកនាគពស់ឈ្មោះវាសុកិ មកធ្វើជាព្រ័ត្រ យកភ្នំមន្ទរជាស្នួល ។ ពួកអសុរ ទាញខាងក្បាល ពួកទេវតាខាងកន្ទុយឈរលើភ្នំមន្ទរ ស្ថិតលើខ្នងអណ្ដើក ដែលជាអវតារនៃព្រះនារាយណ៍ ។ ការកូរទឹកសមុទ្រនេះ ជាភ័យមួយយ៉ាងធំដល់សត្វសមុទ្រទាំងឡាយ ដូចជាត្រី, អណ្ដើក, ក្ដាម, មករ ជាដើមដែលមានខ្លួនដាច់ខ្ទេចខ្ទីស្លាប់យ៉ាងគគុញ ហើយបានទៅកើតជាស្រីទេព-អប្សរបវរកញ្ញា ហោះហើរត្រៀបត្រាលើអាកាស ។ គេឃើញនាងលក្ខ្មី ដែលជានាងបញ្ចពណ៌កល្យាណី ក៏កើតពីការកូរទឹកសមុទ្រនេះដែរ ។ ការកូរទឹកសមុទ្រអស់រយៈពេលជាង ១.០០០ ឆ្នាំ

ហើយពួកទេវតាត្រូវបានជ័យជំនះលើពួកអសុរ ដោយបានទឹកអម្រឹតយកមកប្រើប្រាស់ដើម្បីការពារសេចក្ដីស្លាប់ ។

នៅត្រង់ផ្នែកកណ្ដាលនៃខ្លួននាគរាជ ព្រះនារាយណ៍បែងភាគជាមនុស្ស ចុះមកជួយយកអាសាពួកទេវតា ។ ពួកអសុរមានភ្នែកធំក្រឡេកៗ ហើយពាក់ក្បាំងកំពូល រីឯពួកទេវតាពាក់មកុដកំពូលស្រួច ធ្វើទឹកមុខបែបភិតភ័យ ហើយមានដងខ្លួនទ្រេតទៅមុខបន្តិច ចំណែកឯស្ដេចស្វាឈ្មោះ ហនុមាន លើកកន្ទុយនាគជាជំនួយដល់ពួកទេវតា ។ នៅផ្នែកក្រោមគេឃើញនាគរាជឈ្មោះ វាសុកិ ដែលជាព្រ័ត្រសម្រាប់ទាញកូរទឹកសមុទ្រ ។ 50

## រោងទងខាងកើត ផ្នែកខាងជើង

ក្នុងខណៈដែលគេដើរកាត់តាមក្លោងទ្វារខាងកើតនោះ គេឃើញតាមជញ្ជាំងនូវសិលាចារឹកមួយផ្ទាំង ដែលមានមកតាំងពីសតវត្សទី១៨ សិលាចារឹកនោះមានសេចក្ដីថា មានចៅហ្វាយខេត្តខ្មែរម្នាក់

បានធ្វើបុណ្យក្នុងព្រះពុទ្ធសាសនា ព្រមទាំងបានកសាងចេតិយផង មួយ បញ្ចុះអដ្ឋិធាតុបុត្រភរិយា ប៉ុន្តែសព្វថ្ងៃនេះ ត្រូវវិនាសខូចខាតស្ទើរតែអស់ទៅហើយ ។

តពីទីនោះបន្តិចទៅ គេឃើញរូបចម្លាក់នៃគង់ទ័ពអសុរយាត្រាចេញទៅច្បាំង ព្រះនារាយណ៍ជិះលើគ្រុឌ ថែរព្រះកត្រ្តទៅរកទិសទក្សិណ ព្រះឥសូរទ្រង់ត្រីសូល ព្រះគណេស និង គ្រឹស្នៈដៃប្រណម្យ ហើយមានពួកទ័ពជិះសត្វចំឡែកៗជាច្រើន ។ ការរចនានៅកន្លែងនេះមិនសូវចំណានទេ ព្រោះមានសណ្ឋានគគ្រោតគគ្រាតជាខ្លាំង ។

## រោងទងខាងជើង ផ្នែកខាងកើត

នៅកន្លែងនេះ ក្បាច់រចនាក៏មិនសូវចំណានដែរ ។ ក្បាច់ចម្លាក់ទាំងនោះនិទានពីរឿងព្រេង ត្រង់ចំបាំងទេពតា និង អសុរ ព្រះនារាយណ៍មានព្រះកត្រ្តច្រើន ព្រះហស្ត ៨ ជិះលើគ្រុឌ មានគង់ទ័ពក្លួងដើរមុខ ផ្នែកកណ្តាលជាទីសមរភូមិ មានភ្លើងមួយគំនរធំ ឃាំងគង់ទ័ពទាំងសងខាង ភ្លើងនេះគ្រុឌសំដែងឫទ្ធិយកទឹកទន្លេ



ហើយពួកទេវតាត្រូវបានជ័យជំនះលើពួកអសុរ ដោយបានទឹកអម្រឹតយកមកប្រើប្រាស់ដើម្បីការពារសេចក្ដីស្លាប់ ។

នៅត្រង់ផ្នែកកណ្ដាលនៃខ្លួននាគរាជ ព្រះនារាយណ៍បែងភាគជាមនុស្ស ចុះមកជួយយកអាសាពួកទេវតា ។ ពួកអសុរមានផ្នែកធំក្រឡេត ។ ហើយពាក់ក្បាំងកំពូល រីឯពួកទេវតាពាក់មកុដកំពូលស្រួច ធ្វើទឹកមុខបែបគិតភ័យ ហើយមានជនខ្លួនទ្រេតទៅមុខបន្តិច ចំណែកឯស្ដេចស្វាឈ្មោះ ហនុមាន ឈរកាន់កន្ទុយនាគជាជំនួយដល់ពួកទេវតា ។ នៅផ្នែកក្រោមគេឃើញនាគរាជឈ្មោះវសុកិ ដែលជាព្រ័ត្រសម្រាប់ទាញកូរទឹកសមុទ្រ ។

## រោងទងខាងកើត ផ្នែកខាងជើង

កន្លែងណាដែលគេដើរកាត់តាមក្លោងទ្វារខាងកើតនោះ គេឃើញតាមជញ្ជាំងនូវសិលាចារឹកមួយផ្ទាំង ដែលមានមកតាំងពីសតវត្សទី ១៨ សិលាចារឹកនោះមានសេចក្ដីថា មានចៅហ្វាយខែត្រខ្មែរម្នាក់

បានធ្វើបុណ្យក្នុងព្រះពុទ្ធសាសនា ព្រមទាំងបានកសាងចេតិយ៨ដួ មួយ បញ្ចុះអដ្ឋិធាតុបុត្រភរិយា ប៉ុន្តែសព្វថ្ងៃនេះ ត្រូវវិនាសខូច ខាតស្ទើរតែអស់ទៅហើយ ។

គពីទីនោះបន្តទៅ គេឃើញរូបចម្លាក់នៃគន្ធទំពអសុរយាត្រា ចេញទៅច្បាំង ព្រះនារាយណ៍ជិះលើគ្រុឌ បែរព្រះភក្ត្រទៅរកទិស ទក្សិណ ព្រះឥសូរទ្រង់ត្រីសូល ព្រះគណេស និងក្រិស្ណៈដៃប្រណាម្យ ហើយមានពួកទំពជិះសត្វចម្លែកៗជាច្រើន ។ ការរចនានៅកន្លែង នេះមិនសូវចំណាននេ ព្រោះមានសណ្ឋានគគ្រោតគគ្រាតជាខ្លាំង ។

## រោងទងខាងជើង ផ្នែកខាងកើត

នៅកន្លែងនេះ ក្បាច់រចនាក៏មិនសូវចំណានដែរ ។ ក្បាច់ចម្លាក់ទាំងនោះនិទានពីរឿងព្រេង ត្រង់ចំបាំងទេវតា និងអសុរៗ ព្រះនារាយណ៍មានព្រះភក្ត្រច្រើន ព្រះហស្ត ៨ ជិះលើគ្រុឌ មានគន្ធ ទំពក្បួនដើរមុខ ផ្នែកកណ្តាលជាទីសមរភូមិ មានក្បួនមួយគំនរជំ ឃាំងគន្ធទំពទាំងសងខាង ក្បួននេះគ្រុឌសំដែងឫទ្ធិយកទឹកទទេ



គន្លាមកលត់ ហើយចូនគំនរកើ្ននេះទៅ ។ គេឃើញយកក្បាល ៦ ជិះលើមាស ឈរពៅំនពីមុខគ្រុឌ ប្រុនប្រៀបទិនចង្វាំនគ្នា ។ កនទ័ត ព្រះក្រឹស្ណៈវាយលុកកនទ័ពស្ដេចអសុរឈ្មោះ ពាណៈ ដើម្បីដណ្ដើម យកជ័យជំនះ ។ គេឃើញក្រឹស្ណៈដៃ ៤ ជិះលើគ្រុឌ ។ តទៅទៀត គេឃើញក្រឹស្ណៈ ជិះលើថេមរដោយសីហៈ មានស្ដំពីរនាក់ចូលលុក វាយស្ដេចអសុរ ពាណៈ តបន្តិចទៅទៀត គេឃើញព្រះឥសូរ, នាងបារវតី, ឥសីកិន្នរ គណេសជាបុត្រ គង់លើភ្នំកៃលាស ហើយឃើញក្រឹស្ណៈក្បាលច្រើន មានជ័យជំនះលើអសុរឈ្មោះពាណៈ ចូលទៅអង្គុយលើដៃប្រណម្យព្រះឥសូរ ។ ព្រះឥសូរមាន បន្ទូលថា: « អើក្រឹស្ណៈ បាឯងមានមហិទ្ធិឫទ្ធិខ្លាំងណាស់ នៅក្នុង លោកសន្និវាសនេះ ឥតមានអ្នកណាមួយហ៊ានប្រឡងឫទ្ធិជាមួយ បាឯងទេ ។ ធ្វើម្ដេចឥឡូវនេះ យើងបានជួយអសុរឈ្មោះ ពាណៈ ទៅហើយ សំដីយើងមិនឥតប្រយោជន៍ទេ» ។ ក្រឹស្ណៈឆ្លើយតបវិញ ដោយឈ្លាសវៃថា: "សូមឲ្យអសុរៈ ពាណៈ មានជ័យជំនះចុះ ខ្ញុំព្រះអង្គ

មិនបង់បានប្រសើរជាងគេទេ ទ្រង់សព្វព្រះទ័យដូចម្ដេច ទូលបង្គំសូមធ្វើតាមព្រះអង្គទាំងអស់ ព្រោះព្រះអង្គទ្រង់បានជួយស្រោចស្រង់ដល់គេហើយ ,, ។

## រោងទងខាងជើង ផ្នែកខាងលិច

នៅរោងទងនេះ ចម្លាក់រស់រវើក និទានអំពីចំបាំងរវាងទេវតា ២១ អង្គ និង ពួកអសុរ ២១ រូប ដែលគេឃើញមេទ័ពធំ ៗ បញ្ចេញឫទ្ធិដឹកនាំកងទ័ពខ្លួន ។

លោក សេដែស បានអធិប្បាយថា ផ្ទាំងចម្លាក់នេះ ជារឿងចំបាំងក្នុងសាសនាព្រាហ្មណ៍ ( ព្រហ្មញ្ញសាសនា ) ដែលមាន
3 ទេវតាម្នាក់ច្បាំងនឹងអសុរម្នាក់ គេសំគាល់បានដោយទេវតាពាក់មកុដ និង ក្បាំង ច្បាំងតតាំងគ្នាគួរឲ្យរំភើបញាប់ញ័រក្រៃលែង ។ នៅមុខគឺទេវតាឈ្មោះ កុវេរៈ ជាទេវតាសម្បូណ៌សប្បាយដោយទ្រព្យសម្បត្តិ ជិះលើស្វាយក្ស , ទេវតាឈ្មោះ ស្កន្ទៈ ដៃ ១២ មុខច្រើនជិះលើក្ងោក , ព្រះឥន្ទ្រាធិរាជ ជិះលើដំរី ឰរាវណ្ណ ភ្លុក ៤

ដែលមានប្រមោយចាប់ព្រោបបច្ចាមិត្រនៅក្នុងសមរភូមិ , ក្រឹស្ណៈ ដៃ ៤ ជិះលើគ្រុឌ , តទៅទៀត គេឃើញក្រុងយក្សក្បាលច្រើនដៃច្រើន កាន់អាវុធគ្រវីដាវធ្នូនិងចក្រ , ទេពតាឈ្មោះ យមៈ គង់លើគោ , ព្រះព្រហ្ម គង់លើហង្ស , ព្រះសូរ្យៈ មានរស្មីភ្លឺចិញ្ចាចគង់រាជរថ ដែលមានគ្រុឌពាជបក្សជានាយសារថី , ព្រះឥសូរ កំពុងយឹតកៅទណ្ឌ ធ្នូសរបាញ់សត្រូវ ។ នៅចុងពេនទង គេឃើញព្រះវរុណៈ ទេពតាខាងទឹកភ្លៀងជិះលើនាគក្បាល៥, ក្រៅពីនោះ គេឃើញទេពតាអគ្គិធំៗ ខ្លះទៀត ជិះរាជរថទឹមសេះ ឬទឹមសីហៈ ចូលច្បាំងគ្នា ដោយឥតខ្លាចសេចក្ដីស្លាប់ ។ គេឃើញពលអសុរត្រូវសរដាច់ក្បាលដួលដេកពាសពេញលើប្រឹថពីគួរឲ្យអាណោចអាធម៌ក្រៃលែង ។

## មណ្ឌបមុមខាងជើង ឆៀងខាងលិច

នៅមណ្ឌបនេះ ការតុបតែងលំអមិនខុសគ្នាពីមណ្ឌបមុមខាងត្បូង ឆៀងខាងលិចឡើយ ព្រោះមានរឿងបុរាណដូចៗគ្នា ដែលចែកជាច្រើនសក្កាត់គឺ :

១.- នៅលើក្លោងខាងកើត ឆ្លាក់រឿងព្រះរាមនិងព្រះលក្ស្មណ៍ កំពុងបញ្ជាពួកស្វាឲ្យធ្វើស្ពាន ដើម្បីប្រមូលយកពលទៅឆ្លងកាត់ទឹកសមុទ្រទៅក្រុងលង្កា ។

២.- សាលាខាងកើត លើមាត់បង្អួចផ្លាំងខាងជើង ព្រះនារាយណ៍ ផ្ទុំលើនាគរាជ " អនន្ត " ដែលមានផ្កាឈូកដុះចេញពីព្រះនាភី ( ផ្ចិត ) ព្រះអង្គជាយាព្រះភ្នំកាន់ព្រះបាទ ។ ផ្នែកខាងលើពួកស្រីទេពអប្សរ ហោះហើរលើអាកាសបាចសាចបុប្ផាទិព្វថ្វាយជោគជ័យចំពោះព្រះអង្គ ផ្នែកខាងក្រោមមានរូបចម្លាក់ជាច្រើន ដែលគេឃើញមានព្រះអាទិទេព ៩ អង្គ គឺ: សុរិយៈជិះរាជរថ, កុវេរៈជិះស្វាយក្ស, ព្រះព្រហ្ម ជិះហង្ស, ស្កន្ទៈជិះក្ងោក, ទេវតាមួយអង្គដែលគេមិនស្គាល់ព្រះនាមជិះសេះ, ព្រះឥន្ទ្រ គង់លើដំរីឰរាវណ្ណកុក ៤, យមៈជិះគោ និងព្រះឥស្សូរ គង់លើគោឈ្មោលនន្ទិន, ព្រះអាទិទេពមួយអង្គទៀតគង់លើសីហៈ ។

៣.- សាលាខាងកើត ផ្លាំងខាងត្បូង ក្រឹស្ណៈទ្រង់ស្មុយកន្ទ

បណីបតិត: នៅផ្ទាំងនេះ គេឃើញក្រឹស្ណៈដៃ ៤ ជិះគ្រុឌជាមួយមហេសី សត្យាភូមា ។ ព្រះអង្គមានជ័យជំនះលើពួកសត្រូវហើយទ្រង់នាំពួកពលសេនាដឹកជញ្ជូនគ្រឿងកស្តុការផ្សេងៗមានដាវ លំពែងជាដើម ដែលបានរឹបយកពីគូបំបាំងនាំចូលទៅកាន់ព្រះនគរវិញដោយសេចក្តីសុខសាន្តត្រាណ ។

៤.– សាខាខាងជើង ផ្ទាំងខាងកើត លើមាត់បង្អួច : ការសន្ទនាអំពីកិច្ចការផ្សេងៗនៅក្នុងព្រះបរមរាជវាំង នៅខាងក្រោមមានមនុស្សពីរនាក់ដេកផ្កាប់មុខ ហើយមានស្រីស្នំជាច្រើននៅក្នុងវាំង ។

៥.– លើទ្វារខាងជើង : គ្រង់ព្រះរាមនិងព្រះលក្ស្មណ៍ ថ្វែនសរបាញ់កំទេចទល់ទឹងយក្សឈ្មោះ ពិរាធ ជាបងរាពណ៍ដែលលបលួចយកនាង សីតា បញ្ចុះលើស្មាហោះចេញទៅ ។

៦.– សាខាខាងជើង មាត់បង្អួចខាងលិច : គ្រង់នាង សីតា យាងចូលគំនរភ្លើងកំពុងឆេះពេញក្រមុំ ដើម្បីសំដែងសេចក្តីបរិសុទ្ធ

ស្មោះត្រង់ចំពោះព្រះរាជស្វាមី ក្រោយពេលដែលត្រឡប់មកពីនគរលង្កាវិញ ។

នៅកន្លែងនេះមានការខូចខាតអស់ជាច្រើនអន្លើ ដោយត្រូវទឹកភ្លៀងហូរជ្រោះ ប៉ុន្តែគេឃើញនៅគង់វង់ល្អខ្លះ ដូចជារូបព្រះរាមព្រះលក្ស្មណ៍ សុគ្រីព ហនុមាន ឯរូបក្រៅពីនោះ ដូចជារូបនាងសីតានិងគំនរភ្លើងជាដើម ត្រូវវិនាសខូចអស់ជាងពាក់កណ្តាល ។

៧.- សាខាខាងលិច ផ្ទាំងខាងជើង ស្មើមាត់បង្អួច : ថែងពីព្រះរាមប្រាំងឈ្នះក្រុងរាពណ៍ គង់លើរាជរថ បុស្បក ក្នុងក្រុងលង្កា រួចយាងត្រឡប់មកនគរ អយុធ្យាវិញ ដែលមានគងទ័ពស្វាយាងកកកុញបញ្ចេញទឹកមុខរីករាយសប្បាយយ៉ាងក្រៃលែង ។

៨.- ស្មើទ្វារខាងលិច : ត្រង់ព្រះរាមនិងព្រះលក្ស្មណ៍ចងសម្ពន្ធមិត្តជាមួយ វិភីសនៈ ( ពិភេក្សណ៍ ) ជាបងរាពណ៍នៅកណ្តាលចំណោមពួកពលស្វា ដែលគេឃើញពិភេក្សណ៍អង្គុយប្រណម្យព្រះរាមនិងព្រះលក្ស្មណ៍ ។

៩.- សាខាខាងលើ ជញ្ជាំងខាងត្បូង លើមាត់បង្អួច : ថ្ងៃពីនាង សីតា នៅក្រុងលង្កា ព្រះរាមប្រើ ហនុមាន ទៅមើល នាង សីតា នៅនគរយក្ស ដែលឃើញសុទ្ធតែនាងយក្ខិនីមានមុខ ផ្សេង ៗ គ្នា នៅថែរក្សាគ្រប់គ្រងព្រះនាងក្នុងគាសោកទុក្ខយ្យាន រួចគេឃើញនាង សីតា ទ្រង់ប្រទានចិញ្ចៀនព្រះខម្រង់ដល់ហនុមាន ឲ្យយកទៅថ្វាយព្រះរាមជាព្រះរាជស្វាមី ដើម្បីជាសក្ខីភាពនៃសេចក្តី ស្មោះត្រង់របស់ព្រះនាងចំពោះព្រះអង្គ ដែលទ្រង់បានប្រើរាជបំរើ ហនុមាន មកយកតពតមាន ។

១០.- សាខាខាងត្បូង ជញ្ជាំងខាងលិច ពីលើមាត់បង្អួច : រឿងត្រង់នេះគេមិនដឹងថាជារឿងអ្វីឡើយ ប៉ុន្តែឃើញក្រិស្នះ ទ្រង់ទទួលជង្វាយពីនាងទេពធីតា ដែលនាំគ្នាដើរជយជម្រង់ ចូលមក ។

១១.- លើមាត់ទ្វារខាងត្បូង : ព្រះរាមនិងព្រះលក្ស្មណ៍ចូល ប្រយុទ្ធជាមួយកុម្ភណ្ឌយក្ស គឺមហាយក្សដែលមានខ្លួនធំ ឥតក្បាល

តែមានមុខនៅត្រង់ដើមទ្រូង ។

១២.– សាខាខាងត្បូង ជញ្ជាំងខាងកើត ៖ ត្រង់ព្រះរាមប្រឡងធ្នូសរដើម្បីឲ្យបានព្រះនាងសីតា ជារង្វាន់ ។ គេឃើញព្រះនាងសីតាទ្រង់មកុដកំពូល ៣ គង់នៅលើគ្រែ ហើយមានរាជបរិពារនៅហែហមផង ។ នៅខាងក្រោម មានពួកព្រះរាជបុត្រក្សត្រច្រើនកកកុញចូលទៅប្រឡងធ្នូជ័យ ប៉ុន្តែជ័យជំនះត្រូវបានទៅព្រះរាម ។

## រោងទងខាងលិច ផ្នែកខាងជើង

នៅរោងទងនេះ មានក្បាច់ចម្លាក់យ៉ាងល្អស្រស់បំព្រង ញឹកស្មេស្មើ ៗ គ្នា ហើយចម្លាក់ជ្រៅ ៗ ផង សូម្បីតែរូបយក្សនិងស្វាក៏លេចក្រឡោតឡើងហើយភ្នែករលានស្រិល បញ្ចេញទឹកមុខកំញើញដាក់គ្នាមានឫកពាជាអ្នកក្លាហានក្នុងសង្គ្រាម ។

ថែវត្រង់ព្រះរាមលើកកងទ័ពស្វាវាយលុកចូលក្រុងលង្កា ដែលគេឃើញកងទ័ពយក្សនៅបែកខាងជើងដើរជាក្បួន ។ មានមេទ័ពខ្លះកាន់ក្រែះមុខពីរ ខ្លះកាន់ដុំមូល ឬដំបង និងខ្លះទៀតដៃទទេ ។

ចំណែកកងពលស្វាវិញ មានខ្លះកាន់មែកឈើ ខ្លះកាន់ដាវលំពែង ជាដើម ដើរចូលលុកក្រញីខាំសត្រូវ ៗ នៅខាងមុខព្រះរាម មានកងទ័ពក្មេង ដែលក្នុងក្រុមនេះ មានពលស្វាយកស្នា, ផង្គន់, ប្រមុះ, ថ្ងាស, ក្បាល ឬ ក្លូចទល់ទ្រូងទង់ជ័យដើរយាងសង្ហា ៗ

នៅផ្នែកខាងត្បូង មេទ័ពយក្សកំពុងបញ្ជាកងពលយក្សឲ្យចូលធ្វើសង្គ្រាមជាមួយកងពលស្វា ដែលមានមេទ័ពធំៗ ជិះរថទឹមសត្វផ្សេងៗ មានសេះជាដើម, ដៃកាន់លំពែង, ព្រះខាន់, ធ្នូសរ, ចំណែកឯពលយក្សប្រដាប់ដោយខែល, លំពែង, ដាវ, ដំបង, ធ្នូសរគ្រប់ដៃ ៗ

នៅកណ្ដាលផ្ទាំងបំឡាក់ គេឃើញព្រះរាមទ្រង់ធ្នូសរជិះលើស្នាហនុមាន ដែលកាន់ដុំមូលមួយនៅដៃហើយក្រញៀញខ្លួន ច្បាំងតទល់នឹងក្រុងរាពណ៍ទសមុខដៃម្ភៃ ជិះលើរាជរថទឹមសីហៈ ៗ ឈរនៅជិតពីក្រោយព្រះរាម គឺព្រះលក្ស្មណ៍ដែលទ្រង់ធ្នូសរ និងវិភិសនៈ (ពិភេក្សណ៍) ដៃកាន់ព្រះខាន់ ៗ តទៅមុខទៀត មានមេទ័ពស្វាជិះកាច

សាហាវពីររូប គឺក្រុងទីលពាជ ដែលទំចំពោកជើងលើក្បាលសីហៈ ចាប់គ្រវែងសត្រូវបោកលើផែនដី និងអន្តក បុត្រក្រុងពាលី ដែលចាប់ដកក្តុកដ៏រមានកំពូលត្រីសូល៍ ៗ នៅផ្ទាំងរូបមួយទៀតគេឃើញមេទ័ពស្វាចាប់យួរជើងក្រោយសត្វសីហៈពីរធំ ៗ សម្រុកក្បាលចុះក្រោម ៗ

ការពិពណ៌នាអំពីរូបចម្លាក់រឿងរាមកេរ្តិ៍នៅកន្លែងនេះ មិនបានសព្វគ្រប់ទេ ព្រោះមានការញ៉ឹកស្មុគ្រស្មាញខ្លាំងណាស់ ប៉ុន្តែការចារូបចម្លាក់ទាំងនេះ ជាទីស្ញើចសរសើរដល់សិល្បករសម័យបច្ចុប្បន្ននេះពន់ពេកណាស់ ៗ



# ប្រាសាទតាព្រហ្មគិល

សាងនៅចុងសតវត្សទី ១២ ដោយស្នាព្រះហស្តព្រះបាទជ័យវរ្ម័នទី៧ បច្ឆាមរណៈព្រះនាម មហាបរមសុគតបទៈ ដើម្បីឧទ្ទិសចំពោះព្រះពុទ្ធសាសនា ប្រាសាទនេះបានទទួលការថែរក្សាដោយក្រសួងអភិរក្សអង្គរ តាំងពី គ.ស. ១៩១៩ រហូតមកដល់សព្វថ្ងៃនេះ ។

នៅចម្ងាយ ៣០០ ម៉ែត្រ ពីខាងជើងអ័ក្ស ខាងលិចក្លោងទ្វារប្រាសាទអង្គរវត្ត គេប្រទះឃើញគុហាមួយតូចសាងពីថ្មកក់ ស្ថិតនៅខាងឆ្វេងដៃត្រង់បង្គោលគីឡូម៉ែត្រ ៗ ប៉ុន្តែសព្វថ្ងៃនេះអន្តរាយអស់ជាច្រើនអន្លើ ៗ ដោយសារការរុករកកាលពី គ.ស. ១៩២៨ គេបានរកឃើញសិលាចារឹកមួយ ដែលមានចុះព្រះរាជបញ្ញាផ្សេង ៗ នៃព្រះបាទ ជ័យវរ្ម័នទី ៧ ដែលធ្លាក់ជាប់នៅទីមន្ទីរព្យាបាលរោគ ៗ តាមសិលាចារឹកនៅប្រាសាទតាព្រហ្មប្រាប់ថា ប្រាសាទនេះជាធម្មមន្ទីរសម្រាប់ស្វាធ្យាយធម៌ផ្នែកខាងព្រះពុទ្ធសាសនា ។

បើតាមរឿងព្រេងវិញ លោកសៅដែស បាននិទានថា

ប្រាសាទតាព្រហ្មកិលនេះ មានការពាក់ទងទៅនឹងរឿនពញាក្រែក ដែលជាជនពិការសរ់យរ: ធ្វើដំណើរចេញទៅណាមកណាពុំបាន លុះត្រាតែព្រះឥន្ទ្រប្រទានសេះមួយព្រមទាំងគ្រឿងអម្ពរណ៍, លុះដល់ក្រោយមក ទើបពញាក្រែកយកគ្រឿងអម្ពរណ៍មកស្លៀកពាក់ហើយឡើងជិះសេះហោះចេញបាត់ទៅ ។

នៅប្រាសាទនេះ គេប្រទះឃើញរូបព្រះពោធិសត្វ អវលោកេស្វរៈ ដែលជាអ្នកជួយព្យាបាលរោគសត្វលោក ។ ការធ្វើដំណើរចូលទៅ ត្រូវដើរតាមគោបុរៈមួយតូចសាងពីថ្មភក់ ទើបចូលដល់តួប្រាសាទ ដែលស្ថិតនៅជ្រុងប្រចកបដោយថ្នាក់តូចៗ ៣ ទៀតរួចជាប់គ្នាតាមកំពូលមុខខាងជើងនិងខាងកើត ។ តួគុហាបែរមុខទៅខាងកើតប្រកបដោយទ្វារបញ្ឆោត ៣ និងបល្ល័ង្កមួយដែលមានក្បាច់ជាច្រើន ហើយនិងមានប្រឡាយបង្ហូរទឹកមួយ នៅតាមប្រហោងប្រាសាទទិសខាងជើង ។

ការរចនាប្រាសាទនេះ មិនសូវមានការផ្ចិតផ្ចង់ប៉ុន្មានទេ ប៉ុន្តែ

មានទ្រង់ទ្រាយដូចប្រាសាទបាយ័នដែរ ព្រោះក្បាច់ចម្លាក់មានសភាព គោង ៗ និងមានឆ្លាក់ជារូបទេវតានៅតាមសសរជ្រុងប្រាសាទ ៗ នៅសសរមាត់ទ្វារចូល គេឃើញក្បាច់របនាយ៉ាងល្អឆើត ហាក់ដូចជាកម្រាលព្រំចៀម ៗ ក្បាច់ចម្លាក់និមួយៗ មានឆ្លាក់ជារូបមនុស្សម្នាក់តាមទម្រង់ធម្មតា ហាក់ដូចជាមានជីវិតរស់រវើកនៅឡើយ ៗ



## ប្រាសាទបន្ទាយចារ់ក្រុង

សាងរាង គ.ស. ៩៤៧ ដោយស្នាព្រះហស្តព្រះបាទរាជេន្ទ្រាវរ័ន្ម បដ្ឋាមរណៈ ព្រះនាមសិវលោក ឧទ្ទិសបំពោះព្រហ្មញ្ញសាសនា (ថ្វាយព្រះនារាយណ៍) ប្រាសាទនេះបានទទួលការថែរក្សាអំពីក្រសួងអភិរក្សអង្គរ តាំងពី គ.ស. ១៩១៩ រហូតមកដល់សព្វថ្ងៃនេះ ៗ

នៅចម្ងាយ ១៥០ ម៉ែត្រ ពីផ្លូវរបុកណាតាមអ័ក្សខាងកើត ភ្នំបាខែង នៅឆ្វេងផ្លូវ គេនឹងប្រទះឃើញប្រាសាទតូចនេះលេច ឡើងកណ្ដាលព្រៃឈើស្រោង មានថ្នាក់កាំជណ្ដើរស្ដាបនា ដោយថ្មបាយក្រៀមនិងឥដ្ឋពណ៌ក្រហម ដែលជាសម្ភារៈម្យ៉ាង គេតែងប្រើប្រាស់ក្នុងជំនាន់សតវត្សទី ១០ ។

ប្រាសាទនេះ មានកំពែងឥដ្ឋព័ទ្ធជុំវិញដែលត្រូវវិនាសខូច ខាតអស់ទៅហើយ នៅសល់តែស្នាកស្នាមគោបុរៈមួយខាងពី ថ្មកក់ត្រង់ផ្នែកខាងកើតប៉ុណ្ណោះ ។ តួប្រាសាទបែកជាពីរថ្នាក់ : ថ្នាក់ក្រោមជាពាង ៤ ជ្រុង ក្នុងមួយជ្រុង ១ ប្រវែង ២៣ ម៉ែត្រ ជ្រុងថ្នាក់លើប្រវែង ១៥ ម៉ែត្រ កំពស់ ១៣ ម៉ែត្រ ស្ថាបនាឡើង ដោយថ្មបាយក្រៀម មានជណ្ដើរ ៤ នៅគ្រប់ទិសទាំង ៤ របនា តាមសម័យនិយមនិងតាមប្រពៃណីខ្មែរ ។ ជណ្ដើរទាំងអស់នេះ មានតែជណ្ដើរ ៣ ទេ ដែលមានទម្រង់ល្អដាច់គេ ប៉ុន្តែគ្មានដំកល់ រូបចម្លាក់អ្វីនៅលើក្បាលជណ្ដើរទេ ។ ឯជណ្ដើរមួយទៀត ដែល

សាងភ្ជាប់ទីនគ្រឹះប្រាសាទនោះ មានផ្ទាក់ជាក្បាច់គ្របកឈូកគួរជាទីមនោរមក្រៃពេក ។

បើឡើងទស្សនាប្រាសាទនេះ សូមប្រុងប្រយ័ត្នបន្តិច ព្រោះកាំជណ្ដើរញឹកពេក ហើយរចរិលរស់ជាច្រើនអន្ទើណាស់ទៅហើយ ។

គូហាសាងដោយឥដ្ឋ តែគ្មានប្រើកំបោរឬក្អាយអដើម្បីភ្ជាប់មុខដែលគេមើលឃើញជាខ្សែឆ្នារៗនោះទេ គេដាក់បន្ទុបឈើថ្មគ្រឹះទុកឲ្យឃើញតែតែបន្តិច ៗ ។ គុហានេះមួយជ្រុង ៗ ប្រវែង ៨ ម៉ែត្រ សាងបែរមុខទៅខាងកើត ហើយមានទ្វារបញ្ឆោត ៣ ដែលមានសសរទិងផ្ទឹមសាងពីថ្មភក់ ព្រមទាំងមានផ្ទាក់ក្បាច់ជាកន្ទោងៗរូបបណ្ដូលផ្កា ។ ជាពិសេសទៅទៀត ក្បាច់ដែលនៅលើផ្ទឹមទទឹងទ្វារទិសខាងកើត មានផ្ទាក់ជារូបគនេស្វរៈ មានប្រមោយវែង ដូចជារូបដែលគេឃើញនៅប្រាសាទមេបុណ្យទិសបូព៌ាដែរ ។ នៅចំកណ្ដាល



ប្រាសាទបក្សីចាំក្រុង

មើលពីទិសខាងកើត

ផ្ទៃមុខទឹងទ្វារនេះមានឆ្លាក់រូបព្រះឥន្ទ្រជិះលើដំរីក្បាល ៣ ព្រមទាំងរូបមនុស្សតូច ៗ នៅគមផង ។

នៅខាងក្រៅមានឆ្លាក់ជាក្បាច់ផ្កាផ្សេង ៗ ព្រមទាំងរូបទេវតាដែលមានលាបថ្នាំខ្លះៗផង ដើម្បីកុំឲ្យឆាប់សឹកក្បាច់ ។ នៅក្នុងប្រាសាទគេបានចាក់ដីបំពេញជំរៅ ១ ម៉ែត្រ ហើយមានព្រះពុទ្ធរូបបរិនិព្វានមួយអង្គធំនៅប្របនឹងជញ្ជាំង ព្រះពុទ្ធរូបបរិនិព្វានអង្គនេះ គេសាងនៅពេលក្រោយទេ ។

សិលាចារឹកនៅតាមជើងសសរគ្រាងទ្វារ រៀបរាប់អំពីរជ្ជកាលព្រះបាទរាជេន្ទ្រវរ្ម័ន ព្រមទាំងអធិប្បាយបញ្ជាក់អំពីស្ថាន- 68
ភាពនៃប្រាសាទនេះក្នុង គ.ស. ៩៤៧ ទៀត ។ មានរូបសំណាកព្រះនារាយណ៍មួយ ដែលមានបិទមាសហើយសមរមតាមភាពប្រាសាទក្នុងជំនាន់នោះណាស់ ។



# ប្រាសាទភ្នំបាខែង

សាងវាង គ.ស. ៨៩០ ដោយស្នាព្រះហស្ដព្រះបាទយសោវរ្ម័ន ទី ១ បច្ចាមរណៈ " បរមសិវលោក " ឧទ្ទិសដល់ព្រហ្មញ្ញសាសនា ថ្វាយព្រះឥសូរ ។ ការថែរក្សាដោយក្រសួងអភិរក្សអង្គរ ចាប់តាំងពី គ.ស. ១៩១៩ រហូតមកដល់សព្វថ្ងៃនេះ ។

នៅចម្ងាយ ១៣០០ ម៉ែត្រ ពីខាងជើងគោពុរៈខាងលិចនៃប្រាសាទអង្គរវត្ត ហើយនៅពីខាងត្បូងគោពុរៈប្រាសាទអង្គរធំ ចំនួន ៤០០ ម៉ែត្រ ។ នៅពីខាងឆ្វេងដៃ គេឃើញប្រឡាយទឹកមួយធំ និងភ្នំមួយតូចកំពស់ ៦០ ម៉ែត្រ មានព្រៃឈើដុះពាសពេញ នេះគឺជាភ្នំបាខែង ដែលជាទីតាំងនៃប្រាសាទដំបូងមួយ ។ ប្រាសាទនេះជាមជ្ឈមណ្ឌលនៃទីក្រុងមួយឈ្មោះថា " យសោធរបុរៈ " ដែលមានរាង ៤ ជ្រុងស្មើ គឺមួយជ្រុងៗ ប្រវែង ៤ គីឡូម៉ែត្រ ។ បើធ្វើដំណើរតាមផ្លូវធំមក

សៀមរាប គេនឹងប្រទះឃើញព្រំប្រទល់ទីក្រុងនេះ នៅត្រង់ដីទួល ដែលមានចម្ងាយ ៦០០ម៉ែត្រ ពីស្រះបាក្សណីអង្គរវត្តខាងត្បូង ។

គេបានបោះបង់ចោលយសោធរបុរៈក្នុងរវាង គ.ស. ៨៨៩ ប៉ុន្តែទីក្រុងនេះនៅតែជាទីក្រុងដំបូងបង្អស់នៃអង្គរ ។ ដើម្បីនឹងគេប្រកើតដំណែលបហាស់ឲ្យដូចជាទីក្រុង " ហរិហរាល័យ ,, ដែលកសាងដោយព្រះបិតាព្រះអង្គនៅលើទីវាលមួយ ក្នុងស្រុកស្បូទទិគម " រលួស ,, នោះ ព្រះបាទយសោវរ្ម័ន ទី ១ ទ្រង់សាងប្រាសាទភ្នំកណ្ដាលដែនឲ្យមានឈ្មោះថា ប្រាសាទមហេន្ទ្របពិត ជានិមិត្តរូបភ្នំព្រះសុមេរុពជ ដើម្បីបូជាចំពោះទេវតាដែលមានសក្ដិធំៗ ហើយ 70
យកស្ទឹងសៀមរាបធ្វើជាទន្លេ ។ ដោយការនៅជាប់ស្រយាលពីស្ទឹងសៀមរាបដូច្នេះហើយ ទើបទ្រង់សាងទីក្រុងថ្មីនៅពីខាងលិចស្ទឹងវិញ ។

ការសំខាន់នៃប្រាសាទបាគង ដែលស្ថិតនៅក្នុងស្រុកស្បូទ-និគម " រលួស ,, នោះក៏មាននិទានប្រហែលគ្នានឹងប្រាសាទ

ភ្នំបាខែងដែរ ព្រោះមានទ្រង់ទ្រាយយ៉ាងល្អឯក បើមើលពីចំហៀងទៅ គេនឹងឃើញគ្រប់ផ្នែកទាំងអស់សុទ្ធសឹងជាកន្លែងថ្ងៃថ្មរសមនឹងស្ថានភាពទាំងមូល ។ ព្រោះទីនេះជាអាសនៈរបស់ព្រះអាទិទេពមួយព្រះអង្គព្រះនាម ទេវសេ: ហើយនិងយោនីព្រះអង្គម្ចាស់ក្សត្រីនៅចំកណ្ដាលក្រុងយសោធរបុរៈ ។ តាមសិលាចារឹកប្រាប់ថា វត្ថុនេះជាព្រះរូបមួយ ដែលគេគោរពបូជាយ៉ាងក្រៃលែងនៅក្នុងព្រះរាជាណាចក្រ ។ ការសាងរូបនេះទុកជាអនុស្សាវរីយ៍មួយសំដៅតាមលក្ខណៈប្រាសាទ ដំបូងគេបានដំកល់ទុកក្នុងគុហាដែលសាងពីថ្មកក់មានក្បាច់របនារាងដូចជាមកុដគ្របពីលើតួប្រាសាទ ឲ្យបានលំអឆើតឆាយស្រស់បំព្រងគួរឲ្យចាប់អារម្មណ៍យ៉ាងក្រៃលែង ។

ព្រឹកព្រហាមឬល្ងាច ជាពេលដែលគួរឡើងមើលប្រាសាទភ្នំបាខែង ។ គេអាចឡើងតាមផ្លូវចំពីមុខ ឬតាមផ្លូវដំរីមួយនៅពីឆ្វេងដៃដែលពួកទេសចរ តែងជួលដំរីជិះឡើងលេងកំសាន្ត ។ ពីលើខ្នងភ្នំទៅ គេអាចមើលឃើញកំពូលភ្នំពីរដូចគ្នាប្រកបដោយ

ប្រាសាទដែលព្រះបាទយសោវរ្ម័ទី១ បានកសាងគឺ : ប្រាសាទក្នុងក្រោមនាទិសខាងត្បូងណាក្បែរបឹងទន្លេសាប និងប្រាសាទភ្នំបូកនាទិសឦសានុត្តរទៅឆ្ងាយពីភ្នំគូលែន ដែលមើលទៅឃើញខ្ពស់ស្កុន ៗ មិនតែប៉ុណ្ណោះនៅទិសបស្ចិម គេនឹងឃើញទឹកបារាយណ៍ល្ហល្ហប និងនៃព្រៃឈើស្រោង ព្រមទាំងភាពឆើតឆាយពណ្ណរាយនៃប្រាសាទអង្គរវត្ត ដែលបញ្ចេញរស្មីភ្លឺផ្លេក ៗ ហាក់ដូចជាទឹកមាសឬជាដុំពេជ្រដែលគេដាក់ពាយលើផែនដី ក្នុងពេលដែលព្រះអាទិត្យជិតអស្តង្គតលិចចូលក្នុងព្រះសមុទ្រ ៗ

លោក ហ្គូលូប៊ឺ បានអធិប្បាយថា តាមការពិនិត្យ p.
លក្ខណៈផ្សេង ៗ គេអាចប្រៀបប្រដូចភ្នំនេះទៅនឹងភ្នំធំមួយ ៗ តាមសិលាចារឹកពោលថា នេះជាទីក្រុងដំបូងបំផុតដែលកើតក្នុងសតវត្សទី ៩ ក្នុងបរិវេណអង្គរ ៗ នៅជើងភ្នំបាខែងគេបានគេឃើញកំពែងមួយបណ្តោយ ៦៥០ ម៉ែត្រ ពីកើតទៅលិចទទឹងប្រវែង ៤៤០ ម៉ែត្រ ពីជើងទៅត្បូង ប្រកបដោយ

គោបុរៈមួយនៅត្បែរជើងភ្នំខាងកើត ត្រង់ចន្លោះផ្លូវទិសជើងភ្នំ ។ ស្លាកស្នាមដីច្បាស់ៗនេះ គេនៅតែងប្រទះឃើញនៅតាមអ័ក្សដែលជាទីតាំងនៃគុហាតូចៗ ដែលមានកាំជណ្តើរដូចជានៅតាមជណ្តើរធំទិសខាងកើតដែរ ។

វិចិត្តកម្មតាំងឡាយនៃព្រះបាទយសោវរ្ម័នទី ១ នេះ បានបង្ហាញឲ្យដឹងនូវសភាពខ្វល់ខ្វាយយ៉ាងខ្លាំងពុំមានល្ហែ តាមភាពនៃការរៀបចំប្រាសាទ ។ ដោយសារអ្នកបច្ចេកទេសយ៉ាងចំណានៗ ផ្លូវនេះ ភាពនៃប្រាសាទក៏បានស្រស់បំព្រងខ្លះឡើងវិញ ។ ភ្នំនេះសម្បូណ៌ដោយប្រាសាទ ដែលមានគុហាតូចៗជាច្រើនលើក លែងតែកន្លែងខ្លះ ដែលមានភាពរឹងប៉ឹងមិនបាច់រៀបចំផ្លាស់ផ្តូរឡើងវិញដូចជាផ្នែកគ្រឹះនិង ស៊ុម ដែលមានឆ្លាក់ជារូបទេវតានៅតាមសសរទ្រូងប្រាសាទហើយនិងមានសសរមួយតូចៗជាច្រើន ។ ប្រាសាទតាំងនោះពុំសូវមានល្វែងបន្ទប់ធំទូលាយ ហើយប្រកបដោយក្បាច់របនាក់ចុកកំបុកសមតាមភាពនៃប្រាសាទ ដែលជា

ហេតុនាំឲ្យផ្ទុយស្រឡះពីក្បូនខ្នាតនិងផ្ទាំងបញ្ជរ ។ ក្នុងការគាស់កកាយរុះមើលទៅតាមធ្នឹមទិនទ្វារ ដែលមានកិនកាតដូចជាធ្នឹមទទឹងទ្វារទាំងឡាយនោះ គេបានឃើញសម្រស់យ៉ាងល្អសមដូចក្នំគូលែនដែរ ព្រោះមានក្បាច់ចេនាយ៉ាងគ្រប់គ្រាន់ប្រទាក់ទាក់ស្រែះគ្នាយ៉ាងវិចិត្រ ដូចជាក្បាច់នៅប្រាសាទបាគងនិងប្រាសាទព្រះគោដែរ ។ ក្បាច់ទាំងឡាយមានការទោរទន់ទៅរកភាពល្អិតល្អន់ហើយស្ទើង ៗ ស្របទៅតាមសម័យនិយម ដូចជាក្បាច់លើបាយសរដែលបូកៈលំពានស្កុបនាអំពីឥដ្ឋ និងក្បាច់ឈើឆ្លាក់ ដើម្បីជាព្រះកិត្តិយសដល់ព្រះពជា ។

## ពិពណ៌នា

រូបគោពីរ ដែលឆ្លាក់វាក់នៅលើជម្រាលជើងភ្នំត្រង់ផ្លូវឡើងទៅខ្ពង់ពប មានសភាពហាក់ដូចជារស់រវើក នេះជាស្នាដៃសិល្បករខ្មែរយើងក្នុងសម័យនោះ ។ នៅលើកំពូលភ្នំមានកុដិព្រះសង្ឃទ្រុឌទ្រោម ដោយហេតុស្ថាបនាយូរណាស់មកហើយ ។



ប្រាសាទភ្នំបាខែង

( មើលពីខាងកើត )

នៅខាងស្តាំដៃ មានផ្លូវតូច ៗ សង់លើសសរថ្មកក់ តពីនោះទៅ មានព្រះវិហារតូចមួយ ដែលមានរូបសំណាកព្រះពុទ្ធបាទ ដែលគេបានសាងឡើងនៅជំនាន់ក្រោយ ហើយត្រូវធ្វើដំណើរចូលទៅកាន់ប្រាសាទ តាមគោបុរៈមួយក្បែរកំពែងថ្មបាយក្រៀម ។ នៅសងខាងអក្សដែលចូលទៅ គេនឹងឃើញអគារពីរ ដែលមានកិនភាគជាបណ្ណាល័យ ប្រកបដោយប្រហោងបង្អួចចតុរង្គញ្ញាយ ជាប្រយោជន៍ដល់ពន្លឺនិងខ្យល់ចេញចូលបានស្រួល ។ អគារពីរនោះមានទ្វារតូចនៅទិសខាងកើត ។

តួប្រាសាទតាំងមូលនេះលេចឡើង ព្រមទាំងកាំជណ្តើរតាំង ៥ ថ្នាក់ តម្រួតលើគ្នានៅគ្រប់មុខប្រាសាទទាំង ៤ ទិស គាំងពីក្រោមរហូតដល់ផ្ទៃលើមានកំពស់ពីដីទៅ ៤៧ម៉ែត្រ ឯដំបូលប្រាសាទកណ្តាលមានកំពស់ ១៣ ម៉ែត្រ ។ អមសងខាងមានផ្ទាក់ជារូបគោ ឈរចំអើតជើបជើយស្មើតយ៉ាងសង្ហាគ្រប់ក្បាលជណ្តើរ មានតាំងតួគុហាតូច ១ គ្រប់ ១ ថ្នាក់ នៃជ្រុង

ប្រាសាទទាំង ៤ ទិស ។ ផ្ទៃរាបស្មើខាងលើសាងភ្ជាប់ទៅតួគុហាតូច ៗ ដែលសព្វថ្ងៃខូចខាតអស់គ្មានសល់ ។ នៅខាងក្រោម តាមជុំវិញតួរប្រាសាទធំគេឃើញមានប្រាង្គតូច ៗ សាងពីឥដ្ឋ ។ ប្រាង្គតូចៗ ទាំងនេះមានចំនួន ៣៦ តួ ស្ថិតនៅដាច់ពីគ្នា ។

ប្រាង្គតូច ៗ ដែលសាងដោយឥដ្ឋនោះ គេតែងប្រទះឃើញច្រើនពីខាងកើត តែជួនកាលមានប្រាង្គខ្លះនៅបន្ទាប់ពីខាងក្រោយទ្វារខាងលិច ។ លើកលែងតែគុហាតូច ៗ ដែលនៅតាមស័ក្យ ដែលតែងមានមួយគូៗ ស្ថិតនៅលើផ្លូវគ្រឹះជាប់គ្នា ។ គុហាតូចៗ ទាំងអស់មានចំនួន ៤៤ តួ ។ មានគុហាជាច្រើនទៀត ដែលត្រូវបាក់បែកអស់ដោយសារការសាងពុំទាន់បានរួចស្រួលបួល ។

នៅក្នុងដៃគេសង្កេតឃើញបល្ល័ង្កធំៗពីរ ដែលបានរកឃើញក្នុងពេលត្រួសត្រាយកាប់ឆ្ការ ។ គេបានដំកល់ទុកបល្ល័ង្កនេះនៅមុខគុហាតូចៗទាំងនោះ ព្រោះជាបល្ល័ង្កមានក្បាច់របនាយ៉ាងល្អវិចិត្រ ។

ប្រាសាទភ្នំបាក់ខែង ជាប្រាសាទមួយដែលនៅក្នុងផ្ទៃគ្រឹះ គេពុំបានយកដីមកចាក់បំពេញដូចជាប្រាសាទទាំងឡាយទេ គឺគេបានកាត់យកពើងថ្មឲ្យរាបស្មើ ទើបគេរៀបក្រាលថ្មភក់ពីលើ ដោយហេតុនេះ ទើបគេឃើញកន្លែងដែលថ្មរបៀលធ្លាក់នៅជ្រុងទិសឦសាន ហើយនិងជ្រុងទិសអគ្នេយ៍ ។ នៅតាមមុខប្រាសាទធំៗ មានកាំជណ្តើរសម្រាប់ចុះឡើង ជណ្តើរនេះមានទទឹង ៤ ម៉ែត្រ ហើយគុហាតូច ៗ នៅបាំងពីមុខ ។ គុហាតូច ៗ ទាំងឡាយដែលសាងពីថ្មភក់នៅលើមណ្ឌលប្រាសាទធំ មានចំនួន ៦០ តួ សុទ្ធតែជាគុហាដែលមានទ្វារទៅទិសខាងកើត ឯមុខខាងលិចពុំទាន់សាងរួចៗ គុហាតូច ៗ ទាំងនេះសាងបន្តើតតាមគែមគ្រប់ថ្នាក់មណ្ឌលគ្រឹះធំ ។ ប្រាង្គទាំងនេះមានថ្នាក់មួយធំរាងដូចមកុដ ហើយមានទ្រង់ទ្រាយដូចជាគុហាដែលមានថ្នាក់ ៤ ជាប់ ៗ គ្នានោះដែរ ។

នៅតាមស័ក្យប្រាសាទដែលលាតសន្ធឹងពីជើងទៅត្បូងមានភាពបែបបន្ទិតទៅខាងលិច ព្រោះទីនេះជាទីតាំងនៃជណ្តើរថ្នាក់ទី ៥

ដែលមានផ្លូវនៅតាមគែមដែលមានទទឹងខុសគ្នា គឺប្រវែងពី៤ម៉ែត្រ ទៅ ១៦ ម៉ែត្រ ជាកន្លែងដែលសម្រាប់រៀបចំក្បួនហែរឲ្យបានស្រួល ។

នៅតាមជញ្ជាំងទល់ច្រក មានផ្ទាក់ជាក្បាច់តាមផ្ទៃកំពស់១ម៉ែត្រ៦០ ជញ្ជាំងនេះស្ថិតនៅពីលើផ្ទៃគ្រឹះ ដែលមានប្រវែងមួយជ្រុង ១ ៣១ ម៉ែត្រ ។

ដោយការខំខ្នះខ្នែងថែរក្សា នាពេលនោះ ទើបនៅមូលដ្ឋាន ទាំងអស់ មានការទើសទែងដោយផ្ទាំងថ្មធំ ១ ដែលព្រះសង្ឃបានយកទៅតម្រៀបជុំវិញតាមផ្នែកខាងក្រោម ដើម្បីជានិមិត្តរូបយ៉ាងសមរម្យដល់ព្រះពុទ្ធរូប ដែលមានព្រះកាយនៅផ្ដេកក្នុងទីនោះ ។ គេតែងមានការជឿនឿងចូលយ៉ាងខ្លាំងចំពោះការរីកចំរើននៃការកសាង ដែលគេបានប្រទះឃើញនៅក្រោមពើនថ្មតាមសំណង់តូច ១ ដែលស្ថិតនៅជាជួរគ្នាប្របេះទិសទៀនប្រាសាទ ។ គ្រប្រាសាទកណ្ដាលខាងលើ សាងនៅលើថ្នាក់ខ្ពស់បង្អស់ ប្រាសាទ

នេះមួយជ្រុង ៗ ប្រវែង ៨ ម៉ែត្រ ហើយនៅតាមជ្រុងថ្នាក់ខាងលើ ដែលមានគុហាតូច ៗ ៤ ទៀត មួយជ្រុង ៗ ប្រវែង ៦ ម៉ែត្រ សាង ប្រូបទីនិបម្រាក់ជញ្ជាំងគ្រឹះ ។ ប្រាសាទភ្នំបាខែងទាំងមូល មានចំនួនគុហា ១០៩ គួ ប៉ុន្តែស្ថិតនៅជាប់ ៗ ពីគ្នា ។

តួប្រាសាទធំកណ្ដាលមានសភាពប្លែកគេ តែសមតាមទំនង ដែលសាងថ្វាយព្រះអាទិទេព ហើយជាប្រាសាទមានមុខ ៤ បែរទៅគ្រប់ទិសទាំង ៤ ។ នៅតាមផ្លូវបខាងក្រោម ប្រាសាទនេះគេឃើញរូបគោអសុភកជ ៣ ។ គោអសុភកជនេះ ជាព្រះទីនាំងរបស់ព្រះឥសូរ ដែលកំពុងតែបញ្ចេញមហិទ្ធិឫទ្ធិ យ៉ាងអស្ចារ្យ ក្នុងពេលដែលយាងត្រួតមើលទិសទាំង ៤ ក្នុងទ្វីប លោក ។ នៅខាងក្នុងមានអណ្ដូងមួយជំរៅ ២ ម៉ែត្រ អណ្ដូងនេះសម្រាប់កំនិចបម្ថកុំឲ្យលេមៀលធ្លាក់ទៅក្រៅបាន ។ មានស្ដូបមួយសាងពីថ្មកក់កង ៤ ជ្រុងទ្រវែង បណ្ដោយ ១ ម៉ែត្រ ៤០ ទទឹង ០ ម៉ែត្រ ៩០ កំពស់ ០ ម៉ែត្រ ៧២ មានជាប់ចុះជា

ប្រហែលដែលលោក សឺដែស បានយល់ឃើញថា ជាមូលដ្ឋានមានទ្រង់ទ្រាយដូចជាចេតិយ សម្រាប់បញ្ចុះព្រះអដ្ឋិធាតុព្រះរាជាដែលព្រះសុវណ្ណគតទៅ ដើម្បីទុកឲ្យគេធ្វើសក្ការបូជា ។ នៅពីខាងមុខ ទិសខាងកើត គេឃើញមានគុហាតូចៗសាងលើថ្ម ផ្លូវក្រាលថ្មកក់ ដែលមានស្លាកស្នាមសសរនៅសល់ខ្លះមានពន្លឺភ្លឺរលីងរលោង ។ មានគុហាធំតល់លិន្ត ៤ ទៀត ប្រកបដោយបាទដ្ឋានរាងមូល ។ គុហានីមួយៗមានទ្វារ ២ នៅឈមមុខគ្នា ។

ឯវិចិត្រកម្មដែលគេបានឃើញនៅតាមគុហាទាំងនេះសរឲ្យដឹងថា សុទ្ធតែសាងឡើងប្រកបដោយគុណសម្បត្តិ ព្រមទាំងគុណវិបត្តិយ៉ាងច្បាស់តាមអន្លើ គឺគេតែងប្រទះឃើញគំនាគអស់នេះនៅក្បែររូបចម្លាក់ទេវតាធំៗ ដ៏មានមហិទ្ធិឫទ្ធិយ៉ាងខ្លាំងក្លា ដែលឆ្លាក់ជាប់ ៗ គ្នាតាមសសរជ្រុងជិតទ្វារចេញចូល មិនតែប៉ុណ្ណោះ មានឆ្លាក់ជារូបស្រីទេពអប្សរជាលំអទៀតផង ។ តាមការវិនិច្ឆ័យនៅលើផ្ទាំងចម្លាក់ដែលមានរូបគំនូរតូចៗ និងចំរឹងដើងទៀតខ្ពស់ៗ ដែលមានរូបគំនូរតូចៗដែរ នោះជាយហើយ ភាពមួយយ៉ាងគ្រប់

គ្រប់សមទៅតាមសេចក្តីត្រូវការ ។ ឯចំណែកតាមប្រហោង វិញគេសង្កេតឃើញក្បាច់ក្បាំងសឹងមានពង ៤ ជ្រុងស្មើ ព្រមទាំង មានរូបចម្លាក់ផ្សេងៗមិនសូវល្អនៅលាយឡំគ្នា ។ រូបចម្លាក់ទាំងនេះ មានកាតវែងប៉ុនទៅបានគេដោយសារមានរូប មករ នៅខបច្រហូត ដល់កន្ទុយពងគោនដូចផង្គ ។ ទ្ធប្រហោងទាំងនេះមានពង ដូចជាពុងឡូតកាំភ្លើងធំដែលបង្ហាំដែក ហើយមានរូបចម្លាក់មនុស្ស ទីងក្បាច់របនាផ្សេង ៗ ទៀតដ៏មានរំយោល ដើម្បីជាគ្រឿងលំអ សម្រាប់បូជាចំពោះក្បាលមនុស្សដែលមានគត្យានុគត ៗ ច្រន់ត្រាយ ទាំងឡាយនេះ តែងមាននៅក្នុងក្បាច់របនាខ្មរក្នុងជំនាន់នោះ ។

សិលាចារឹកមួយផ្ទាំងដែលជំកល់នៅលើបល្ល័ង្កខាងកើតទ្វារ ទ ទិសខាងជើងត្រង់មណ្ឌលប្រាសាទថ្នាក់ក្រោម មានចារឹករៀបរាប់ ពីក្រិត្តិកាលព្រះបាទជ័យវរ្ម័នទី ៥ ពី គ.ស. ៩៦៨ រហូតមកដល់ គ.ស. ១០០១ មិនតែប៉ុណ្ណោះមានចារឹកពីការកសាងនៃព្រះបាទ យសោវរ្ម័នទៀតផង ។



# អង្គរធំ

## បាយ័នអង្គរធំ

ប្រាសាទនេះ សាងនៅចុងសតវត្សទី ១២ ដោយព្រះបាទ ជ័យវរ្ម័នទី ៧ បច្ចាមរណៈព្រះនាម មហាបរមសុគតបទៈ ទ្រង់ស ចំពោះព្រះពុទ្ធសាសនា «មហាយាន» បានទទួលការត្រួសត្រាយពី គ.ស. ១៩១១ ដល់ គ.ស. ១៩១៣ ហើយបានទទួលការសាង ឡើងវិញនូវប្រាសាទកណ្ដាលក្នុងឆ្នាំ ១៩៣៣ ទិនជួសជុលវង់
3 ខាងមុខតាំងពីឆ្នាំ ១៩៣៩ ។

នៅក្នុងចំណោមប្រាសាទទាំងអស់ មានតែប្រាសាទបាយ័នទេ ដែលមានការពិបាកយល់ច្រើនជាងគេខាងបុរាណវត្ថុវិទ្យា ។ ក្នុងប្រវត្តិរបស់ប្រាសាទ ការវិវាទគ្នាបានកើតមានឡើងមកដល់ឆ្នាំ១៩២៣ ចំពោះការដាក់កាលបរិច្ឆេទតាមសិលាចារឹកនៃស្រុកកោះធំ ចំពោះ «ប្រាសាទកណ្ដាល» ។ ប្រាសាទនេះមានការទាក់ទងទៅនឹង

ក៏ប្រាំខែង តែមិនមែនទាក់ទងទៅនឹងបាយ័នទេ ព្រោះបាយ័ននេះ មិនមែនជា "វិហារ-ក្តុ" នៃ "យសោធរបុរៈ" ទេ គឺជាប្រាសាទ មួយនៃពជឆាទីនៃស្ដេច ជ័យវរ្ម័នទី ៧ នៅចុងសតវត្សទី ១២ ។ បាយ័នបានក្លាយទៅជាវិហារយ៉ាងពិតប្រាកដ នៅក្នុងទីក្រុងអង្គរធំ ដែលសាងឡើងដោយព្រះបាទ ជ័យវរ្ម័នទី៧ ក្រោយពេលដែល ពួកចាមបានលុកលុយ ។

គេពុំសូវមានការងឿងឆ្ងល់ពីសភាពដែលជួយគ្នាក្នុងការរៀប ចំវិហារដ៏សំខាន់នេះ ដែលត្រូវខ្ទុះក្រោមមណ្ឌលខាងក្រៅនឹង ស្នាមគ្រោះជុំវិញខឿន ទឹងប្រឡាយបង្ហូរទឹកតាមត្មារដែលនាគ នៅចាំ ។

## មណ្ឌលខាងក្រៅ

នៅតាមមុមមានប្រាសាទតូច ៗ បួន ប្រាសាទនេះប្រកប ទៅដោយរូបសំណាក ហើយមានសិលាចារឹកសាងឡើងដោយព្រះ បាទជ័យវរ្ម័នទី ៧ នៃជយគិរី បានៈត្រូវគេរុះកក្បាច់នៅខាងលើដោយ ពៃរី ទីងជយសិទ្ធិ បានពូលផលក្នុងផ្គុំមាគ ។ លោកសិដែស

បានពន្យល់ថា យើងមិនអាចយល់បាននូវវត្ថុនិងគំនូសនោះបានទេ លុះត្រាតែមានសំដីវោហារខ្លះទៀតជាភាសាខ្មែរ ទើបយើងអាចពន្យល់បាន ។ ប្រាសាទនិងស្នាមភ្លោះនៅអង្គរធំហាក់ដូចជាភ្នំនិងមហាសាគរដែលព័ទ្ធជុំវិញដីយើង ៕

នៅប្រាសាទប្រធាននិមួយ ៗ មានរបៀបធ្វើដូចជានៅអង្គរធំដែរ ហើយសង់ដូចជាទីក្រុងនៃពោធិសត្វលោកេស្វរៈ ដែលប្រកបដោយវិហារមួយធ្វើពីថ្មបាយក្រៀមមានកងជាជើងក្អែក ជម្រន់ទៅខាងលិចមានពីរជាន់ដោយសន្ទុត ហើយត្បាក់លំអដោយក្បាច់ត្របកឈូក នៅលើខ្នងនាគទាំងប្អូន ។ ផ្ទាំងខាងក្រៅលំអដោយទេវតាជិះលើយានជំនិះ និងនៅតាមបង្អួចបញ្ឆោតមានជើងទៀនបិទបាំងដោយរនាំង ។ ខាងលិចមានរូបសំណាកនៅលើបែបផែនជាប្អូនប្រុសស្មើ និងមានមុខទាំងបួនបើកចំហដោយរន្ធន់គោងដូចជានៅចំប្រាង ។ នៅផ្ទាំងនិមួយ ៗ នៃមណ្ឌលមានទ្វារមួយប្រឈមខាងលិច ។

ការទស្សនាប្រាសាទប្រធាននិងមុមខាងទិសនិរតី គេអាចធ្វើ

ដំណើរដោយជើងឬដោយសេះទៅផ្លូវប្រាំង តាមផ្លូវជើងដោយដើរក្នុងព្រៃដែលមានចម្ងាយ ៣ គីឡូម៉ែត្រ ដែលគេឃើញមានគូស្រែរហូតដល់ទ្វារខាងត្បូង ។ គេអាចត្រឡប់មកវិញតាមទ្វារខាងកើត ក្រោយពេលដែលយើងបានដើរជុំវិញក្នុង ១/៤ នៃទីក្រុង ។ គេឃើញនៅកន្លែងខ្លះមានកេរ្តិ៍ដំណែលបុកណាធ្វើពីថ្មបាយក្រៀមដែលបានរកឃើញដោយលោក គ្រោឡូប៊ីរ ដែលនៅសព្វថ្ងៃនេះ ជាប់ទាក់ទងទៅនឹងមណ្ឌលស្នាមក្លោះនៅអង្គរធំក្នុងសតវត្សទី ១១ ។

## ទ្វារទៅអង្គរធំ

នៅទីក្រុងប្រជាជនបានបង្កើតគ្រឿងសម្ភារៈ ពុំសូវមានប្រយោជន៍ទឹងនៅតាមកន្លែងដែលបាំងជិត គេដាក់វត្ថុពុំសូវសំខាន់ទេ នៅចំកណ្តាលបាយ័នគេចែកទីក្រុងនេះជា ៤ សង្កាត់ ដោយមានផ្លូវជើងបួននៅជិតមាត់ស្នាមក្លោះ ។ ផ្លូវទី ៥ ដែលជាផ្លូវសំខាន់ជាងគេបានកាត់ដំរង់ទៅក្នុងវាំង នៅផ្នែកខាងលិច ។

ទ្វារទី ៥ នៃប្រាសាទទាក់ទងទៅនឹងក្រុមវិថី ។ មកពីខាង



ខ្លោងទ្វារអង្គរធំ

មើលចំពីខាងត្បូង

ក្រៅត្រូវជូនគាត់ប្រឡូកយកទឹក ហើយត្រូវជូនផ្លូវមួយដែលយើងបាន
រៀបរាប់ពីមុខមកគឺផ្លូវដែលតាក់ដីបង្កើតបានជាស្ពាន ដែលសព្វ
ថ្ងៃនេះនៅជ្រុងខាងជើងនៅតាមកាត់នៃបណ្តាយ បន្តមកទៀត
មានវិជ្ជាសាស្ត្រសិក្សាពីការហូរទឹកជាថ្មី ៗ នៅជ្រុងពីរទៀត
តាមអ្នកប្រវត្តិសាស្ត្រចិនម្នាក់ឈ្មោះ ចៅតាក្វាន់ បានប្រាប់យើងថា
មានថ្ម ៥៤ ប្រភេទដូចគ្នានឹងថ្មទូទៅ ដែលធំសម្បើមនឹងគួរឲ្យខ្លាច ៗ
បង្កាន់ដៃធ្វើសុទ្ធតែថ្មឆ្លាក់ជាពស់ក្បាលប្រាំពីរ ៗ ថ្ម ៥៤
ប្រភេទនេះ មាននៅតាមដៃពស់នឹងបានការពារយ៉ាងហ្មត់ចត់
ប្រយោជន៍កុំឲ្យរលុប ៗ បើតាមគំនិតលោក សឺដែស និង
លោក ប៉ុលមូស យើងឃើញថាបង្កាន់ដៃនាគនេះមានពងជានាគ
ជានិមិត្តរូបនៃឥន្ទធនូ ដែលមាននៅក្នុងប្រវត្តិសាស្ត្រនៃប្រទេសឥណ្ឌា
គឺជាការរួបរួមគ្នារវាងមនុស្សនឹងទេវតា ដែលបង្កើតបានជារូបពាន
ឡើងនៅក្នុងផ្ទាំង ៗ បើយើងក្រឡេកមើលទៅទៀត យើង
នឹងឃើញថាមានពីរផ្លូវ គឺមានពួកទេវតាមួយផ្លូវ និង ពួកអសុរ
"យក្ស" មួយផ្លូវទៀត អ្នកបង្កើតលោកបានឲ្យជំបូន្មានថា ឲ្យនាំ

គ្នាក្នុងទឹកសមុទ្រ " សមុទ្រទឹកដោះ " ដែលធ្វើឡើងដោយសាមគ្គីភាពរវាងពួកទេវតានិងពួកអសុរា ដើម្បីចម្រាញ់យកទឹកអម្រឹតដែលជាទឹកពូកែសក្តិសិទ្ធិមិនចេះចាស់ស្លាប់ មានរូបភាពនៃការកូរទឹកសមុទ្រ ធ្វើនៅក្នុងស្នាមភ្លោះជាជំនួសមណ្ឌលនៃសមុទ្រ ជាពិសេសទៅទៀត នៅតាមទ្វារមានដំបងចម្លាក់ ដើម្បីជំណាន នូវក្អំ គឺជាការប្រយុទ្ធច្បាំងនូវមន្តអាគមដែលសម្រាប់ការពារប្រទេស ឲ្យបានសុខសប្បាយនិងឲ្យមានកិត្តិយសល្បីសុសសាយ ។

ហេតុមកដល់សព្វថ្ងៃនេះ គេឃើញនៅតែគ្រឿងឥស្សរិយយសរបស់ពួកអសុរានៅតាមទ្វារជ័យ " ទ្វារដែលបែរមុខទៅខាងលិចចូលទៅកាន់គេហ " ហើយគ្រឿងឥស្សរិយយសរបស់ពួកអសុរានៅទ្វារខាងជើង ដែលមុខច្បាំងជុយពីមុខរបស់ពួកទេវតាដែលស្រស់ញញឹម ។

ទ្វារទាំង ៥ មានគំនិតភាពដូច ១ គ្នា និងមានភាពជាបន្ទប់ក្នុងការរក្សាទុក ។ ក្នុងចំណោមទ្វារទាំងអស់ ទ្វារដែលមានភាពគ្រប់គ្រាន់ គឺទ្វារដែលនៅខាងមុខបែរទៅខាងលិចនៃទ្វារខោង

ផ្លូវដែលមានភាពល្អគន់វង់ គឺទ្វារខាងកើតដែលមានចំនួនជាមុខ ខាងត្បៀសាននៃទ្វារជ័យ ។

វិសាលភាពនៃធក " ៣ ម៉ែត្រ ទទឹង ៧ ម៉ែត្រ កំពស់ " ឃើញមានភាពប៉ូករោយរលេច ដោយផ្ទឹមទ្វារបន្តួចនិងក្បាច់ក្បាំងជាដើម ក្បាច់ទាំងនេះបានធ្លាក់ជាប់ទៅនឹងទ្វារឈើ ដែលមានសន្ទឹកទ្វារពីរដាក់លើក្តៅសម្រាប់វិលចុះឡើងបាន និងមានប្រហោងដែលអាចមើលឃើញទៅផ្ទាំងទ្វារនេះ ហាក់ដូចជាមានទុកសម្រាប់បិទបើក ។

នៅកំពស់ពី ២០ ម៉ែត្រមក ទ្វារទាំងអស់នេះធ្វើពីថ្មបាយក្រៀម បានបង្កើតជាសភាពមួយមាន ៣ ជុំយ៉ាងត្រង់ ដែលសំខាន់ជាងគេ គឺទ្វារដែលមានមុខពីរផ្ទុយគ្នានៅអមទ្វារតូចពីរទៀត ដែលមានមុខតែមួយសម្រាប់ចូល ដែលតាក់ចងទៅខាងក្នុងដោយភាពខ្ចូន បង្កើតជាបន្ទប់ៗ តាក់ចងទៅនឹងទ្វារមួយ ៗ ដោយកំពែងខាងក្នុងពីរយ៉ាងផងដឹក ។ ទាំងអស់នេះមានភាពជាអន្ទបទីយកម្ម

ដែលព័ទ្ធជុំវិញមុខទាំងបួននៃបាយ័ន គឺជាឥទ្ធានុភាពនៃរាជស្តេច ដែលបង្ហាញនូវទិសទាំង ៤ ។

# បាយ័ន

១៨០០ ម៉ែត្រពីផ្លូវខាងស្តាំបែកពីទ្វារខាងត្បូងនៃអង្គរធំ យើងដើរជុំវិញប្រាសាទនេះតាមផ្លូវស្តាំ តាមផ្លូវចូលខាងកើតតាមមុខកំពែងដែលលយជាជ្រុងចេញក្រៅ យើងនឹងឃើញសុទ្ធតែតោនិងនាគ មានជើងទ្រ ផ្លូវនេះកាត់ទងទៅនឹងផ្លូវចូលដែលសំខាន់ជាងគេ ហើយគេនឹងសង្កេតឃើញមានគម្របគ្របស្ពា ដែលមានទៅក្នុងរយៈកាលក្រោយសម័យ មានចំនួនជាគ្រុឌចាប់នាគជាចំណី និងនៅជ្រុងម្ខាងទៀតមានកេរ្តិ៍ដំណែលបុរាណចាស់ៗ នៅមាត់ស្រះ ។

នៅពេលព្រឹកប្រាសាទបាយ័នបញ្ចេញនូវស្នើយ៉ាងស្រស់ គួរឲ្យចាប់អារម្មណ៍ ។ គេមិនគាប់លះបង់បាយ័ននៅពេលយប់ដែលចាំងដោយពន្លឺព្រះចន្ទ្រ ផ្ទះ ហើយបានជាវត្ថុនៃម្លប់ឈើចាំង-ឲ្យបានជាត់ជាពណ៌នៅតាមថ្ម ឲ្យទៅជាពណ៌បែកនិយ៉ាន



ប្រាសាទបាយ័ន

មើលបំពីខាងជើង

ស្រស់បំព្រង ។ មុខទីមួយ ៗ គួរឲ្យចាប់អារម្មណ៍យ៉ាងក្រៃលែង ដូចជារយ៉ាំ ឬ តន្ត្រី បណ្តាលឲ្យមានគំនិតចូលទៅរកសន្តិភាពក្នុងលទ្ធិព្រះពុទ្ធសាសនា ។

នៅសម័យពីដើមលោក ពាក្យទូទៅ បានប្រាប់យើងថា ជប៉ុនមានសុទ្ធតែដើមឈើមានបន្ទាន់និងវល្លិ ដែលដុះច្រវាក់គ្នា បើចង់ធ្វើដំណើរទាល់តែរកផ្លូវដើរដោយជំបង ។ នៅក្នុងព្រៃដ៏ពោរពេញទៅដោយដើមឈើ ដុះយ៉ាងបង្កៀតគ្នានៅគ្រប់កន្លែង មានដើមព្រៃធំ ៗ ជាច្រើន ដែលដុះបំផ្លាញរុក្ខជាតិឯទៀតរហូតដល់លើកំពូលប្រាសាទ ។

ដូចជាលោក កុំម៉ៃ ដែលបានត្រួសត្រាយ យើងតាំងអស់គ្នាជាអ្នកទីមួយ ដែលមានសេចក្តីសោយស្តាយធម្មជាតិដែលពេញទៅដោយបុព្វានុភាពនិងប្រិយភាព ។ មួយខែ ១ ឬ មួយថ្ងៃ ១ មានថ្មជាច្រើនដុំធ្លាក់ចុះមក ។ ភាពខូចខ្ទេចខ្ទីនៃប្រាសាទនេះ នឹងកើតមានឡើងបើទុកឲ្យយូរទៅ ដូច្នេះត្រូវតែត្រួសត្រាយយ៉ាងឆាប់រហ័ស ។



ប្រាសាទបាយ័ន

មើលទៅលើថ្នាក់ទី ៣ កំពូលខាងជើងជ្រុងខាងកើត

ប្រមាណប្រហែលជាមួយសតវត្សយ៉ាងតិច បាយ័នមានភាពផ្ទុយពីអង្គរវត្ត ។ ប្រាសាទអង្គរវត្តស្ថិតនៅក្នុងកំពែងច្រើនជាន់ បង្កើតឲ្យមានជាបែបផែនយ៉ាងទូលាយ មានខ្យល់ចេញចូលយ៉ាងស្រួល និងមានភាពស្រឡះខាងស្ថាបត្យកម្មដែលប្រកបដោយភាពឆើតឆាយនៅជុំវិញនិងនៅពេងទង ។ ចំណែកឯបាយ័នវិញ ស្ថិតនៅក្នុងមណ្ឌលកង ៤ ជ្រុងទ្រវែង មាន ១៤០ ម៉ែត្រ ទទឹង និងបណ្ដោយ ១៦០ ម៉ែត្រ នៃកំពែងទី ៣ គឺ “ពេងទងក្បាច់ចម្លាក់” ធ្វើឲ្យយើងចាប់អារម្មណ៍ថាស្ថិតនៅក្នុងមណ្ឌលមួយដ៏ចង្អៀត ៗ មានវិសាលវិហារខ្លះទៀត សង់នៅកន្លែងខាងវិហារមណ្ឌលកណ្ដាលបានកប់បញ្ចូលទៅខាងក្នុងនៃពេងទងទី ២ ដែលមាន ៧០ ម៉ែត្រ ទទឹងនិង ៨០ ម៉ែត្រ ។

នៅឆ្ងាយបន្តិចមក មានបន្ទាត់ជើងមេឃរុញច្រានទៅក្រោយមណ្ឌលខាងផ្នែកក្រោម មិនគ្រាន់តែមានគំនរថ្មប៉ុណ្ណោះទេ មានភាពច្របូកច្របល់ ម្យ៉ាងទៀតដែលមានបលនាគួរឲ្យក្ដៅក្រហាយផល់លើមេឃនៅគ្រប់ទិសកន្លែង គេឃើញជុំថ្មនៅតាមបន្ទាត់តុះប្លុក

នៅផ្នែកខាងមុខ នៅវង់ ៥ ខាងមុខមានសភាពបែបផែនខុស ៗ គ្នាបានផ្ដល់នូវការចាប់អារម្មណ៍ជាខ្លាំង ។

នៅលើដំបូលខាងលើ មានសភាពស្ងប់ស្ងាត់ គ្មានការរន្ធត់ ដោយដុំថ្មខាងមុខ គេមិនអាចមើលឃើញនៅទស្សនីយភាពយ៉ាងច្របូកច្របល់ទាំងអស់ទេ បើសិនជាដើរកំសាន្តពីកន្លែងមួយទៅមួយនៃមុខទាំង ២០៨ ដែលនៅឆ្ងាយពីវិសាលភាពនិងកន្លែងនៃស្ថាបនិក គេនឹងកោតស្ញប់ស្ញែងនូវរូបសំណាកដែលមិនអាចដឹងបានជាមុន ។ បន្តិចម្ដង ៗ ភាពភ្ញាក់ផ្អើលក៏បានស្រួលឡើងវិញ ហើយគេបានឃើញវង់មណ្ឌល មានភាពមែនទែនចែកជាសង្កាត់យ៉ាងសមរម្យដាក់ជាពួកជាក្រុមតាមកន្លែង ៗ ចំណែកគ្រឹះស្ថានពីឥដ្ឋគេមិនរាប់បញ្ចូលផងទេ គេសង់ត្រាន់តែជានិមិត្តរូបតែប៉ុណ្ណោះ ។

បាយ័នជាស្នាដៃមួយនៃអ្នកកសាង ដែលមានប្រពៃណីនៅក្នុងលោកយើងនេះ ដែលគេនិយមពីគ្រឿងអាថ៌កំបាំង និងចិត្តជាដំបូងជាស្ដេចជ័យវរ្ម័នទី ៧ ដែលជាស្ដេចនិយមនូវព្រះពុទ្ធសាសនា ។ ព្រះភក្ត្រទាំង ៤ នៃស្ដេចបានក្រឡេកមើលទៅ

គ្រប់ទិសទាំង ៤ គឺជានិមិត្តរូបនៃព្រះពោធិសត្វ លោកេស្វរៈ ជាការសំគាល់នូវទិសទាំង ៤ ។ បើតាមជំនឿរបស់លោកសេដែស បានពោលថា ព្រះភក្ត្រទាំង ៤ គឺជារូបភាពនៃស្ដេច ដែលដូចគ្នានឹងព្រះអាទិទេព បើតាមលោក ប៉ូលមូស វិញបានពោលថា មណ្ឌលដែលទាក់ទងទៅនឹងការណាវៃត្រខុស ។ គ្នានេះ បានបង្កើតនូវការបំរើនលូតលាស់ ខាងឫទ្ធានុភាពនៃស្ដេចអាទិទេព ដែលនៅក្នុងស្រុកទាំងអស់ ។

ម្យ៉ាងទៀតប្រាង្គមានមុខបួននេះជាវិហារ ដោយមានអក្សរចារឹកខ្លះ ៗ ទាក់ទៅតាមផ្ទៃទ្វារ ឬបន្ទប់រំលឹកគុណព្រះអាទិទេព ដូចមានរូបព្រះពោធិសត្វ លោកេស្វរៈ ជាភស្ដុតាងស្រាប់, នៅវង់កណ្ដាលឃើញមានរូបសំណាកនៃប្រទេសខ្មែរ គឺ «ស្ដេចព្រះពុទ្ធ» ត្រូវនឹង លិង្គ ឬទេវរាជ នៃលទ្ធិព្រាហ្មណ៍: រូបនោះអង្គុយលើនាគ ហើយការបញ្ជាក់ឲ្យឃើញដឹងថាជារូបព្រះបាទជ័យវរ្ម័នទី៧ ។

នៅក្នុងឆ្នាំ ១៩៣៣ លោកទ្រូវេ បានរកឃើញនូវរូបសំណាក មួយបាក់បែកអស់ នៅក្នុងអណ្តូងជំរៅ ១៤ ម៉ែត្រ នៅក្នុងវង់កណ្តាល ។ រូបចម្លាក់នេះមានកំពស់ ៣ ម៉ែត្រ ៦០ បានយកទៅរៀបផ្គុំឡើងវិញ ហើយបានថ្វាយចំពោះព្រះបាទ ស៊ីសុវត្ថិ-មុនីវង្ស យ៉ាងឧឡារិកនៅថ្ងៃទី ១៧ ខែឧសភា គ.ស. ១៩៣៥ ។ វិហារដែលតំកល់ព្រះបដិមាករនេះ ជាមណ្ឌបមានដំបូលប្រក់ក្បឿងស្ថិតនៅចំហៀងខាងត្បូងនៃផ្លូវទៅកាន់ទ្វារជ័យ មិនឆ្ងាយប៉ុន្មានពីព្រះពន្លាដំណាក់អង្គរធំ ។

## ការពិពណ៌នាអំពីប្រាសាទ

ការកែប្រែខ្សែបែបផែននៅបាយ័ន និងភាពខទើសខ្វែងនៃគ្រឹះស្ថាន មកពីការរើរៀបចំច្រើនដងពេកដែលនាំឲ្យប្រាសាទប្រែភាពផ្សេងៗទៀត ហើយគេបានឃើញស្នាមនៅសឹងតែគ្រប់ទីកន្លែងទាំងអស់ ។ ការប្រែភាពយ៉ាងដូច្នេះហើយ កាចមានការសាងបែកៗគ្នា ដោយមានពេលសម័យខុសៗគ្នា សារុបសេច-

ក្ដីទៅ មិនមែននៅក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ប៉ុណ្ណោះទេ ។

ក្នុងស្ថានភាពសព្វថ្ងៃ ប្រាសាទនេះចែកជាពេនខឿន នៅខាងក្រោមមួយ នៅមណ្ឌលទី៣ជាមួយនិងមណ្ឌបមុមបួនទិស នាគបួននៅព័ទ្ធជុំវិញទីធ្លា ។ នៅខាងលិចមានបណ្ណាល័យពីរ នៅលើមណ្ឌលទី២នៃពេនខឿនមួយនិងរង់មុមបួននិងរង់ទី៣កណ្ដាល ។ នៅមុខនិមួយៗនៅរង់កណ្ដាលមានរូបនាគមានរបៀបដូចនៅពេនខឿន មានកំពែងលយចេញជាកងខ្លួន និងរង់មុមហើយមានថ្នាតូច ៤ កាត់កែង មានលានខ្ពស់មួយ មានច្រង់ព្រាយតាមបរិវេណនៃពេនខឿនកងខ្លួន ។ មានកំពូលកណ្ដាលពងមូល ដែលមានកំពស់ ៤៥ម៉ែត្រ ពីផ្ទៃនៃទីក្រុង កំពូលប្រាសាទនេះបាននោះជាប្រហោងម្យ៉ាងនៅខាងលិចបន្ទប់តូច ៗ និងនៅយ៉ាងមុខនៅផិតរង់ខ្ពស់ ។

១ - នៅប្រាសាទកណ្ដាលមានតាក់ខង់ទៅទីងពេនខឿនខាងមណ្ឌលទី២ គឺជាផ្នែកខាងគ្រឿងបរិធាននៃពេនខឿនមានកំពែងខ្វងព័ទ្ធជុំវិញដោយយេរិហារកណ្ដាលមួយដែលខ្ពស់ ដើម្បីធ្វើឲ្យទៅ

ជាកងបួនជ្រុងទ្រវែង ដោយមានការតភ្ជាប់ទៅនឹងថែបថែនខាង
ក្រោមនៃកេនទងដែលព័ទ្ធជាគូបតាំងបួន ។

២- នៅលើលានខ្ពស់កន្លែងមានវិហារកណ្តាល ដែលកសាងឡើងដោយព្រះបាទជ័យវរ្ម័នទី៧ នៅពេលក្រោយបំផុត គឺក្រោយដែលទ្រង់បានសម្រេច នឹងសាងបាយ័នជាវិហារនៅលើភ្នំនៃអង្គរធំ ដោយទ្រង់ជាព្រះឧបត្ថម្ភនៃព្រះពុទ្ធសាសនា ។

៣- ទីធ្លាព័ទ្ធជុំវិញបានចាក់ទងទៅនឹងការប្រតិបត្តិពេលយ៉ាង ដែលត្រូវបំពេញបន្តបន្ទាប់គ្នា ។ នៅផ្នែកខាងក្រោមធ្វើពីថ្មបាយក្រៀម មានកេនទងនៅមណ្ឌលទី៤បានតភ្ជាប់រហូតដល់ ២ ម៉ែត្រ ៥០ នៅខាងក្រោមហើយនិងការជីករកបានបង្ហាញនៅកន្លែងក្រាលថ្មបាយក្រៀម ផ្នែកទី១ និងនៅកណ្តាលមានជម្រៅ ១ ម៉ែត្រយ៉ាងខ្ពស់ ដោយមានឆ្លាក់ជារូបនៅលើថ្ម ។

៤- នៅកេនទងនៃមណ្ឌលទី៣ និងនៅតាមបណ្តាល័យបានចាក់ដីបំពេញរហូតដល់រួចស្រេច ។

៥- មានទីធ្លាព័ទ្ធជុំវិញបានបែកប្រហោងនេះទៅជាគ្រឹះស្ថាន



ប្រាសាទបាយ័ន

១៦ តែនៅសព្វថ្ងៃនេះ គេឃើញផុតអស់តែ ៤ នៅមុខម្ខាង ៗ និងមានកន្លែងសម្រាប់អង្គុយធ្វើដោយថ្មបាយក្រៀម ប៉ុន្តែអាចមើលឃើញដីដែលភ្ជាប់ពីរោងទី ២ និង ទី ៣ ខាងស្តាំ នៅវង់នីមួយ ៗ នៃមណ្ឌលទី ២ ។

ជណ្តើរមួយដែលនាំឲ្យយើងមកដល់លានខាងលើ មានតាំងពីដើមមកនៅតាមស័ក្យនីមួយ ៗ នៅជណ្តើរខាងលិចមានជញ្ជាំងព័ទ្ធជុំវិញ នៅក្នុងសម័យមិនកំណត់ អាចប្រើជំនួសជណ្តើរពីរទៀត ដែលមានភាពជាអតិបរមាណ ជណ្តើរទាំងនេះមានភាពយ៉ាងមាំនិងឡើងស្រួល ៗ កាំជណ្តើរធ្វើពីស៊ីម៉ងត៍ មានប្រវែងនិងទទឹងពុំសូវធំល្មមក្នុងការធ្វើដំណើរយ៉ាងស្រួលឡើងទៅខាងជើង – ខាងត្បូងនិងខាងលិច ជណ្តើរខាងឆ្វេង ។

មកដល់ប្រាសាទដោយលានខាងកើត គេចូលដល់ពាក់កណ្តាលនៃមណ្ឌលទី ៣ មានសសរជារូបនាគខ្វែងនៅផ្នែកខាងក្រោម គេបានសង្កេតឃើញមានរូបចម្លាក់នៅជញ្ជាំងដែលធ្វើ

ឲ្យយើងយល់ឃើញច្បាស់នូវអត្ថន័យនៃការតុបតែងនេះ "ដោយធ្លាក់មកដើមជញ្ជាំង" មានដំណើរហើរចន់ក្នុងនៃស្រីទេពអប្សរពីរ ឬ បី នាក់ហោះទៅលើផ្កាឈូក ។ នៅទីនេះបើគេបត់ពីខាងឆ្វេងហើយចូលទៅក្នុងពេងទងនៃក្បាច់ចម្លាក់ ដែលគេធ្លាក់តាមក្បួនប្រពៃណីពីបុរាណកាល ដោយទុកនូវប្រាសាទជាកេរ្តិ៍ដំណែលនៅខាងស្តាំរហូតយកដល់ខាងខាងត្បូង ។

ពេងទងនេះបានបែកជាល្វែងខណ្ឌ ដោយជញ្ជាំងមាន ៤ ម៉ែត្រ ៥០ កំពស់ ដែលមាន ៣ ម៉ែត្រ ៥០ ធ្លាក់ នៅជ្រុងម្ខាងទៀត មានសសរតម្រៀបជាពីរជួរ មានបង្គោលតាចៗ ។

ឬ នៅតាមបរិវេណប្រាសាទខ្លោងទ្វារព្រុកក់បែកអស់ ដូចជាមេមណ្ឌបមុខ ទិន រូបខាគ នៅគ្រប់តែបែបផែនខ្មែរ ។

អ្នកទស្សនាទាំងឡាយ ដែលមានពេលទំនេរគួរពិនិត្យនូវក្បាច់ចម្លាក់នៅផ្នែក ១/៤ នៃទិសអគ្នេយ៍ ដែលមានខ្លឹមសារជាតិគេ រូបឈរនៅតាមទ្វារនីមួយ ៗ ដែលបើកចំហទៅទីធ្លាខាងក្នុង ដើម្បីបានឃើញទ.ប្ប.ទិ.បភាពទាំងអស់នៃប្រាសាទ

ដែលប្លែក ៗ ពីគ្នា ។

នាគខាងស្តាំមានរូបយ៉ាងសង្ហា រីឯទ្វារខាងជើងប្រកបដោយក្បាច់គ្របកល្បូកយ៉ាងល្អឆើតឆាយ នៃស្រីទេពអប្សរដែលឆ្លាក់យ៉ាងធំៗ ។ គេចូលមកដល់បរិវេណនេះ គេគាបជូនគាត់ចូលទៅដល់មណ្ឌល ដែលមានរូបនាគនៅក្នុងពេនខនដែលមានទិសភាគមិនស្មើគ្នា ។ ផ្លូវច្បាប់ខាងជើងទិសខាងត្បូងនៃបាយ័នបានចុះមកក្រោមជំរង់ទៅខាងលិច ដោយទុកចន្លោះយ៉ាងទូលាយ នៅផ្នែកខាងកើតនៃបួនជ្រុងទ្រវែង នៅមណ្ឌលទី ២ ដែលមានផ្នែកខាងក្រៅនៃពេនខន នោះបើជាយ៉ាងណាក៏ហាក់ដូចជានៅផ្នែកខាងក្រៅ មានក្លោងទ្វារពាក់- 102
កណ្ដាលទាក់ទងទៅខាងក្នុង នៃក្លោងទ្វារមួយប្រកបដោយក្បាច់ចម្លាក់ ដែលលយចេញដាច់នៅខាងស្តាំនៃរង់និមួយ ៗ ។

ធ្វើដំណើរត្រឡប់មកពីខាងស្តាំ នៃប្រាសាទមានរូបនាគដែលតម្រង់ទៅខាងលិចនៃពេនខនខាងក្នុងដែលមានជ្រុងតាបៗ គេក្រឡេកឃើញតាមចុង ៗ នៅក្នុងមណ្ឌលមុខខាងអាគ្នេយ៍ផ្នែក

ខាងក្រោម មានព្រះពុទ្ធបដិមាករតូចនៅក្រោមក្បាលនាគ ដែលធ្វើឲ្យមានការគោរពស្ញប់ស្ញែងយ៉ាងជ្រាលជ្រៅ ។

បែកផ្លូវទៅខាងជើងតាំងពីរនាំទី ១ គេបន្តដំណើរដោយពេលចេញមានកំពែងវែងមានជ្រុងតាម ៗ នៅពាក់កណ្តាលក្លោងទ្វារ ៗ តាំងពីក្លោងទ្វារនោះមកយើងឃើញកំទេចថ្មនៅពាសពេញយ៉ាងតិចណាស់ពី ១ ម៉ែត្រ ទៅផ្ញាំងឡើងទៅលើនៃលានខ្ពស់ ដែលយើងបានឃើញរួចមកហើយ បន្ទាប់មកចូលទៅក្នុងបរិវេណដែលប្រកបដោយរឿងព្រេង នៅជ្រុងក្បាច់និមួយ ៗ ។ គេចុះពីទីធ្លាខាងទិសឧត្តរហើយចូលទៅក្នុងនៃមណ្ឌលទាំង ៣ ដោយសំគាល់ឃើញនៅកន្លែងខាងលិចនៃមណ្ឌលទី ២ មានជណ្តើរមួយដែលនៅខាងត្បូងនៃឡើងទៅលើលានខាងត្បូង ។ ផ្លូវបត់នេះ បណ្តាលឲ្យមានសេចក្តីរន្ធត់ញាប់ញ័រយ៉ាងខ្លាំងនៃបាយ័ន ហើយមានភាពខ្ពស់តាមយ៉ាងច្រើនឥតគណនា ទីធ្លាដែលត្រូវមាននៅជាន់ទី ១ នៃប្រាសាទ ដែលមានផ្លូវវែងហើយចង្អៀតគ្មានខ្យល់ទិន

គ្មានពន្លឺព្រះអាទិត្យដែលគេឃើញហើយពិតនូវប្រិយភាព ដែលខុសគ្នាឆ្ងាយណាស់ពីអង្គរវត្ត ។

នៅតាមទីលានខាងលើ ដែលគេគាបដើរកំសាន្តជុំវិញបាន គេមិនឃើញនូវភាពកំបាំងហើយច្បាស់ នៅពេលដែលគេដើរកំសាន្ត មិនបានឃើញព្រះភក្ត្រព្រះពោធិសត្វ លោកគេសួរ: ជាច្រើនដែលបាក់បែករលំគរលើគ្នានៅប្រាសាទកណ្តាល ។ បរិវេណទាំងនេះបានលេចចេញសឹងតែគ្រប់ទាំងអស់ តែមានភាពប្លែកៗគ្នា មិនមែនមកពីក្បាលដែលមានមុខ ៤ ដូចជាការបង្ហាញនៅក្នុងសាសនាព្រាហ្មណ៍នោះទេ គឺមានសភាពប្លែកពីគំរូនៅប្រាសាទបួនជ្រុងស្មើ មានបួនជាន់ដោយសន្មត មិនមានជាក្បាច់ត្របកឈូក ដោយមានមុខនៃមនុស្សមានសភាពប្លែកៗគ្នាពី ១ ម៉ែត្រ ៧៥ ដល់ ២ ម៉ែត្រ ៥០ នៃកំពស់ទៅលើអ័ក្សនិមួយ ចម្លាក់នៅតាមកំពស់នៃជាន់ទី ២ នៅផ្នែកទី ១ ។

នៅបរិវេណនេះ មានកពង់ប្រាសាទកណ្តាលខាងបំពង់ខ្យ ដែលជាប់នឹងលយចេញមកក្រៅ ដោយគ្មានទាក់ទងទៅនឹងអ្វី

អោះ ហើយមិនគាប់ត្រាំបានទីនឹបូសឈើទាំងឡាយ ហាក់ដូចជាប្រេះពីលើមកក្រោម តាមបន្ទាត់ត្រង់ជាប់គ្នាគ្មានដាក់ទងទៅទីនអ៊ី ហើយធ្វើឲ្យថ្មលំដូចជាផ្លែឈើទុំ ៗ ការបាក់បែកដ៏សម្បើមនេះ បានរកឃើញដើមកំណើតហើយបានជួសជុលជាថ្មីឡើងវិញ ប្រហែលជាពាក់កណ្តាលនៃប្រាសាទ នៅខាងមុខនៃទិសខាងកើតទិសខាងត្បូង បានបាកស្លុតពីការខូចខាត ហើយការរៀបចំកែប្រែនៅតែបន្តទៅមុខទៀត ។

កំពូលកណ្តាលមានបាតរាងមូល បន្ទាត់ពុះកណ្តាលប្រវែង ២៥ ម៉ែត្រ នេះគឺជាវត្ថុមួយដែលពុំសូវមាននៅប្រទេសខ្មែរ ។ នៅខាងលើនៃផ្នែកខាងក្រោមប្រកបដោយផ្លូវចូលទៅប្រាសាទ មានក្បាច់ចម្លាក់បង្កើតបានជាសសរ នៅក្លោងទ្វារមានរាងជាត្រីកោណ ឬ បួនជ្រុងទ្រវែង នៅលើថ្នាក់ ទី ១ នៅបន្ទប់ឯទៀត ខ្លះទៀតគ្មានផ្លូវចូលទេ តែក្លែងដោយបង្អួច រូបមកមាន ៨ ជុំ ខាងមុខដាក់នៅលើថ្មសម្រាប់សំគាល់ចំណុចទិសទីនិងជ្រុងជាប់ ៗ គ្នា ហើយមានផ្នែកមុខមួយទៀត

គ្មានពន្លឺព្រះអាទិត្យដែលគេឃើញហើងពិតនូវប្រិយភាព ដែលខុសគ្នាឆ្ងាយណាស់ពីអង្គរវត្ត ។

នៅតាមទីលានខាងលើ ដែលគេគាប់ដើរកំសាន្តជុំវិញបាន គេនឹងឃើញនូវគាថកំបាំងហើងច្បាស់ នៅពេលដែលគេដើរកំសាន្ត នឹងបានឃើញព្រះភក្ត្រព្រះពោធិសត្វ លោកេស្វរៈជាច្រើនដែលឆ្លាក់ថែករលំគរលើគ្នានៅប្រាសាទកណ្ដាល ។ បរិវេណទាំងនេះបានលេចចេញសឹងតែគ្រប់ទាំងអស់ តែមានភាពប្លែក ៗ គ្នា មិនមែនមកពីក្បាលដែលមានមុខ ៤ ដូចជាការបង្ហាញនៅក្នុងសាសនាព្រាហ្មណ៍នោះទេ គឺមានសភាពប្លែកពីគ្នីនៅប្រាសាទបួនជ្រុងស្មើ មានបួនជាន់ដោយសន្ទួតនិងមានជាក្បាច់គ្របគល្បូក ដោយមានមុខនៃមនុស្សមានសភាពប្លែកៗគ្នាពី ១ ម៉ែត្រ ៧៥ ដល់ ២ ម៉ែត្រ ៥០ នៃកំពស់នៅលើអ័ក្សនិមួយ ចម្ងាក់នៅតាមកំពស់នៃជាន់ទី ២ នៅផ្នែកទី ១ ។

នៅបរិវេណនេះ មានកន្លប្រាសាទកណ្ដាលខាងបំពង់ខ្យល់ដែលជាប់នឹងលយចេញមកក្រៅ ដោយគ្មានទាក់ទងទៅនឹងអ្វី

នោះ ហើយមិនអាចទ្រាំបាននឹងឫសឈើទាំងឡាយ ហាក់ដូចជាប្រេះពីលើមកក្រោម តាមបន្ទាត់ត្រង់ជាប់គ្នាគ្មានទាក់ទងទៅនឹងអ្វី ហើយធ្វើឲ្យថ្មរលំដូចជាផ្លែឈើទុំ ។ ការបាក់បែកដ៏សម្បើមនេះ បានគេឃើញដើមកំណើតហើយបានជួសជុលជាថ្មីឡើងវិញ ប្រហែលជាពាក់កណ្តាលនៃប្រាសាទ នៅខាងមុខនៃទិសខាងកើតនិងខាងត្បូង បានពាកសុតពីការខូចខាត ហើយការរៀបចំក៏ចេះតែបន្តទៅមុខទៀត ។

កំពូលកណ្តាលមានបាតរាងមូល បន្ទាត់ពុះកណ្តាលប្រវែង ២៥ ម៉ែត្រ នេះគឺជាវត្ថុមួយដែលពុំសូវមាននៅប្រទេសខ្មែរ ។ នៅខាងលើនៃផ្នែកខាងក្រោមប្រកបដោយផ្លូវចូលទៅប្រាសាទ មានក្បាច់ចម្លាក់បង្កើតបានជាសសរ នៅក្លោងទ្វារមានរាងជាត្រីកោណ ឬ បួនជ្រុងទ្រវែង នៅលើថ្នាក់ ទី ១ នៅបន្ទប់ឯទៀត ខ្លះទៀតគ្មានផ្លូវចូលទេ តែក្លឹដោយបង្អួច រូបមកមាន ៨ ជុំ ខាងមុខដាក់នៅលើថ្មសម្រាប់សំគាល់ចំណុចទិសនឹងជ្រុងជាប់ ៗ គ្នា ហើយមានផ្នែកមុខមួយទៀត

ដែលនៅពុំទាន់មានសភាពស្រួលបួលនៅឡើយ ។ នៅកំពូល ខ្ពស់បំផុតបានបញ្ចេញញាណពង់កេរ្តិ៍ច្បាស់លាស់ ព្រោះដោយសសរ នៅខាងក្រោមនៃក្លោងទ្វារក្រោយបន្ទុស ហើយប្រហែលជា បានរួបរួមបន្ទប់ដែរ ក្រៅពីសសរនេះ កំពូលប្រាសាទលំអ ដោយក្បាច់នៅផ្នែកខាងមុខ ដូចជានៅបរិវេណដែរ យ៉ាងហោច ណាស់ក៏មានស្នាមៗប្លាក់នេះ ឬបន្ទាត់ដែលជាគ្រឿងលំអយ៉ាង ដែរ ។ តាមប្រាកដណាស់នៅបរិវេណដែលលោក ហៀរ ត.- ក្ដាន់ បានរៀបរាប់ថា ជាទីសម្រាប់សំណាក់មណ្ឌលនៃពជាណា បក្រយើង ដែលបានការពារយ៉ាងមាំមួនដោយព័ទ្ធជុំវិញជា ២០ ជុំ និងមានជុំផង ១០០ ធ្វើពីថ្មរាំងអស់ ។ នៅគ្រប់ផ្នែក ខាងលើនេះ ត្រូវបាក់បែក ស្ទើរតែទាំងអស់ ក៏ប៉ុន្តែនៅ ឆ្នាំ ១៩៣៣ គេបានកសាងជាថ្មី និងមានការរៀបចំអង្គា ប្រាសាទយ៉ាងឆាប់រហ័ស ។

នៅក្នុងប្រាសាទ ជុំសិលាទៀងតណ៌ស្រគាប់ មានប្រវែង ៥ ម៉ែត្រ ពីបត្តាត់ពុះកណ្ដាលព័ទ្ធជុំវិញដោយរបៀងយ៉ាងចង្អៀត

នេះហើយជារូបសំណាក សម្រាប់ដំណាន់នូវមណ្ឌលនៃព្រះរាជាណាចក្រកម្ពុជា មានរូបព្រះបតិមាករមួយអង្គធំសម្រាប់ជាទីសក្ការៈបូជា និងមានកំទេចថ្មជាច្រើនដែលគេបានរកឃើញនៅក្នុងអណ្តូងកណ្តាល ។ គេគាបឡើងទៅកាន់ប្រាសាទតាមផ្លូវខាងកើត ដោយប្រាសាទនេះមានកំពូល ៣ ហើយដោយមានរាងជាជណ្តើរ ៗ នៅមួយផ្នែកទៀតមានគ្រឹស្ថានពីរវែង ១ ប្រកបដោយបរិវេណនៅក្នុងបណ្តាល័យ ។ គេសង្កេតឃើញនៅជិតគ្រឹះស្ថានខាងផ្នែកនៃទិសខាងជើង មានមុមកែងដូចគ្នានៅទិសឦសាននៃទីលាន មានក្បាច់មួយដែលគួរឲ្យស្ញប់ស្ញែងសរសើរ គឺជាក្បាច់តាំងពីបុរាណកាលមក ដែលគេលាក់ទុកនៅក្នុងក្រាលថ្ម ហាក់ដូចជាមានរូប ឈោគេស្វរៈ មួយអង្គឈរនៅកណ្តាល នេះជាលក្ខណៈមួយដែលទាញការម្មណ៍យើងឲ្យផ្តោតទៅលើព្រះពុទ្ធសាសនានៅបាយ័ន ។

ការតុបតែងដោយក្បាច់ចាក់ស្រេះ ដូចជានៅសម័យបុរាណគឺនៅពេលចាប់សាងសិល្បៈខ្មែរ ក្បាច់នេះមានសភាព

ថ្នាក់យ៉ាងល្អិតល្អន់ជាទីបំផុត ដូចជានៅខាងក្រោមមានថ្នាក់លំអដោយមែកឈើយ៉ាងត្រសុំត្រសាយ ដែលបង្ហាញនូវសោ-ភ័ណភាពយ៉ាងអស្ចារ្យ ។ គេសង្កេតឃើញនៅតាមបង្អួចបញ្ឆោតមានរនាំងបាំងពាក់កណ្ដាល នេះបង្ហាញពីការប៉ិនប្រសប់របស់អ្នកធ្វើ ហាក់ដូចជាសំពត់អានផ្កាព័ទ្ធជុំវិញដោយខ្សែក្រវាត់ ជាគ្រឿងសំអុងយ៉ាងស្រស់ប្រិមប្រិយនៃទេវតាដែលមានសក់បួងជាក្បួង ដោយធ្លាក់នៅលើត្រីកោណ ក្បាច់ចម្លាក់នេះសម្រាប់បង្ហាញនូវការស្ទាត់ជំនាញ ដែលមាននៅគ្រប់ផ្នែកខាងមុខ ។ យើងសំគាល់ឃើញនៅកន្លែងឯទៀតមានស្រីទេពអប្សរយ៉ាងស្រស់ឆើតឆាយពីរនាក់ នៅបង្អួចប្រាសាទកណ្ដាល និងមានផ្ទាំងចម្លាក់សំខាន់ៗច្រើនទៀតនៅលើជណ្ដើរខាងត្បូងនៃផ្លូវចូលទៅទីលាន ដែលបានបង្ហាញពីរឿងព្រេងនៃ " ដំរីដេ " ដែលផ្សងរើសរកអ្នកមានបុណ្យម្នាក់មកសោយរាជ្យ ។

ចុះពីកំពែងនៃមណ្ឌលទី ២ មកដោយជណ្ដើរដែលខ្សៀន

ទៅខាងត្បូងផ្នែកខាងកើត ពួកអ្នកទេសចរណ៍បានប្រញាប់ប្រញាល់ និងទៅទស្សនានៅកំពូលភ្នំបាយក្រៀមទៀត គេនឹងឃើញមានវត្តនៅចន្លោះមណ្ឌលខាងត្បូង និងមណ្ឌលខាងជើង ដែលមានរឿងព្រេងមួយនិទានពីស្តេចកើតកុដ្ឋរោគ ( រោគឃ្លង់ ) មួយអង្គ ។

បន្តដំណើរទៅទៀត នៅក្នុងកំពែងខាងទិសខាងលិច មានអណ្តូងមួយដែលមានជម្រៅប្រហែលជា ១០ ឬ ២០ ម៉ែត្រ នៅចំកណ្តាល ដែលហ៊ុំព័ទ្ធដោយរបងនៅពីខាងមុខ ។

## ក្បាច់ចម្លាក់

បាយ័នជាប្រាសាទមួយ ដែលមានកំពូលពីរនៅមណ្ឌលជាមួយគ្នា ប្រកបដោយក្បាច់ចម្លាក់, កំពូលខាងក្នុង មានការតុបតែងយ៉ាងប្រណីត ដែលហាក់ដូចជាទេវតានិមិត្តថ្វាយ មានលើកយកសាសនាព្រាហ្មណ៍មកនិទាន នៅកំពូលខាងក្រៅមានការតុបតែងផ្ទុយគ្នាពីខាងក្នុង ដែលមានសុទ្ធតែពួកអ្នកកាន់សាសនាទៅគោរពបូជារំលឹកគុណ និងមានរឿងថ្លែង

រៀបរាប់ពីការរស់នៅក្នុងសម័យប្រវត្តិសាស្ត្រ និងនៅពេលមានចំបាំង នៅក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ ។ លោកប៉ូលមូស បានពោលថា ការរៀបរាប់និទានទាំងនេះគឺជាការធ្លាក់ដោយតន្ទាក ដែលមានភាពពិត ៗ នៃទេពកោសល្យក្នុងសម័យនោះ ដោយការឧបត្ថម្ភនៃលោកស្ទួរៈ ស្តុបនៃកាទិទេពដែលបានជួយផ្សាយនៅពេលក្រោយនេះ ។

ចំណែកនៃចម្លាក់ពុំសូវប្រសើរទេ ព្រោះក្បាច់ចម្លាក់នៅបាយ័នពុំសូវល្អ តែមានជម្រៅជ្រៅជាងក្បាច់ចម្លាក់នៅអង្គរវត្ត នេះជាប្រភពមួយដែលមានឯកសារយ៉ាងសំខាន់ៗ ដោយក្បាច់យ៉ាងច្បាស់ៗ តែអត់មានរូបភាព ។ ឯកសារទាំងនោះបង្ហាញនូវបុរាណកាល និងជីវភាពនៃរាស្ត្រខ្មែរនៅសម័យដើម ។

ម្យ៉ាងទៀតគឺជាប្រាសាទគំរូ សម្រាប់កត់សំគាល់នូវហេតុការណ៍ផ្សេង ៗ ដូចជាបញ្ជីខាងក្នុងសម្រាប់បង្ហាញពីច្បាប់ទំ-ហេប់ខាងសិល្បៈឲ្យរេះពិនិត្យគោលការណ៍ ម្យ៉ាងវិញទៀត

ដូចជាដាច់ខាងលើនាងដើនមេឃ ។ ចេញពីផ្ទះចូលខាងកើត ឃើញទីនបន្តដំណើរទៅពាក់កណ្តាលខាងត្បូង នៃមុខខាងកើត ឃើញទីនបានឃើញប្រាសាទខាងស្តាំផ្លូវ ជាគ្រឿងដំណៃលពីបុរាណ ។

## រោងទងខាងក្រៅ មណ្ឌលទី ៣

### រោងទងខាងកើត ពាក់កណ្តាលខាងត្បូង

ក្នុងក្បាច់ចម្លាក់តាំងពីជាន់ផែលបង្ហាញចំណែកដ៏វិសេសនៃ
សិល្បករ មានក្បួនព្យុហយាត្រាមួយធ្វើដំណើរពីខាងត្បូងមក
ខាងជើង ។ ពួកកងទ័ពមានគ្រឿងការពារដូចជាស្នូ និង ខែល
113 ជាដើមនៅគ្រប់ដៃ ពួកទាហានទាំងនេះច្រើនតែមានសក់
ខ្លី ៗ និងក្បាលទទេ នៅពេលនោះមានទ័ពមួយពួកទៀតមកពី
ខាងក្រោមមានចុកពុកចង្កានិងសក់យ៉ាងចំឡែក ។ ក្រុម
ក្មេងដើរតាមពីក្រោយពួកទ័ពទាហាន និងមានមនុស្សម្នាក់វាយ
ស្គរយ៉ាងធំដោយអន្ទូងពីរ ។ ពួកក្មេងទាំងនេះដើរដោយមាន
19 ពួកអ្នកផិះសះគ្មានការនិងឈ្មានដះអម បំណែកខាងមេទ័ពវិញ

មានជ្បលំពែងឬស្ស ហើយបាំងដោយខ្សែជាអ្នកតាំផ្លូវ អង្គុយនៅលើដំរីដែលដឹកនាំដោយហ្មដំរី ។

គេសំគាល់ឃើញនៅពេលចប់ក្បួនព្យុហយាត្រាម្តងៗ មានការប្រកហោកញ្ញៀវយ៉ាងរីករាយសប្បាយ មានពួកអ្នកផ្គត់ផ្គង់ស្បៀងអាហារឲ្យគង់ទ័ព ដែលមានរទេះមានដំបូលសម្រាប់ដឹកជូបរទេះប្រើសត្វថ្វៃដៃ ចំណែកឯដំរីម្តងនេះឥតមានហ្មទេ ។ ដើមដូនមានសភាពដូចមែនទែន ហើយគេសង្កេតឃើញនៅចុងខាងត្បូងនៃជាន់ទី ២ មានគោមួយដែលគេបង្រុំយកទៅបូជាយញ្ញពេចន៍នៅដើមឈើមួយ ។

នៅទីបញ្ចប់មានរឿងនៅក្នុងផ្ទះតាមជាន់ទាំង ៤ ។ ដំបូលផ្ទះអ្នកស្រុកបង្ហាញនូវប្រទុនផ្ទះ ដែលមានបក្សីទំលើ ៗ លក្ខណៈពិសេសម្យ៉ាងទៀត មានការតុបតែងសក់និងសំលៀកបំពាក់របស់មនុស្ស និងវត្ថុដែលព្យួរនៅលើពិតាន អាចឲ្យយើងយល់បានយ៉ាងច្បាស់ថា អ្នកចម្លាក់នេះបង់បង្ហាញឃើញពីរបៀបធ្វើជំនួញរបស់ជនជាតិចិន ។

## មណ្ឌបមុម ខាង អគ្នេយ៍

ចម្លាក់នៅមណ្ឌបនេះ ឆ្លាក់មិនទាន់ហើយនៅឡើយទេ ផ្ទាំងចម្លាក់ទី ១ បង្ហាញយ៉ាងច្បាស់លាស់អំពីរបៀបធ្វើការតាមប្រពៃណីរបស់ខ្មែរ ។ គេសង់ផ្ទាំងជាដំបូង រួចគេដាប់តាមគំនូរឲ្យបានជាពង រួចលុងឲ្យក្បាច់លេចក្រឡោតហើយសំអិតសំអាងជាក្រោយបំផុត ។ មានរូបស្រីទេពអប្សរពីររូបមានសោភ័ណភាពយ៉ាងស្រស់បញ្ចេញក្បាច់ខាងស្ដាំ ចំណែកនៅខាងឆ្វេងវិញ មានប្រាង្គបីដុំទ្រទ្រង់នូវត្រកូលមួយ និងនៅកណ្ដាលមានលិង្គព្រះឥសូរមួយផង ។ នៅផ្ទាំងចម្លាក់ឯទៀត ៗ មានរឿងរ៉ាវតាក់តែងទៅនឹងរឿងរាមាយណ៍ ។

## រោងទង់ខាងត្បូង ពាក់កណ្ដាលខាងកើត

នៅក្នុងផ្នែកនេះ មានតែរោងទង់មួយទេ ដែលចំណាស់ជាងគេ ហើយដាប់តាក់តែងនឹងចំបាំងតាមនាវា នៅចុងសតវត្សទី ១២ រវាងទ័ពខ្មែរ និង ចាម ។ ចម្បាំងនេះធ្វើឲ្យប្រជាជន

រំដើបរំជួលយ៉ាងខ្លាំង ចំពោះកោតសក់ខ្ញី ៗ ឯចំពោះ " មាន សក់ជោគផ្កាចំប៉ា " ។ មានការប្រឡូកប្រឡាក់ជាខ្លាំង ក្បាល ទុកទីមួយ ៗ លំអយ៉ាងឆើតឆាយ មាននារីម្យ៉ាងទៀតដែល ស្លៀកពាក់បែបសម្រៀបគ្នាជាជួរ និងពួកអ្នកបំប៉ាងដែលមានគ្រឿង សស្ត្រាវុធដូចជាធ្នូ ស្នា លំពែង និង ខែលជាដើម, មានខ្ទប ខ្លះស្រែក គ្រវាត់ពោលមកលើមាត់ប្រាំង ខ្លះទៀតទំលាក់ឲ្យ ក្រពើស៊ី ។

ព្រះពុទ្ធមានមាឌខ្ពស់ គង់នៅក្នុងរាំង នៅចុងខាងស្តាំ ពាក់ខែវគ្រឿងសំភារៈ និងបញ្ជាឲ្យអ្នកនៅក្រោមបង្គាប់ស្គុយ ទទោក ដីរ ហើយតាំងចាក់ក្តាក់ថ្ងៃ ដូចជានៅក្នុងពេញក្នុងពេល បុណ្យភ្ជុំកុម្ភអំពុក ការកំប្លែងនេះតែងមានជាធម្មតា ដើម្បី ធ្វើឲ្យអ្នកចាំមើលមានកម្សាន្តផង មានការកកាយផង ។ មាន ត្រីតារ ចំរុះប្រភេទ ខ្លះដេកតាមដើមឈើ ខ្លះទៀតនៅតាម ព្រៃដែលលិចទឹក នៅរដូវទឹកជំនន់បង្កើតជាទេសភាពដ៏ជាក់ ស្តែង ដូចជាយើងបានជួបប្រទះនៅទន្លេសាបសព្វថ្ងៃនេះ ។

នៅតាមមាត់ប្រាំង មានពិពណ៌នា ដោយប៉ិនប្រសប់អំពីព្រឹត្តិការណ៍ នៃជីវិតរស់នៅពលថ្ងៃគឺៈរឿងកំរនៅតាមផ្សារ នៅកន្លែងដាំបាយ នៅកន្លែងបរបាញ់សត្វ ឬប្រយុទ្ធជាមួយចាម្ប ច្រើន ៗ មានស្រីរកចៃឲ្យគេ ប្រឡែងលេងជាមួយកូនក្មេង ខ្លះ ទៀតយំដោយជម្ងឺដែលឈឺចាប់ពោះដៃ ៗ នៅចុងខាងចុង មានអ្នកបរបាញ់ម្នាក់ឃើញខ្លាប្រុងនឹងចាប់ក្របី ៗ ខ្លានោះ មានសភាពដូចជាខ្លារបស់ខ្មែរសម័យឥឡូវនេះ ៗ

នៅតាមមាត់ទ្វារ មានការពិពណ៌នាអំពីការនេសាទត្រី ដោយសំណាញ់ ៗ ទូកចុំកចាយមួយដែលពេញដោយចិន បង្ហាញពីការប៉ិនប្រសប់ខាងបោះយុថ្កា ដោយប្រើគេសម្រាប់ប្រួតឡើង ៗ បំណែកតូច ៗ អ្នកនៅលើទូកមួយទៀតសោត គឺកំសាន្តយ៉ាងរីករាយ ដោយប្រព្រឹត្តល្បែងផ្សេង ៗ ៗ នៅខាងក្រោម មានរឿងថ្មែក ១ ចំនួនទៀត ដែលមានការប្រជល់មាន់យ៉ាងរំភើប គួរឲ្យចាប់ការម្មណ៍ជាខ្លាំង ៗ

បន្ទាប់មកទៀតគ្មានការស៊ីថ្កូកទេ មានតែរឿងនៅក្នុងវាំង
ដែលមានព្រះអង្គម្ចាស់ក្សត្រីហែហម ដោយពួកកំលៀងរាំចំពោះ
និងមានលេងល្បែងបគុរង្គ "អុក" ។ នៅខាងក្រោមមានអ្នក
ចំបាប់និងអ្នកប្រដាល់ព្រមទាំងអ្នកប្រយុទ្ធជាមួយនឹងជ្រូកព្រៃ ។
ទាំងអស់នេះធ្លាក់នៅក្រោមមនុស្សដេកមានរូបរាងមាំ ។ នេះ
ប្រហែលជាស្ដេចទ្រង់បញ្ជាឲ្យធ្លាក់នៅក្នុងវាំង ក្នុងពេលដែល
ធ្វើបុណ្យតាមប្រពៃណី ឬ ក៏មានការអភិសេកម្ដង ១ ។

នៅផ្នែកខាងក្រោម ចំបាំងក៏ចាប់ផ្ដើមឡើង ដោយ
ពួកចាមលើកទ័ពមកលុកលុយ នៅខាងលើមានការប្រយុទ្ធជា
មួយនឹងខ្មែរដែលមានសភាពហាក់ដូចជាយក្ស ដើមទ្រូងពទ្ធ
ដោយខ្មែរ ។ នៅពេលសង្គ្រាមផុតរលត់ សន្តិភាពក៏ចាប់ 118
ផ្ដើមកើតឡើង ព្រះរាជាទ្រង់ធ្វើបុណ្យរំលឹកជ័យជំនះ នៅ
គ្រប់មណ្ឌល ប្រជាជនតែងប្រកបការប្លែក ៗ គ្នា ដូចជាធ្វើ
ជាងធ្នូ ជាងដែក និងអ្នករៀបចំធ្វើម្ហូប ដើម្បីនឹងធ្វើការ
ជប់លៀង ។

នៅចុងខាងជើង ទ្វារក្រោយបន្ទប់មានផ្ទាំងថ្មឆ្លាក់មួយ យ៉ាងតូច ដែលរៀបរាប់ពីការជជែកគ្នាពីការប្រយុទ្ធ ។

## រោងទងខាងត្បូង ពាក់កណ្តាលខាងលិច

នៅគ្រប់តែផ្នែកនេះ ដែលមានជាន់ខាងក្រោមបានឆ្លាក់ រួចស្រេច បំណែកនៅមណ្ឌលទី ២ ឆ្លាក់ពុំទាន់រួចទេ តែមាន សារៈសំខាន់ជាមធ្យម ។ មានក្បួនទ័ពហែយាត្រាដោយកងទ័ព ដែលមានដំរីជាយានជំនិះ ជាពិសេសពាហនម្នាក់ៗ សុទ្ធតែ មានស្នានៅលើខ្នងដំរី ហើយប្រយុទ្ធគ្នាដោយស្នាទៅវិញទៅ មក អ្នកខ្លះកំពង់ធ្លាក់ទៅលើកង់រទេះ ។ នៅចុងខាងកើត
(119 មានដំរីបាំងក្រសដង្ហែមកស្ទឹងដើម្បីផឹកទឹក ។
ផ្ទាំងមួយមានឆ្លាក់រូបត្រីជានិមិត្តរូបនៃស្ទឹង ។

## រោងទងខាងលិច ពាក់កណ្តាលខាងត្បូង

នៅទីនេះ មានសភាពប្លែកៗតែពុំទាន់បានឆ្លាក់ហើយ ។

នៅជាន់ខាងក្រោម ពួកទ័ពចំបាំងនិងមេទ័ពជិះលើដំរី ដើម្បីធ្វើដំណើរចូលទៅក្នុងព្រៃនិងឡើងលើភ្នំ (ដែលមានបែកាត ជាត្រីកោណតូចៗជាប់ៗគ្នា) ។ ចំណែកនៅផ្នែកកណ្ដាលមានឥសីមួយអង្គរត់គេចពីខ្លាមួយដោយខំឡើងដើមឈើមួយដើម ។

នៅផ្នែកខាងលើ មានរឿងសំខាន់ៗដែលរៀបរាប់ពីការកសាងវិហារ ពួកកម្មករខំប្រឹងទាញថ្ម ដែលនៅទីនោះមានមេដឹកនាំពាក់ម្កុដសម្រាប់បញ្ជា ខ្លះទៀតរៀបចំគ្រឿងបក្ការ ខ្លះទៀតខំក្ដាប់ថ្មដែលត្រូវនៅលើវិហារ ។ ឆ្ងាយបន្តិចមកមានការពណ៌នាពីការរស់នៅនៃពួកឥសី ។

នៅជិតទ្វារ មានផ្ទាំងចម្លាក់យ៉ាងវែងដែលលោកសេដែសបានដាក់ឈ្មោះថា « ចំបាំងគ្នាឯងក្នុងស្រុក » ចលនាយ៉ាងស្រគស្រាញនៃពួកក្បត់វត្តន៍ទៅតាមផ្លូវ តាមថ្នល់ មានមនុស្សប្រុសស្រីដែលត្រូវគេគ្រាងដៃហើយមិនត្រូវការគំរាមកំហែង អ្នកខ្លះទៀតរៀបកិច្ចខ្លួនប្រាណទៅច្បាំង ។ នៅភាគខាងលើមានមនុស្សម្នាក់អង្គុយពុតជង្គង់ហើយកាន់ក្បាលពីរ ដើម្បីបង្ហាញ

ដល់ប្រជាជន ។ នៅខាងលើខ្ពស់មានអ្នកចរពាសដែកម្នាក់ជំរន់ ឆ្ពោះទៅរកព្រះអង្គម្ចាស់ដែលទ្រង់រង់ចាំនៅក្នុងវាំង ។

បន្ទាប់មកទៀត មានសភាពលាយឡំគ្នាដោយការប្រយុទ្ធ ពួកទាហានមានខ្លួនទទេឥតមានការតាក់តែងជារបៀបខ្មែរដែល គេមិនអាចសំគាល់ម្នាក់ៗបានទេ មានទ័ពខាងដំរីចេញទៅជួយ ។

## រោងទងខាងលិច ពាក់កណ្ដាលខាងជើង

ពួកទ័ពចំបាំង មានតែដបងសម្រាប់ការពារខ្លួន ខ្លះទៀតការពារខ្លួនដោយខែលតូចៗនិងដំរី ពួកទាំងនោះនាំគ្នាដើរតាមបាត់ស្ទឹង ដែលនៅទីនោះគេឃើញមានត្រីមួយធំសំបើមត្របាក់

2 សត្វចត្តុបាទតូចមួយ មានអក្សរចារឹកខ្វីមួយបញ្ជាក់ថា: “ប្រើស ជាចំណីរបស់វា” ។

មានអត្ថបទខ្លះទៀតវែងៗធ្លាក់នៅក្រោមសត្វធំៗ បង្ហាញពីស្តេចដេញតាមពួកសត្រូវ ក្បាច់ចម្លាក់នេះនៅសល់តែការយកថ្មដែបលៀនចេញមកក្រៅ នៅក្នុងផ្នែកខ្ពស់ៗ ដែលគេរកឃើញរូបសំណាកមនុស្សសំខាន់ៗ ។

មិនឆ្ងាយពីទ្វារប៉ុន្មានទេ    មានអក្សរចារិកនៅពីក្រោយ សម្រាប់ឲ្យរំលឹកដល់ស្តេច ដែលចេញទៅធ្វើឈានក្នុងព្រៃ មុនពេលដែលទ្រង់នឹងធ្វើពិធីបុណ្យថ្វាយព្រះឥន្ទ្រ    ដែលជាទំនៀមទំលាប់របស់ពួកព្រាហ្មណ៍ ។ នៅខាងក្រោយនៃក្បួនហែមានស្រី ៗ និងកូនក្មេង តែគេសង្កេតឃើញមានមន្ត្រីដែលតែងមានមាឌខ្ពស់ជាងអ្នកឯទៀត ឈរនៅលើដំរីមួយរូបហើយឱនក្បាលគោរពទៅកាន់ទ្វារដែលត្រូវគោរព ។

## រោងទងខាងជើង ពាក់កណ្តាលខាងលិច

នៅតាមជញ្ជាំងដែលមានឆ្លាក់នៅផ្នែកក្រោម នៅចំណែកខ្លះទៀតមានគូររាងដូច ៗ គ្នា ។ នៅផ្ទាំងចម្លាក់ទី ១ មានរូបចម្លាក់ពួកអត្តពលករ អ្នកលេងប៉ាហ៊ុ អ្នកលោតហក់ អ្នកប្រណាំងសេះ ។ នៅខាងលើទៀតនៅក្នុងព្រះរាជវាំងមានក្បួនសត្វគ្រប់បែប ដែលបង្ហាញនូវសត្វផ្សេងៗដែលរស់នៅប្រទេសខ្មែរក្នុងសម័យនោះ ។ នៅចុងម្ខាងទៀតរាំងឥសីអន្ទុយ ការនាំផឹមទៅក្នុងព្រៃ បើយោងទៅតាមគាត់ក្សឹងដែល

ស្អកជាងនាគៈគាន់បន្ថែមលើការកសាងទៀយ ព្រោះហេតុនោះ បានជាប្រាសាទនេះពុំមានសម្រស់ដូចប្រាសាទដទៃឯទៀត ។

តេះបើយ៉ាងណាក៏ដោយ ក៏ប្រាសាទនេះនៅតែមានទំនង និងគុណភាពយ៉ាងប្រសើរនៅផ្នែក ខ្លះដែលមានការសំអិតសំ-អាងគួរជាទីពេញចិត្តដែរ ។ ដោយសារការសិក្សាយ៉ាងល្អិតល្អន់ អំពីសំណាក់លោកស្រី គូក៉ល់ជីរេមុយសាត៍ , លោក ហ្គោឡូប៊ែវ និង លោក សឺដែស ដែលពិនិត្យប្រាសាទនេះក្នុងទស្សនៈផ្សេងៗគ្នា គេអាចសន្និដ្ឋានបានថាប្រាសាទនេះសាងនៅចន្លោះពេលដែលសាងផ្នែកមួយ នៃប្រាសាទបន្ទាយ
(១៧ ស្រី និង គោបុរៈ នៃព្រះលានគង្គរធំ គឺកសាងឡើងនៅក្នុងចន្លោះចុងសតវត្សទី ១០ និងដើមសតវត្សទី ១១ ។

អក្សរសិលាចារឹក ដែលនៅនឹងជើងសសរគោបុរៈខាងកើត មានចំនួន ១០០៧ តួ ដែលដំណាលអំពីដំណោយនៃការកសាងប្រាសាទនេះ តែពុំបានប្រាប់អំពីគ្រឹះដែលជាមូលដ្ឋានទេ គេបានពារភ្ជាប់នឹងផ្ទាំងសន្លឹកសីមាមួយ ដែលគេបាន

គេឃើញនៅក្នុងបណ្ណាល័យខាងត្បូង ផ្ទាំងសិលានេះមាន អធិប្បាយពីការតាក់តែងខ្លួនទៅ ក្នុងរជ្ជកាលនៃព្រះបាទសុរិ-យាវរ្ម័នទី ១ ប៉ុន្តែតែបានធ្វើនិទ្ទេសពីការកសាង ក្នុងឆ្នាំ ៨៩៣ ដោយព្រះបាទយសោវរ្ម័នយ៉ាងណាក៏ដោយ ក៏លោក សឺដែស បានយោបល់យល់ថា ប្រាសាទតាកែវនេះ ចាប់ផ្តើមកសាងឡើងដោយព្រះបាទជ័យវរ្ម័នទី ៥ ហើយកសាងបន្ថែមដោយព្រះបាទសុរិយាវរ្ម័នទី ១ គឺជាភ្នំមាសឈ្មោះ " ហិមាសិរី " តំណាងភ្នំព្រះសុមេរុ ជាប្រាសាទសំណាក់ការមួយរបស់ព្រះយមរាជ ជាគុហាគារជាន់ខ្ពស់ ៗ

ប្រាសាទនេះមានកំពូលជាសាជីហើយមានថ្នាក់ ៥ ដែល មានកំពស់រួមទាំងអស់ ២២ ម៉ែត្រ ក្នុងប្រាសាទដែលមានថ្នាក់ពីរនៅពីក្រោម មានផ្លូវព័ទ្ធជុំវិញ ដែលថ្នាក់ក្រោមបំផុតមានធ្វើជាកំពែងជញ្ជាំងព័ទ្ធជុំវិញ ថ្នាក់បន្ទាប់មួយទៀតមានថែវព័ទ្ធជុំវិញ ដែលមានគ្រឿងគាំទ្រ កើតឡើងដោយស្នាដៃមនុស្សពិត ៗ ដែលសាងឡើងស្ថិតនៅក្នុងផ្ទៃនៃប្រជុំតែមួយ

ស្របនឹងកិនភាគនៃប្រាសាទ ជាកន្លែងមានសភាពបង្អៀតចង្អល់ ហើយមិនជាកន្លែងដែលធ្វើឡើងដើម្បីព្យាបាលជម្ងឺជាបណ្តោះអាសន្ន នេះជាហេតុនាំឲ្យមានការចាប់អារម្មណ៍យ៉ាងក្រៃលែង ។

ប្រាសាទនេះសាងពីថ្មភក់ដូចប្រាសាទនានាដែរ តាមសភាពធម្មតា ការកសាងឡើងដើម្បីឧទ្ទិសផលដល់មនុស្សណាដែលមានឫទ្ធិបារមីដូចព្រះអាទិទេព ។ បើតាមការពិចារណាសព្វគ្រប់ទៅ ឃើញថាការកសាងនោះមានការសំអិតសំអាងល្អិតល្អន់ជាទីបំផុត ប៉ុន្តែពុំមានការរចនាជាក្បាច់យ៉ាងណាក៏ដោយ ការតុបតែងនៅតែមានសភាពល្អជាធម្មតា ។



ប្រាសាទតាកែវ

មើលពីមុខខាងកើត

# ប្រាសាទតាព្រហ្ម

សាងពីពាក់កណ្ដាលសតវត្សទី១២ ដល់ចុងសតវត្សទី១៣ "១១៨៦" ដោយព្រះបាទជ័យវរ្ម័នទី ៧ បញ្ចាមរណៈព្រះនាមមហាសំគត បត: ឧទ្ទិសចំពោះព្រះពុទ្ធសាសនា ។ ក្រសួងអភិរក្សអង្គរ ចាប់ផ្ដើមថែរក្សាពី គ.ស. ១៩២០ រហូតមកដល់សព្វថ្ងៃនេះ ។

ការធ្វើដំណើរចូលទៅទស្សនាប្រាសាទនេះ ត្រូវចូលបានតាមផ្លូវពីរគឺ បើចូលពីទ្វារទិសខាងលិចត្រូវឲ្យយានជំនិះរ៉ឺម៉ក ឬ រថយន្ដទៅឈប់ចាំនៅទ្វារទិសខាងកើត បើចូលពីទ្វារទិសខាងកើត ត្រូវឲ្យយានជំនិះទៅឈប់ចាំនៅទ្វារទិសខាងលិចវិញ ។ ពីទ្វារខាងកើតទៅទ្វារខាងលិចនៃប្រាសាទតាព្រហ្មមានចម្ងាយផ្លូវ ១ គីឡូម៉ែត្រ ។

តាមធម្មតាទូទៅ លោក គាល់ឌូហ៊ុចឡ បានមានប្រសាសន៍ថា : លោកអ្នកត្រូវតែថែរក្សាធម្មជាតិទាំងនេះឲ្យស្ថិតនៅក្នុងសភាពថ្មីថាជានិច្ច ព្រោះធម្មជាតិទាំងនេះត្រូវប្រោះ

ព្រំដោយទឹកភ្លៀងនិងកំដៅព្រះអាទិត្យ ។

ទោះបីធម្មជាតិទាំងនេះ ពុំមានការហត់នឿយយ៉ាងណាក៏ដោយ ប៉ុន្តែមានការវិនាសខូចខាតអស់ជាច្រើន ដោយហេតុនេះហើយ បានជាសាលាបាកាំងវែសស្ដែកប៉ុងប៉ូញ៉ាបានប្រៀបធៀបនូវការលូតលាស់ចំរើនយ៉ាងសំខាន់ ក្នុងករណីយដែលគេបានជួសជុលឡើងវិញខ្លះ ដើម្បីនឹងរក្សានូវសភាពបុរាណឲ្យបានគង់វង្សដដែល ហើយជាប្រាសាទប្រកបដោយព្រៃឈើដ៏ច្រើនដុះស្រោងស្រឹង ។ បើនិយាយឲ្យស្របទៅតាមភស្តុតាងដែលគេបានសំគាល់ ឃើញនូវក្បាច់រចនាខ្មែរហាក់រស់រើក ។

គួឲ្យមានសេចក្ដីសោកស្ដាយយ៉ាងខ្លាំង ចំពោះបដិមរូបដែលគួឲ្យអស់សរសើរមិនបាន ព្រោះវត្ថុនិមួយ ៗ មានបច្ច័យទាក់ទងទៅនឹងចិត្តជាស្មាតរ ហាក់ដូចជាទីនេះធ្វើឲ្យនឹកឃើញនូវគុណជាតិដែលជាហេតុនាំឲ្យដឹងខុសត្រូវ ។

ការត្រួសត្រាយឲ្យបានស្រួលខ្លះ ដើម្បីឲ្យស្រួលដល់ការ

ទស្សនានូវបុប្ផាណាវត្តដែលបាក់ទ្រុឌទ្រោម ហើយមានលតាវល្លិ តូចធំដុះគ្របពីលើ ព្រមទាំងឫសឈើធំ ៗ ដែលរុំព័ទ្ធពីទ្រង់ទ្រាយនៃនិម្មាបនកម្ម នាំឲ្យបាត់លំអនៃប្រាសាទ ៗ យើងសូមឲ្យមានការត្រេះរិះពីអ្នកទេសចរ នូវការពិនិត្យពិច័យយ៉ាងយូរចំពោះបន្ទះនៃប្រាសាទនេះឲ្យបានសព្វគ្រប់ លោកអ្នកនឹងមានការរញ្ជួលចិត្តយ៉ាងខ្លាំងចំពោះការទ្រុឌទ្រោមចុះនៃប្រាសាទទាំងស្រុង ៗ

ការទស្សនាប្រាសាទតាព្រហ្មត្រូវចូលតាមទ្វារពីរគឺ ទ្វារខាងកើតនិងទ្វារខាងលិច ព្រោះទ្វារទាំងពីរនេះមានការទាក់ទងគ្នាដូចបង្ហាញនៅផែនទី ស្រាប់ ការធ្វើដំណើរត្រូវប្រុងប្រយ័តបន្តិច ព្រោះច្រើនវង្វេងផ្លូវ ៗ បើតាមការពិតទ្វារទាំងពីរនេះស្ថិតនៅម្ខាងម្នាក់ទាក់ទងគ្នាដោយសារបន្ទប់តូច ៗ ដែលនៅហែគ្នា ពុំចេះអស់ពុំចេះហើយពាសពេញរកយល់មិនបាន ព្រោះបន្ទាយទាំងនេះ ប្រទាក់ប្រទិសគ្នាដោយផែនសិលាធំ ៗ ដែលរលំធ្លាក់ ប៉ុន្តែនៅតែមានគុណភាពយ៉ាងប្រសើរតាមការ

ប្រមូលផ្តុំនៃវត្ថុធាតុពិត ៗ ។

ប្រាសាទតាព្រហ្ម គឺជាព្រះវិហារសម្រាប់ព្រះពុទ្ធសាសនា ដែលមានទម្រង់ជាជាន់ ៗ ក្នុងចំណោមប្រាសាទទាំងឡាយ ដែលកសាងឡើងជាថ្នាក់ ៗ ព្រោះមានផ្ទៃបន្ទប់កប ៗ ឯរបៀបកសាងមានទម្រង់ផ្ដេកផ្ដួល ទៅតាមការតាំងបេញនៃថែវជាយ៉ ៗ នឹងគូវិហារធំ ដែលស្ថិតនៅលើការប្រជុំនៃគោលសំខាន់ ៗ ដែលទាក់ទងគ្នាមានទម្រង់ស្របទៅនឹងថែវ ដែលមានជាស្ទួល " ប្រក " នៅត ៗ គ្នាដោយបន្ទាយនិងផ្លូវ ៗ ឯចំណែកស័ក្យខាងកើតនិងខាងលិច មានផ្លូវចូលរហូតទៅដល់ក្នុងប្រាសាទ ។ យើងមានមនោសញ្ចេតនារន្ធត់ញាប់ញ័រចំពោះផ្ទាំងសិលាដែលបាក់បែកនៅក្នុងប្រាសាទទាំងនេះ ដែលសាងបន្តុប ៗ លើគ្នាលយចេញក្រៅ បើតាមការពិនិត្យឲ្យច្បាស់ ទៅគេច្រើនឃើញមាននៅក្នុងប្រាសាទបែកខាងកើត ។

កំពែងបរិវេណពីរដែលនៅត ៗ គ្នា មានសភាពជាជញ្ជាំងជម្ចូតា កំពែងខាងក្រៅមានបណ្តោយ ១.០០០ ម៉ែត្រ ទទឹង

៦០០ ម៉ែត្រ ព័ទ្ធជុំវិញតួប្រាសាទតាំងមូល គេពុំមានការនឿង ងល់ពីផញ្ញាំងតាំងនេះទេ ព្រោះជាផញ្ញាំងដែលសង់ឡើងប្រកប ដោយថែវ ៣ យ៉ាងសំខាន់ ៗ ហើយដែលស្ថិតនៅជិត ៗ គ្នា ក្នុងផ្ទៃដីកន្លែង ៤ ជ្រុងស្មើ ដែលមានប្រវែងមួយជ្រុង ១ ចំនួន ១០០ ម៉ែត្រ គប់បាក់នៅក្នុងប្រកពនៃប្រាសាទដែលមាន ផ្ទៃដី ៦០ ហិកតា ។ សិលាចារឹកនៅប្រាសាទនេះបានបញ្ជាក់ ប្រាប់ថា មានមនុស្សចំនួន ១២.៦៤០ នាក់ ស្ថិតនៅក្នុងនាទី ប្រាសាទ គឺមានព្រះសង្ឃធំ ១ ចំនួន ១៨ អង្គ មានមន្ត្រីជាន់ ខ្ពស់ ២.៧៤០ នាក់ ទាហាន ២ ២៣២ នាក់ ហើយនៅក្នុង ចំណោមពួកតាំងនេះមានស្រីរបាំចំនួន ៦១៥ នាក់ ។ល។

ទុកជាគេបានដឹងនូវកំណត់ពេលកសាងចំនួន ២០ឆ្នាំ ក្នុង រាជ្យព្រះបាទជ័យវរ្ម័នទី ៧ យ៉ាងណាក៏ដោយ ក៏ការកសាង ប្រាសាទតាំងឡាយនេះ នៅតែមានទ្រង់ទ្រាយប្រហែលគ្នានឹង ប្រាសាទបាយ័នដែរ តែសព្វថ្ងៃនេះគេរកឃើញគ្រឿងសម្ភារៈ ដែលនៅសល់ក្នុងបន្ទោះពេលយ៉ាងខ្លី ដោយបានសាងបន្ថែម

នឹងពង្រីកឲ្យមានសភាពថ្លៃក ៗ ព្រមទាំងបំពេញសព្វគ្រប់ពុំឲ្យមានខ្វះត្រង់កន្លែងដែលត្រូវទាក់ទងដល់លទ្ធិសាសនា ដែលគេបានសាងបញ្ចូល នូវគ្រឿងអាភរណៈនៃអគ្គណាមួយឲ្យកើតមានឡើង ។ ប្រាសាទតាព្រហ្មនេះមានសភាពស្មុគស្មាញយ៉ាងខ្លាំងតាមការពិនិត្យរបស់លោក ក្រូលីយេ ព្រោះជាប្រាសាទ ដែលសាងដោយមានសំណង់លយពេញជាយ៉ ៗ ហើយដែលមានជាស្នាមរៀបចំត ៗ គ្នា ដែលនៅតាមកន្លែងខ្លះមាន ទ្រង់ទ្រាយប្រហាក់ប្រហែលគ្នានឹងប្រាសាទអង្គរវត្តឬបាយ័ន ។ ដោយសារការបង់ជីននូវជុំវៀនៃការត្រួសត្រាយ ដែលបានតាត់ចែងបញ្ចូលគ្រឿងសម្ភារៈខ្លះ ដើម្បីឲ្យមានការពិតប្រាកដឡើង គេបានទុកប្រាសាទតាព្រហ្មនេះឲ្យនៅមានភាពដដែល ដើម្បីជាភស្តុតាង ។

សន្ទឹកសីមានៅប្រាសាទតាព្រហ្មនេះ មានចារឹកនៅគ្រប់ជ្រុងទាំង ៤ ដែលគេបានរកឃើញនៅក្នុងថែវជិតគោបុរៈកំពែងទី ២ ដែលមានចុះពីកំណត់កាលពី គ.ស. ១១៨៦ គឺក្រោយ

ពេលដែលព្រះបាទជ័យវរ្ម័នទី ៧ ទ្រង់ឡើងសោយរាជ្យ ។ ដោយមានការពាក់ព័ន្ធ នឹងការសាងរូបព្រះមាតារបស់ព្រះអង្គ ដែលសាងឡើងជា "ប្រាជ្ញាបារមីតា" ជាតួ "សុក្រឹតភាពនៃគតិបណ្ឌិត" ដែលចូលចិត្តខាងការដោះប្រស្នាសមតាមកិរិយានៃអ្នកប្រាជ្ញ ហើយដែលទុកដូចព្រះមាតានៃព្រះពុទ្ធទាំងឡាយ គេគាបពាក់ដាក់ប្រាសាទនេះទៅក្នុងចំណោមប្រាសាទជាទីគោរពទាំងឡាយ ឧទ្ទិសចំពោះបុព្វានភាពនៃព្រះញាតិវង្ស ដែលទុកដូចជាទេវៈ ។ ក្រោយពីបានរៀបរាប់នូវព្រះនាមនៃព្រះអយ្យកោ ព្រះអយ្យិកា ព្រមទាំងជោគជ័យ ក្នុងចម្បាំងជាមួយប្រទេសចំប៉ា សិលាចារឹកនេះ

209 បានកត់សម្គាល់ថា ព្រះបាទជ័យវរ្ម័នទី ៧ បានតាក់តែងឲ្យសាងរូបទេវៈចំនួន ២៦០ ព្រមទាំងរូបព្រះគ្រូនៃព្រះអង្គ, ប្រាសាទមានស្តូបខ្នាយ ៣៩ ធ្វើពីថ្មកក់ខ្ពស់ៗ, លំនៅ ៥៦៦ ធ្វើពីថ្ម និង ២៨៦ ធ្វើអំពីឥដ្ឋ ព្រមទាំងមានជញ្ជាំងកំពែងប្រវែង ២៧០២ ព្យាមធ្វើពីថ្មបាយក្រៀម ។

មានភូមិ ៣១៤០ ហើយមានប្រជាជន ៧៩.៣៦៥ នាក់ ជាអ្នកថែរក្សាប្រាសាទ តាមសេចក្ដីយ៉ាងពិស្ដារនៃអត្ថបទនេះ ដែលអធិប្បាយបញ្ជាក់យ៉ាងក្បោះក្បាយ នូវបែបបទផ្សេងៗ ។ គេបានរៀបរាប់ ជាពិសេសនូវនានាគោជកណ្ដឹងអំពីមាស ទម្ងន់ ៥ តោន ព្រះវៃទនក្ខិតសូត្រ ៥១៦ និងខ្ពស់ ៥២៣ ហើយក្រោយពីកដបញ្ញត្តិ ដែលតែងតាំងឡើងសម្រាប់ពិធីបុណ្យផ្សេងៗ ទ្រង់បានបញ្ជាឲ្យសាងមន្ទីរព្យាបាលរោគចំនួន ១០២ ទៀត ។



211



ប្រាសាទតាព្រហ្ម

មើលបំពីខាងកើតនៃខ្លោងទ្វារទី ២

# ប្រាសាទបន្ទាយក្តី

សាងក្នុងពាក់កណ្ដាលសតវត្សទី ១២ ដល់ចុងសតវត្សទី ១៣ ដោយព្រះបាទជ័យវរ្ម័នទី ៧ បច្ឆាមរណៈ ព្រះនាមមហាបរមសុគតបទៈ ឧទ្ទិសចំពោះព្រះពុទ្ធសាសនា ។ ក្រសួងអភិរក្សអង្គរ បានថែរក្សាពី គ.ស. ១៩២០ រហូតដល់សព្វថ្ងៃនេះ ។

លក្ខណៈសំខាន់ ៖

ប្រាសាទនេះមានលក្ខណៈដូចប្រាសាទតាព្រហ្មដែរ ការដើរចំណោតកាត់ប្រាសាទនេះពីម្ខាងទៅម្ខាងបាន ដោយឈប់យានជំនិះទុកឱ្យនឹងដើរកាត់ធ្លុះ ។

បើចេញពីប្រាសាទតាព្រហ្មហើយ ដើរចំណោតទៅកាត់ប្រាសាទបន្ទាយក្តី ដោយដើរកាត់តាមផ្លូវដ៏តូចដែលមានចម្ងាយ ៤០០ ម៉ែត្រ គេនឹងបានទៅដល់ក្លោងទ្វារខាងលិចនៃប្រាសាទ ។

ប្រាសាទនេះជាឧទាហរណ៍មួយច្បាស់ នៃគំនិតប្រឌិតប្រមាណ

ក្នុងការរៀបចំ ។ ប្រាសាទបន្ទាយក្តីមានទំហំតូចជាង ប្រាសាទតាព្រហ្មនិងប្រាសាទព្រះខាន់ ដែលសាងបំពេញ ដោយស្នាព្រះហស្តព្រះបាទជ័យវរ្ម័នទី ៧ ។ ប្រាសាទ បន្ទាយក្តីនេះ សាងនៅជិតគ្នា នៅក្នុងកំពែងពិសេសដែល មានបណ្តោយ ៦៣ ម៉ែត្រ ទទឹង ៥០ ម៉ែត្រ ហើយដែល មានកំពែងខាងក្រៅបណ្តោយ ៧០០ ម៉ែត្រ និង ៥០០ ម៉ែត្រ ទទឹង ។

តាមស្នាកស្នាមខ្លះ ដែលគេបានឃើញនៅប្រាសាទនេះ ប្រហែលជាសាងពីរដងខុសគ្នា ហើយមានលំនាំដូចប្រាសាទ អង្គរវត្តនិងប្រាសាទបាយ័ន ដែលមានក្បាច់ចម្លាក់ខ្លះស្ថិតនៅ កំបាំងនឹងក្បាច់ក្បាំងយ៉ាងច្រើន តាមកន្លែងខ្លះនៃការកសាង បន្ថែម ដើម្បីឲ្យដឹងច្បាស់ឡើងទៀត ហើយមានទ្រង់ទ្រាយ ដូចជាខូចខាតវត្តុមួយក្រោយពេលដែលកសាង ដោយមាន គោលសំខាន់ៗនៃថែវនិងរបៀងមុខ ដែលបង្កើតបានជារូបមន្ត នៃសាកមោទ្យាន ។

វិចិត្ររូបដែលមានសភាពប្លែកពីសភាពដើមនោះ គឺយកពីរផ្ទាស់បុកណាដែលមានសភាពស្មើ ហើយជាតួព្រះវិហារសម្រាប់ព្រះពុទ្ធសាសនា ដោយមានថែវពីរពាក់ទងគ្នាតាមស្ទីលតែមួយ " ប្រេក " ដែលបញ្ជាក់ឲ្យដឹងនូវសភាពសម្បូណ៌ដោយបន្ទាយយ៉ាងពិត ៗ បន្ទាយតាំងនេះ ស្ថិតនៅពាក់ទងនឹងទីធ្លាមួយដែលមានជំបូលជាកាកបាទ នៅខាងកើតមានកំពែងពីរសង់នៅត ៗ គ្នា ។

ឯសភាពដែលខូចខាតនោះ មានមកជាយូរអង្វែងណាស់ហើយ គឺច្រើនមានផ្ទាំងថ្ម ៗ រមៀលធ្លាក់ ដោយមកពីការរៀបចំពុំបានល្អ ហើយជាហេតុនាំឲ្យបាក់ខូចខាត ព្រោះថ្មភក់ដែលយកមកកសាងនោះ ច្រើនតែថ្មស្រួយ បណ្តាលឲ្យមានការរបើករបាញ់អស់ជាច្រើន ។ ប្រាសាទបន្ទាយក្តី ដែលបាក់ខូចជាដុះគោរទៀនប្រកបដោយសម្រស់យ៉ាងល្អកើត មិនចាញ់សម្រស់នៃប្រាសាទឯទៀតឡើយ ព្រោះប្រាសាទនេះបង្ហាញឲ្យឃើញនូវផ្ទុកធំ ៗ ដែលរលំធ្លាក់ មិន

អាចនឹងរៀបចំឲ្យបានស្រួលបួលវិញឡើយ    គេពុំអាចរកការពិតនូវការប្រើប្រាស់ដែលបានបំរុងទុកជាមុន    ក្នុងការកសាងប្រាសាទនេះទេ    ។    សិលាចារឹកដែលគេរកឃើញនៅគោពុរៈខាងលិចនៃកំពែងទីពីរ    បានបង្ហាញនូវថ្មចាស់ដែលគេយកមកប្រើម្ដងទៀត ថ្មនេះមានចំណាស់តាំងពីរជ្ជកាលព្រះបាទរាជេន្ទ្រវរ្ម័ន ក្នុងសតវត្សទី ១០ ។ សិលាចារឹកនេះបានបង្ហាញឲ្យដឹងទៀតថា    ប្រាសាទបន្ទាយក្ដីនេះសាងនៅជិតប្រាសាទគុយទីស្វរៈ ហើយព្រមតាំងសំបូងសង្រ្គែងដល់ព្រះឥស្វរ ម្យ៉ាងទៀតសិលាចារឹកនេះ បានរៀបរាប់អំពីការកសាងរូបសំណាកពីរ គឺរូបព្រះព្រហ្មមួយ រូបព្រះនារាយណ៍មួយ ។

ឯក្បាច់ក្បាំង ហើយនិងក្បាច់នៅខ្លឹមទទឹងទ្វារនៃព្រះវិហារពុទ្ធសាសនាប៉ែកខាងមហាយាននេះ    សុទ្ធតែគួរជាទីជាប់ចិត្ត ហើយសំខាន់ៗទៀតផង    ។    ក្បាច់ខ្លះត្រូវខូចខាតដោយសារការបង្ហិនបំផ្លាញនៃសាសនាព្រាហ្មណ៍ ក្នុងសតវត្សទី ១៣ ព្រោះគេឃើញនៅសល់កុដមួយធ្វើពីឈើ ដែលក្រសួងអភិរក្ស

អគ្គិរបានគ្រួសព្រាយពេញ ។

# ស្រះស្រង់

សាងឡើងក្នុងសតវត្សទី ១២ ដោយព្រះបាទជ័យវរ្ម័នទី ៧ "បច្ឆាបរណៈ ព្រះនាម "មហាបរមសុគតបទ" ។ ក្រសួងអភិរក្សញ្ញ: បានថែរក្សាតាំងពី គ.ស. ១៩២០ រហូតមក ដល់សព្វថ្ងៃនេះ ។

ការធ្វើដំណើរចេញពីប្រាសាទបន្ទាយក្ដីតាមទ្វារខាងកើត កាត់តាមថ្នល់ឆ្ពោះត្រង់ទៅរៀមព្រៃលេខ ១១ គេនឹងបានទៅដល់ កាំជណ្ដើរយានសិង្ហនៃកនហាល ដែលស្ថិតនៅចំពីមុខ ប្រាសាទបន្ទាយក្ដី គេនឹងឃើញផ្ទៃទឹកល្ហល្ហនៃស្រះស្រង់ ដែលមានបណ្ដោយ ៧០០ ម៉ែត្រ ទទឹង ៣០០ ម៉ែត្រ បើតាម ការស្មានមើលទៅ ប្រហែលជាស្រះនេះជីកក្នុងរជ្ជព្រះ បាទជ័យវរ្ម័នទី ៧ ព្រោះស្រះនេះស្ថិតនៅឃ្លាតពីកំពែងប្រាសាទ បន្ទាយក្ដី ។ ស្រះនេះមានកាំជណ្ដើរធ្វើពីថ្មបាយក្រៀម ហើយគឿនធ្វើពីថ្មភក់, នៅកណ្ដាលស្រះមានកោះមួយធ្វើពី

ផ្ទាំងថ្មដែលមានរាងនៅជាប្រាសាទមួយតូច ៗ

ស្រះនេះមិនដែលរីងទឹកទេ ហើយមានដើមរុក្ខជាតិធំ ៗ ដុះនៅជុំវិញ ដែលធ្វើឲ្យមានទិដ្ឋភាពយ៉ាងត្រចះត្រចង់នៅក្នុងចំណោមប្រាសាទនានានៃអង្គរ ៗ មានទីលានភ្ជាប់ទៅនឹងសំណាក់តូច ៗ ខ្លះនៃរានហាល ដែលមានជាបន្ទប់មួយជំកង ៤ ជ្រុងទ្រវែង ព្រមទាំងមានជាថែវព័ទ្ធជុំវិញផង ផ្នែកក្រោមធ្វើពីថ្មភក់ បើតាមការពិតនៃផែនទី "រានហាល" គឺមានធ្វើជាផ្លូវតូច ៗ ពីរទៀត ហើយមានកាំជណ្ដើរមួយស្ថិតនៅជាប់នឹងអ័ក្ស ដែលមានជាសង្កាត់ ៗ ចែកបានជាជណ្ដើរ ៣ នៅកណ្ដាលអ័ក្ស ដែលនៅមុខជណ្ដើរនេះមានឆ្លាក់ជារូបតោពីរ មានភាពយ៉ាងអង់អាច មានសានជាផ្នែករានហាល ដែលលៀនលយចេញ ហើយជាលំអដោយក្បាក់ដៃនាគយ៉ាងសង្ហាផង ៗ ការរចនាសឹងប្រកបដោយថ្វីដៃយ៉ាងប្រណីតបង្ហាញពីភាពសម្បូណ៌កកកុញ ដោយក្បាច់ដ៏ប្រសើរផ្សេង ៗ នៅពីខាងមុខរានហាលមានរូបគ្រុឌមួយយ៉ាងធំប្រគង

ប្រទាក់លើរូបនាគដែលមានក្បាល ៣ ឯក្បាលឯទៀតសម្រាប់ រុំព័ទ្ធ ។ នៅពីខាងក្រោយ មាននាគក្បាល ៣ មួយទៀត ដែលមានកន្ទុយផ្ទាក់ភ្ជាប់លំអដោយក្បាលនាគតូច ៗ ដាក់ពីលើក្តោងគ្រុឌយ៉ាងច្បាស់ ៗ ។ ឯគូទ្វនាគផ្ទាក់ដាក់លើជើងសសរដែលមានផ្ទាក់ជាលំអផ្នែក ៗ ហើយដែលដាក់ភ្ជាប់ទៅនឹងគ្រឹះយ៉ាងធំ ។ រូបទាំងនេះមានសភាពល្អឥតខ្ចោះ មានទ្រង់ទ្រាយនៅសល់ខ្លះ ដែលមានសភាពដូចនៅប្រាសាទបាយ័នដែរ ។

# ប្រាសាទក្រវ៉ាន់

សាងនៅដើមសតវត្សទី ១០ "គ.ស. ៩២១" ដោយព្រះបាទ ហសវម៌នទី ១ បន្ទាប់មរណៈព្រះនាម "រុទ្រលោក" ឧទ្ទិសចំពោះព្រហ្មញ្ញសាសនា ។ ក្រសួងអភិរក្សអង្គរ បានថែរក្សាតាំងពី គ.ស. ១៩២៩ រហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទក្រវ៉ាន់នៅចំពីខាងកើតអង្គរវត្ត តាមផ្លូវវង់តូចត្រង់គីឡូម៉ែត្រលេខ ១២ និងលេខ ១៣ ដែលមានតួប្រាសាទ

៥ សន់អំពីថ្ម  តែសព្វថ្ងៃនេះត្រូវវិនាសខូចខាតអស់ជាច្រើន ។ ប្រាសាទនេះមានលំអគ្រប់កន្លែងទាំងអស់  ដែលមានលក្ខណៈពិសេសម្យ៉ាងតាមការរចនានៅអង្គរ  ដូចជាក្បាច់រចនាខ្លះធ្លាក់នៅលើថ្មខាងក្នុងតួវិហារទាំងនោះ ។

មានស្រះបោក្ខរណីព័ទ្ធជុំវិញ  ហើយមានទំនប់មួយនៅទិសពាយ័ព្យ  សម្រាប់ជាផ្លូវចូលកាន់ប្រាសាទ ។ ប្រាសាទទាំងនេះស្ថិតនៅជិត ៗ គ្នាលើទីលានដីមួយ  ដែលបែរមុខទៅទិសខាងកើត ។  ការខូចខាតនេះបានមកអស់កាលជាយូរមកហើយ  ព្រោះមានរុក្ខជាតិធំ ៗ  មានឫសចាក់រូតរឹតពីលើថ្ម  ឯការដែលវិនាសនៃផ្ដើរនៅធរណីទ្វារ  គួរឲ្យស្ដាយណាស់ ។

## ប្រាសាទប្រែរូប

សាងនៅចុងសតវត្សទី ១០ “គ.ស. ៩៦១” ដោយព្រះបាទរាជេន្ទ្រវរ្ម័ន  បច្ឆាមរណៈព្រះនាម “សិវៈលោក” ឧទ្ទិសចំពោះព្រហ្មញ្ញសាសនា  ថ្វាយចំពោះព្រះនារាយណ៍ ។

ក្រសួងអភិរក្សអង្គរ បានចាប់ផ្ដើមថែរក្សាតាំងពី គ.ស. ១៩៣០ រហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទនេះ ស្ថិតនៅចម្ងាយ ២៣០០ ម៉ែត្រ ពីផ្លូវខ្វែងវង់ធំនិងវង់តូចត្រង់ជ្រុងស្រះស្រង់ ដែលស្ថិតនៅត្រង់ផ្លូវកែងកាច់ទៅទិសខាងជើង ហើយដែលស្ថិតនៅចម្ងាយ ៥០០ ម៉ែត្រ ពីខាងត្បូងទំនប់ទិសទក្សិណនៃបារាយណ៍ទិសបូពិ គឺស្ថិតនៅត្រង់បង្គោលគីឡូម៉ែត្រលេខ ១៦ ។

ប្រាសាទប្រែរូប លាតត្រដាងឲ្យឃើញនូវទ្រង់ទ្រាយនិងវិសាលភាពយ៉ាងប្រណីត ដែលសាងឡើងដោយវត្ថុធាតុពណ៌ក្រហម គឺសាងអំពីឥដ្ឋបាយក្រៀមនិងឥដ្ឋ ។ គេបានប្រើវិធីប្រែងរៀបចំឡើងវិញ ដោយយកជ័រនិងឫសឈើឲ្យអស់ចេញ ដើម្បីកុំឲ្យរមៀលធ្លាក់ ហើយយកកំបោរនិងបាយអមកភ្ជាប់ឥដ្ឋ ដើម្បីឲ្យមានសភាពរឹងប៉ឹងដូចធម្មតា ។

ប្រាសាទនេះ សាងក្រោយប្រាសាទមេបុណ្យ ប៉ុន្តែមានសភាពដូចគ្នាបេះបិទ គឺប្រាសាទដែលសាងឡើងជា

ប្រាសាទក្ដី ព្រមទាំងមានជាថែវលេចលយចេញតាំងពីពេល

កសាងមកម្ល៉េះ ហើយមានទាំងបន្ទប់វែង ៗ សំយុងបន្តមក

ក្រោមទៀត ៗ ពួកប្រាសាទក្ដីទាំងនេះ ជាកន្លែងសម្រាប់

ព្រះរាជទេព មានកន់ជាសាជី ដូចជាមកុដកន៤ ជ្រុងញាយ

ហើយមានជាបន្ទប់ វែងៗសាងទុក្ខិបចំពោះវីរៈជន ព្រមទាំង

ការខាងក្នុងជាអក្សរ ... ចំនួន ១២ នៅតាមក្បាលជណ្ដើរ

ដើម្បីជាកន្លែងសម្រាប់ដំកល់ សិរៈលិង្គ ដូចជានៅប្រាសាទ

បាគងដែរ ។ ឯសិលាចារឹកបានអធិប្បាយប្រាប់ពីកំណត់

កាលកសាងពី គ.ស. ៩៦១ មិនប្រាប់ពីឈ្មោះប្រាសាទព្រម

ទាំង...នបញ្ជាក់ពី ព្រះកដវង្សនៃព្រះបាទរាជេន្ទ្រវរ្ម័ន ដែល

ព្រះអង្គបានសាងកិត្តិឈ្មោះ កវិន្ទ្របាត្រស្បូរ: ជាក់នៅ

ខាងត្បូង ប្រាសាទគណ្ដាប ហើយមានរូបសំណាកព្រះអង្គ

ដំកល់នៅ ទីប្រាសាទតាមជ្រុង គឺជាព្រះរូបដែលតាក់ចង់ទៅ

មិនសាសនាព្រាហ្មណ៍ ព្រោះព្រះអង្គជាអ្នកទ្រទ្រង់និងគោរព

ព្រះឥស្សរ ឯព្រះមាតុបាទិនព្រះអនុជរបស់ព្រះអង្គទ្រង់គោរព

ព្រះនាងកុមារីគេវតី ដែលជាមហេសីនៃព្រះឥស្សរ ព្រះបាទមហេសិវវ័ន្មទ្រង់គោរពព្រះនាកយណ៍ ។

សិលាចារឹកនេះ បានបញ្ជាក់ឲ្យដឹងពីការនៅរួបរួមសាមគ្គីរវាងព្រះពុទ្ធសាសនានិងព្រាហ្មណ៍សាសនា ក្នុងពេលដែលព្រះអង្គទ្រង់មានព្រះជន្មនៅឡើយ ។

នៅស្រុកឯនីងអ័ក្សនៃប្រាសាទមេបុណ្យខាងកើត មានទឹកលមួយប្រកបដោយផលិតផលយ៉ាងប្រសើរ ដោយការបង្ហូរទឹកពីបារាយណ៍ទិសខាងកើតមកប្រើប្រាស់ ។ បើតាមយោបល់លោក ហ្វីលិពស្ទូន ថាទំនេះ ជាកន្លែងដែលលូតលាស់ក្រោយពេលដែលលើកទឹកក្រុងពីកោះកេរ្តិ៍មក ព្រោះទីក្រុងនេះបានត្រូវបោះបង់ចោល ក្រោយពីពេលដែលបានរីកចម្រើនពី គ.ស. ៩២១ រហូតមកដល់ គ.ស.៩៤៤ ។ ព្រះបាទរាជេន្ទ្រវរ្ម័ន ដែលក្នុងបានបោះបង់រាជធានីនេះដើម្បីមកកាន់អង្គរវិញ

សម័យនោះហៅថា យសោធរបុរៈ ។

គេពុំបានដឹងថាតើមកពីហេតុអ្វីទេ បានជាជនជាតិកម្ពុជាហាក់បែរសាងប្រាសាទនេះឡើង ឲ្យមានទ្រង់ទ្រាយដូចជាកន្លែងបញ្ចុះសព ដែលមានឈ្មោះថា ប្រែរូប ដែលជាកន្លែងធ្វើឡើងតាមប្រពៃណីនៃឈាបនកិច្ច ដូចមានការគូសវាសព្រាងជាដំបូង នូវកងគំនូររូបអសុភយ៉ាងច្បូរហែរគ្នាតាមការផ្គត់ផ្គង់យ៉ាងវៃក ១ ពីគ្នា ដូច្នេះ ៗ គេឃើញមានជើងមួយស្ថិតនៅក្រោមជើងជណ្ដើរខាងកើត នៃតួប្រាសាទពងសាជីដែលគួរឲ្យគ្រឡេកក្នុកមើលនូវពិធីបុណ្យ តាមចំណងជើងរូបគំនូរដែលរមៀលធ្លាក់មកពីក្រប ដែលសាងសម្រាប់ពិធីថ្វាយព្រះភ្លើងស្ដេចតំលង់ដែលទ្រង់សុគតនៅលើក្ដួលែន ។

បើតាមថ្មីដៃនៃនិម្មាបនកម្ម ប្រាសាទនេះមានកំពែងពីរជាន់ប្រកបដោយគោបុរៈ ៤ ហើយនិងមានជាតួប្រាសាទពងសាជីដែលមានជណ្ដើរតូច ១ សម្រាប់ទល់ទ្រតួប្រាសាទបន្ទាយទាំង ៤ នោះ ៗ ផ្នែកខាងកើតនៃកំពែងខាងក្រៅមាន



ប្រាសាទប្រែរូប

មើលបំពីខាងកើត

ទ្រង់ទ្រាយសមតាមការនិយម ដោយមានសាងជាប្រាង្គ
ប្រាសាទពីរក្រុមស្ថិតនៅ ៣ ថ្នាក់ តាមរបៀបយ៉ាងសមទៅ
តាមអ័ក្សនៅលើខឿនគ្រឹះធំតែមួយ ៗ គូប្រាង្គទីមួយដែលនៅ
ខាងដើមផ្លូវចូល ពុំបានសាងនៅលើមូលដ្ឋាននៃខឿនដែល
បានប្រុងប្រៀបជាស្រេចនោះទេ ឬមួយក៏គេយកឥដ្ឋប្រាង្គនេះ
ទៅប្រើជួសជុលកន្លែងដទៃទៀត ដោយប្រាង្គនោះទ្រុឌទ្រោម
ពេក ៗ នៅលើខឿនគ្រឹះកណ្ដាល មានប្រាង្គមួយធំជាងគេ
ដែលមានសភាពគ្រប់សង្កត់ នៅលើប្រាសាទឯទៀត ៗ
ប្រាសាទនិមួយ ៗ មានប្រវែង ៥ ម៉ែត្រ ក្នុងមួយជ្រុង ៗ
ព្រមទាំងមានសាងជាថ្នាក់ៗ តូចៗ នៅផ្នែកដំបូល ៗ នៅតាម
ជ្រុង មានការខូចខាតអស់ជាច្រើនតាមកន្លែងខ្លះ ដែលខ្ពស់
ហើយមានផ្ទាំងថ្មរមៀលធ្លាក់ ហើយមិននៅតាមកងប្រាសាទ
ដែលលៀនលយចេញក្រៅ ដែលមានស្នាមក្រហែងឥដ្ឋ ៗ
ឥដ្ឋនិមួយៗ មានទំហំ ៣០×១៦×៨,៥ ដែលរៀបផ្គុំភ្ជាប់គ្នា
បានដោយមិនបាច់ប្រើបាយអ គឺយកជ័រឈើមកភ្ជាប់ផ្ទួនវិញៗ

# ប្រាសាទមេបុណ្យទិសបូព៌

សាងនៅពាក់កណ្ដាលសតវត្សទី ១០ "គ.ស. ៩៥២" ដោយព្រះបាទរាជេន្ទ្រវរ្ម័ន "បច្ឆាមរណៈ ព្រះនាមសិវលោក" ។ ការថែរក្សាដោយក្រសួងអភិរក្សអង្គរ ពី គ.ស. ១៩៣៥ រហូតដល់សព្វថ្ងៃនេះ ។

នៅខាងជើងប្រាសាទប្រែរូបចម្ងាយ ៥០០ ម៉ែត្រ គេនឹងទៅដល់បារាយណ៍ទិសបូព៌ ដែលស្ថិតនៅត្រង់បង្គោលគីឡូម៉ែត្រលេខ ១៦ បារាយណ៍នេះមានទទឹង ២ គីឡូម៉ែត្រ បណ្ដោយ ៧ គីឡូម៉ែត្រ ហើយមានជំនួលខ្ពស់ព័ទ្ធជុំវិញប្រកបដោយសទ្ទឹកសិលាដាក់នៅតាមមុមនីមួយ ៗ ទីនេះលោក ជីវ-តា ក្វាន់ បានឲ្យឈ្មោះថាបឹងធំ ដែលឈ្មោះដើមហៅថា យសោធរតដាក: ដែលបានជីកក្នុងរជ្ជកាលព្រះបាទយសោវរ្ម័ន ក្នុងចុងសតវត្សទី ១០ ។

ក្នុងទឹកបារាយណ៍នេះ ជាកន្លែងសម្រាប់បញ្ចូលបញ្ចេញទឹក

ស៊ីនសៀមរាប ហើយព្រមទាំងជាកន្លែងសម្រាប់បង្ហូរទឹកទៅដាក់តាមទីវាលទំនាប ដែលសព្វថ្ងៃនេះបានក្លាយទៅជាវាលស្រែអស់ទៅហើយ ។ កាលដំណាន់ដើមបារាយណ៍នេះមានជម្រៅ ៣ ម៉ែត្រ ដោយមានកស្តុតានជាសំគាន់គឺកាំជណ្ដើរធ្វើពីថ្មបាយក្រៀម ដាក់នៅនឹងទីទួលនៃប្រាសាទមេបុណ្យ បំណុះទឹកដែលមាននៅក្នុងបឹងនេះមាន ៤០ លានម៉ែត្រគុប ។ ដោយហេតុមកពីមានដីខ្សាច់ និងដីល្បប់ហូរមកចាក់បំពេញដូច្នេះហើយបានជាមានកន្លែងខ្លះ ត្រូវរេះគោកអស់គ្មានសល់ទឹកឡើយ ។

១៦ 7 ហេតុនេះហើយ បានជានៅកណ្ដាលនេះឃើញមានជាកោះតូចមួយរាង ៤ ជ្រុងស្មើ ក្នុងមួយជ្រុង ។ ប្រវែង ១២០ ម៉ែត្រ ។ នៅលើកោះនេះ គេបានសាងប្រាសាទមេបុណ្យទិសបូព៌ ស្របទិនស័ក្យនៃគុហារជាទ្វារចូលទៅព្រះរាជវាំងអង្គរធំនិងក្លោងទ្វារជ័យ ។ ប្រាសាទនេះមានស្ថានភាពជាប្រាសាទភ្នំ ដែលជានិមិត្តរូបនៃភ្នំព្រះសុមេរុ

# ប្រាសាទមេបុណ្យទិសបូព៌

សាងនៅពាក់កណ្ដាលសតវត្សទី ១០ "គ.ស. ៩៥២"
ដោយព្រះបាទរាជេន្ទ្រវរ្ម័ន "បញ្ចាមរណៈ ព្រះនាមសិវលោក" ។
ការថែរក្សាដោយក្រសួងអគ្គរក្សអន្ដរ ពី គ.ស. ១៩៣៥ រហូត
ដល់សព្វថ្ងៃនេះ ។

នៅខាងជើងប្រាសាទប្រែរូបចម្ងាយ ៥០០ ម៉ែត្រ គេនឹង
ទៅដល់បារាយណ៍ទិសបូព៌ ដែលស្ថិតនៅត្រង់បណ្ដោយគីឡូ
ម៉ែត្រលេខ ១៦ បារាយណ៍នេះមានទទឹង ២ គីឡូម៉ែត្រ
បណ្ដោយ ៧ គីឡូម៉ែត្រ ហើយមានដីទួលខ្ពស់ព័ទ្ធជុំវិញប្រកប
ដោយសទ្ទឹកសីមាដាក់នៅតាមមុមធំ ៗ ទឹកនេះលោក ជីវ.
តា ក្វាន់ បានឲ្យឈ្មោះថាបឹងធំ ដែលឈ្មោះដើមហៅថា
យសោធរតដាក: ដែលបានជីកក្នុងរជ្ជកាលព្រះបាទយសោវរ្ម័ន
ក្នុងចុងសតវត្សទី ១០ ។

ត្រពាំងទឹកធំនេះ ជាកន្លែងសម្រាប់បញ្ចូលបញ្ចេញទឹក

ស៊ីនសៀមរាប ហើយព្រមទាំងដាក់ខ្នងសម្រាប់បង្ហូរទឹកទៅដាក់តាមទីវាលទំនាប ដែលសព្វថ្ងៃនេះបានក្លាយទៅជាវាលស្រែអស់ទៅហើយ ។ កាលជំនាន់ដើមបារាយណ៍នេះមានជម្រៅ ៣ ម៉ែត្រ ដោយមានកស្តុតានជាសំណង់តកាំជណ្ដើរធ្វើពីថ្មបាយក្រៀម ដាក់នៅជិតទំនួលនៃប្រាសាទមេបុណ្យ បំណុះទឹកដែលមាននៅក្នុងបឹងនេះមាន ៤០ លានម៉ែត្រគុប ។ ដោយហេតុមកពីមានដីល្បាប់ និងដីល្បប់ហូរមកចាក់បំពេញជួរចេះហើយបានជាមានកន្លែងខ្លះ ត្រូវរីងគោកអស់គ្មានសល់ទឹកទៀត ។

៦ 7 ហេតុនេះហើយ បានជានៅកណ្ដាលនេះឃើញមានជាកោះតូចមួយរាង ៤ ជ្រុងស្មើ ក្នុងមួយជ្រុង ១ ប្រវែង ១២០ ម៉ែត្រ ។ នៅលើកោះនេះ គេបានសាងប្រាសាទមេបុណ្យទិសបូព៌ា ស្របនឹងស័ក្យនៃគុហារជាទ្វារចូលទៅព្រះរាជវាំងអង្គរធំនិងក្លោងទ្វារជ័យ ។ ប្រាសាទនេះមានស្ថានភាពជាប្រាសាទភ្នំ ដែលជានិមិត្តរូបនៃភ្នំព្រះសុមេរុ



ប្រាសាទមេបុណ្យពិសបុព៌

មើលចំពីខាងកើត

តំកល់លិង្គ ស្រុកជិត្រោស្តុះ ឯរូបសំណាកដែលគួរ
គោរពបូជា គឺរូបព្រះឥសូរ និង រូបព្រះបរាតី ដែលទុកដូច
ជាព្រះវរមាតា – បិតា នៃព្រះបាទពជ័យវរ្ម័ន ៧ មានរូប
លិង្គ ៨ ទៀត ដែលជារូបលិង្គរបស់ព្រះអាទិទេព ៨ រូបដែល
តំកល់នៅក្នុងគុហាតូច ១ តាំង ៨ នៅជុំវិញ គឺមានលិង្គព្រះ
ទិក្បេណ៍ និង លិង្គព្រះព្រហ្មជា ដើម ៧ ព្រោះកមេបុណ្យ
អាចបាត់បញ្ចូលទៅក្នុងពពួកប្រាសាទ ដែលគួរជាទីគោរពបូជា
តាមអារម្មណ៍ដែលជាកិត្តិគុណដល់ព្រះអាទិទេព គឺមានរូប
សំណាកស្រីទេពអប្សរយ៉ាងល្អ ដែលបានគេឃើញនៅ
ក្នុងពេលត្រួសត្រាយរៀបចំ រូបនេះមានក្បាច់យ៉ាងល្អ
រាបធ្មើមបាទនឹងក្បាច់ នៃរូបព្រះនាងបរាតីតាមការអធិប្បាយ
នៃសិលាចារឹក ៧

# ប្រាសាទនាគព័ន្ធ

សាងនៅពាក់កណ្ដាលសតវត្សទី ១២ ដោយព្រះបាទជ័យវរ្ម័នទី ៧ បណ្ដាមរណៈព្រះនាមមហាបរមសុគតបទ: ថ្វាយចំពោះព្រះពុទ្ធសាសនា ។ ក្រសួងអភិរក្សអង្គរ បានថែរក្សាតាំងពី គ.ស. ១៩២២ រហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទនាគព័ន្ធ ស្ថិតនៅពីខាងមុខប្រាសាទក្រោលគោ តាមផ្លូវតូចមួយមានចម្ងាយ ៣០០ ម៉ែត្រ ដែលកាត់តម្រង់ទៅកាន់កោះដ៏តូចមួយនៃប្រាសាទ ដែលមានសណ្ឋានមិនប្លែកពីប្រាសាទមេបុណ្យដែលស្ថិតនៅក្នុងបារាយណ៍ ។ ប្រាសាទនេះស្ថិតនៅតាមអ័ក្សជាមួយគ្នានឹងប្រាសាទព្រះខ័ន ដែលមានឈ្មោះថា ជ័យតដាក: មានបណ្ដោយ ៣៥០០ ម៉ែត្រ ទទឹង ៩០០ ម៉ែត្រ ។ កោះដ៏តូចនេះ មួយជ្រុងៗប្រវែង ៣៥០ ម៉ែត្រ សាងភ្ជាប់នឹងកាំជណ្ដើរដែលឆ្ពោះទៅអ័ក្ស ព្រមទាំងមានឆ្លាក់ជារូបដំរីតូចៗ ដាក់នៅតាមមុខប្រាសាទ ដែលសព្វថ្ងៃនេះគេឃើញរូបមួយនៅសល់នឹងកន្លែងត្រង់ទិសឦសាន ។

តាមសិលាចារឹកនៅប្រាសាទព្រះខ័ន បានបញ្ជាក់ឲ្យដឹងថាជយតតកៈនេះ គឺជាឈ្មោះបឹងនៅខាងជើង ។ លោកផិវតាក្កាន់ បានពណ៌នាថាស្រះនេះមានទឹកថ្លាមកពីស្ទឹងនៃប្រាសាទ ដែលមានពន្លឺដូចពាសតាំងតោះពាយព្យនឹងផ្កាឈូក ដែលនាំមកនូវពណ៌សម្បុរដូចទឹក «បឹងឈាម» នៃព្រះភគវន្ត ។ នៅកណ្ដាលមានកោះមួយប្រកបដោយប្រាសាទ ដែលគួរឲ្យរីករាយនៅតាមផ្ទៃទឹកដែលព័ទ្ធជុំវិញប្រាសាទនេះ ហើយជាទីត្ថ "ទឹកមន្ត" សម្រាប់លាងបាបដែលប៉ះពាល់ ការចង់កាត់តាមបឹងនេះទៅកាន់ប្រាសាទ គេត្រូវជិះទូក ។

លក្ខណៈជាគ្រឿងសំគាល់នៃប្រាសាទនាគព័ន្ធនេះ គេបានដឹងយ៉ាងច្បាស់លាស់ ។ កាលពីឆ្នាំ ១៨៧៧ លោកដឺឡាប៉ត បានយល់ថាជាវិហារឧទ្ទិសចំពោះព្រះពុទ្ធដែលចូលនិព្វាន និងជាអាងទឹកសម្រាប់ជម្រះមន្ទិលទាំងឡាយ ដើម្បីឲ្យបានបរិសុទ្ធស្អាត ។

តាំងពីពេលដែលរុករកជាថ្មីឡើងវិញ ដោយលោក

ស៊ីដែស លោក ហ្វីណូត៍ និងលោក គោឡូប៊ែរមក គេគាប់សំគាល់បាននៅទីនផ្ទៃស្រះធំ ដែលមានទ្រង់ទ្រាយដូចជាស្រះអនោតត្ត: ដែលជាស្រះស្ថិតនៅកណ្តាលភូមិភាគភ្នំហិមពាន្ត គឺជាភ្នំកំពូលពិភពលោក ។ ស្រះនេះជាទីគោរពបូជាតាមទំនៀមទម្លាប់នៃប្រទេសឥណ្ឌា ព្រោះស្រះនេះភ្ជាប់ទៅស្រះតូច ៗ ៤ ទៀត ទំហំប៉ុន ៗ គ្នាតាមទិស ៤ ដែលជានិមិត្តរូបនៃទន្លេធំ ៗ ទាំង ៤ នៃពិភពលោក ។

ផ្ទៃទឹកហើយនិងផ្កាឈូករីកមួយទ្រព្រះអាទិទេពជានិមិត្តរូបនៃដែនដីដ៏បរិសុទ្ធ ហើយមានគំនិតភាគដូចរូបព្រះនាគយេណ៍គង់នៅលើទឹក បញ្ចេញផ្កាឈូកព្រះព្រហ្ម ។ រូបប្រដូចដ៏ល្អ ៗ នេះ របស់លោក ប៉ូល មូស ជាអត្ថន័យ នៃផ្ទៃទឹកដែលមានភាពបរិសុទ្ធនេះព្រមទាំងតួប្រាសាទផង ។



តាមសិលាចារឹកនៅប្រាសាទព្រះខ័ន បានបញ្ជាក់ឲ្យដឹងថាជយតដាកនេះ គឺជាឈ្មោះបឹងនៅខាងជើង ។ លោកផិវតាក្កាន់ បានពណ៌នាថាស្រះនេះមានទឹកហូរមកពីស្ទឹងនៃប្រាសាទ ដែលមានពន្លឺដូចមាសចាំងឆ្ពោះពាយព្យនឹងផ្កាឈូក ដែលនាំមកនូវពណ៌សម្បុរដូចទឹក “បឹងឈាម” នៃព្រះភគវន្ត ។ នៅកណ្តាលមានកោះមួយប្រកបដោយប្រាសាទ ដែលគួរឲ្យរីករាយនៅតាមផ្ទៃទឹកដែលព័ទ្ធជុំវិញប្រាសាទនេះ ហើយជាទីតិត្ថ “ទឹកមន្ត” សម្រាប់លាងបាបដែលប៉ះពាល់ ការឆ្លងកាត់តាមបឹងនេះទៅកាន់ប្រាសាទ គេត្រូវជិះទូក ។

លក្ខណៈជាគ្រឿងសំគាល់នៃប្រាសាទនាគព័ន្ធនេះ គេបានដឹងហើយច្បាស់លាស់ ។ កាលពីឆ្នាំ ១៨៧៧ លោកដឺឡាព័រ បានយល់ថាជាវិហារឧទ្ទិសចំពោះព្រះពុទ្ធដែលចូលនិព្វាន និងជាកងទឹកសម្រាប់ជម្រះមន្ទិលទាំងឡាយ ដើម្បីឲ្យបានបរិសុទ្ធស្អាត ។

តាំងពីពេលដែលគេរកឃើញជាថ្មីឡើងវិញ ដោយលោក

សីផែស លោក ហ្វីណូត៍ និងលោក គោឡូប៊ែវមក គេបាន សំគាល់បាននៅទីនវផ្ទៃស្រះធំ ដែលមានទ្រង់ទ្រាយដូចជាស្រះ អនោតត្តៈ ដែលជាស្រះស្ថិតនៅកណ្ដាលភូមិភាគភ្នំហិមពាន្ត គឺជាភ្នំកំពូលពិភពលោក ។ ស្រះនេះជាទីគោរពបូជាតាម ទំនៀមទម្លាប់នៃប្រទេសឥណ្ឌា ព្រោះស្រះនេះភ្ជាប់ទៅស្រះ តូច ១ ៤ ទៀត ទំហំប៉ុន ១ គ្នាតាមទវ ៤ ដែលជានិមិត្តរូប នៃទន្លេធំ ១ ទាំង ៤ នៃពិភពលោក ។

ផ្ទៃទឹកហើយនិងផ្កាឈូករីកមួយទ្រព្រះអាទិទេពជានិមិត្តរូប នៃផែនដីដ៏បរិសុទ្ធ ហើយមានគំនិតភាគដូចរូបព្រះនាគយណ៍ គង់នៅលើទឹក បញ្ចេញ "ផ្កាឈូកព្រះព្រហ្ម" ។ រូប ប្រដូចដ៏ល្អ ១ នេះ របស់លោក ប៉ូល មូស ជាអត្ថន័យ នៃផ្ទៃ ទឹកដែលមានភាពបរិសុទ្ធនេះត្រូវតាំងក្នុងប្រាសាទផង ។





ប្រាសាទនាគព័ន្ធ

មើលពីជ្រុងខាងកើតខាងត្បូង

# ប្រាសាទព្រះខ័ន

សាងនៅពាក់កណ្ដាលសតវត្សទី ១២ "គ.ស. ១១៩១" ដោយព្រះបាទជ័យវរ្ម័នទី ៧ បច្ឆាមរណៈ ព្រះនាម "មហាបរមសុគតបទ" ឧទ្ទិសចំពោះព្រះពុទ្ធសាសនា ។ ក្រសួងអភិរក្សអង្គរ បានចាប់ផ្ដើមថែរក្សាពី គ.ស. ១៩២៧ រហូតមកដល់សព្វថ្ងៃនេះ ។

លក្ខណៈសំខាន់ :

ការធ្វើដំណើរទៅកាន់ប្រាសាទនេះ ត្រូវចូលពីខាងកើតចេញទៅទិសខាងលិច ឬ បញ្ច្រាសមកវិញ ។ មុននឹងចូល លោកអ្នកត្រូវមានការប្រុងប្រៀបជាមុនបន្តិច គឺត្រូវទុកយានជំនិះនៅទីធ្លារដែលនៅឈមមុខ លោកអ្នក ឬ ក៏យកទៅទុកនៅធ្លារកណ្ដាល នាទិសខាងជើងក៏បាន ។ ផ្លូវចូលទាំង ៣ នៃប្រាសាទនេះជាប់ពាក់ព័ន្ធនឹងផ្លូវធំ គឺផ្លូវផ្ដោះទៅក្លោងទ្វារខាងកើត ដែលស្ថិតនៅជិតគីឡូម៉ែត្រលេខ៩ ផ្លូវចូលទៅក្លោងទ្វារខាងជើងនៅជិតគីឡូម៉ែត្រលេខ ៨ ឯផ្លូវ

ដើនដែលតម្រង់ទៅក្នុងទ្វារខាងលិច ស្ថិតនៅត្រង់គីឡូម៉ែត្រលេខ ៧ ។

ប្រាសាទព្រះខ័នមានកាង ៤ ជ្រុងទ្រវែង បណ្ដោយ ៨០០ ម៉ែត្រ ទទឹង ៧០០ ម៉ែត្រ ដែលមានស្រះបោក្ខរណីព័ទ្ធជុំវិញ ហើយជាប្រាសាទមានផ្ទៃដីចំនួន ៥៦ ហិកតា ។ ប្រាសាទនេះមានគិនភាគ ទីនល់ធាំជាច្រើន ដូចប្រាសាទតាព្រហ្ម ហើយមានសំណង់ជាច្រើនសាងតជាប់ ៗ គ្នាពីមួយទៅមួយ នៅសល់តែបន្ទោះតូច ៗ ។ កំពែងទី ៣ មានបណ្ដោយ ២០០ ម៉ែត្រ ទទឹង ១៧៥ ម៉ែត្រ ហ៊ុំព័ទ្ធប្រាសាទធំនមួល ដែលមានភាពទូលំទូលាយល្អសមទៅតាមវិលាសភាពជំនាន់ដើម ថ្វីត្បិតតែមានភាពប្រឈូកប្រឈល់នៃនិម្មាបនកម្មដូចេះក៏ដោយ ។ ប្រាសាទនេះច្រើនស្ថិតនៅជុំគ្នាទៅតាមភាពយាន់ចុនរៀនបំផុត ព្រោះសំណង់ធាំងនេះស្ថិតនៅជុំគ្នា លើមណ្ឌលតែមួយយាន់ទូលាយ ដោយមានសំណង់ខ្វះសាងដោយឈើប្រក់ក្បឿន ។

នៅប្រាសាទព្រះខ័ននេះ វត្ថុធាតុតាំងឡាយនាំឲ្យស្រួលយល់ណាស់ ដោយហេតុនេះហើយបានជានៅតាមទ្វារប្រាសាទមាន សិលាចារឹករៀបរាប់ពីសមាណចិត្តដែលពោរពេញដោយការរីកចំរើនខាងករុណាធម៌ ហើយនិងមានរៀបរាប់បង្ហាញពីឈ្មោះវត្ថុដែលជាទីគោរពបូជា ដើម្បីជាអំណានមនុស្សដែលមានកិត្តិគុណទុកដូចជាព្រះអាទិទេព ។ វត្ថុតាំងនេះចាត់ថែងសាងឡើង សមជាប្រាសាទដែលមានលក្ខណៈជាប្រាសាទមនុស្សារីយ៍ ។ ម្យ៉ាងវិញទៀត បើតាមសិលាចារឹក ដែលគេរកឃើញកាលពី គ.ស. ១៩៣៩ មានបរិយាយជាកន្លែងនេះ ទុកដូចជាកន្លែងនាំមកនូវជ័យជំនះគឺជាទីក្រុង "ជ័យស្រី" ។

តាមយោបល់របស់លោក សឺដែស ថា : ប្រាសាទនេះសមជាមានឈ្មោះថា ព្រះខ័នពិតមែន ប៉ុន្តែតែមានឈ្មោះដើមថា ទីក្រុងជ័យស្រី និងឈ្មោះថ្មីថាព្រះខ័នដូច្នេះ ក៏ឈ្មោះតាំងពីនេះសមតាមការនិយាយរបស់ខ្មែរពិតប្រាកដ គឺមានន័យ

ជាព្រះខ័នភជ្យ ។ ឯឈ្មោះថា នរៈសៀយស្រី នេះមានន័យថា ទីក្រុងដែលពោរពេញទៅដោយសេចក្តីសម្បូណ៌សប្បាយ ដែលប្រជាជនតែងហៅថា ព្រះខ័នភជ្យ ពោលគឺព្រះខ័ននោះឯង ។

ផ្ទុយទៅវិញ ចំពោះលោកអ្នកណាដែលបានទស្សនាប្រាសាទតាព្រហ្ម ឬ បន្ទាយក្តី ដែលស្ថាបនាដោយព្រះបាទជ័យវរ្ម័នទី ៧ នោះដែរ រមែងមានផ្លូវចូល ៤ ឆ្លងកាត់ស្រះពោក្ខរណីដែលគេតែងឃើញរហូតមកដល់សព្វថ្ងៃនេះ ព្រោះតាមផ្លូវឆ្លងកាត់ស្រះ តែងមានឆ្លាក់ជារូបយក្ស "ពស់" ពាញនាគ ដូចជានៅតាមមាត់ច្រកនៃក្លោងទ្វារគន្លងធំដែរ ហើយជាទីក្រុងមួយដែលជានិមិត្តរូបនៃនិម្មាបនកម្ម ដែលនៅដាច់ស្រយាលពីប្រាសាទបក្សាយន្ត ។ ទីក្រុងទាំងពីរនេះមានលក្ខណៈដូចគ្នាបេះបិទ វត្ថុទាំងនេះជាតំណាងកដជាតិ ដែលត្រូវទទួលការអះអាងបន្ថែមតាមសេចក្តីសំរេចចិត្ត ឬ តាមគុណប្រយោជន៍យ៉ាងប្រសើរនៃទ្វារចូល ព្រោះជាផ្លូវដើរខុស

ថ្ងៃកតិសភាពមក្កា ធ្វើឡើងសម្រាប់រំលេះឬដំរីចេញចូល ។ ព្រះទ័ពពុំមានចម់រង់មុខទុហាដូចជាប្រាសាទបាយ័ន កំពែងខាងក្រៅនៃប្រាសាទតាព្រហ្ម, បន្ទាយក្តី, ប្រាសាទតាសោមនឹងប្រាសាទអង្គរធំនោះទេ ព្រោះជាប្រាសាទសាងមុនគេ ហើយជាព្រះពន្លឺវិសេសបណ្តោះអាសន្នសម្រាប់ព្រះបាទជ័យវរ្ម័នទី ៧ ក្នុងពេលដែលកំពុងស្ថាបនាជាថ្មីឡើងវិញនៅទីក្រុងនេះ ដែលត្រូវខូចខាតដោយពួកចាមចូលមកលុកលុយក្នុង គ.ស. ១១៧៧ ។

នៅប្រាសាទនេះមានសិលាចារឹកមួយ ចារឹកនូវអក្សរយ៉ាងច្បាស់លាស់កាលពី គ.ស. ១១៩១ ថា: ព្រះពោធិសត្វលោកេស្វរៈព្រះនាមជ័យវរមេស្វរៈនោះ ព្រះអង្គទ្រង់គោរពបូជាទុកដូចព្រះបិតារបស់ព្រះអង្គ ដូចជានៅប្រាសាទតាព្រហ្មដែលព្រះបាទជ័យវរ្ម័នទី ៧ បានសាងរូបមួយជាដំណាងព្រះមាតានៃព្រះអង្គ ដែលមានព្រះនាមថា ប្រាជ្ញាបារមិតា ។

សិលាចារឹកនេះបានបង្ហាញឲ្យដឹងថា មានរូបសំណាក

៥១៥ រូប   មានមន្ទីរព្យាបាលរោគ ១០២ ក្នុងព្រះរាជាណាចក្រ តែពុំបានបញ្ជាក់ជាសាធនៅត្រង់ណា ៗ នោះឡើយ   ព្រមទាំងមានគេហស្ថានមួយជាកន្លែងឈប់សំរាក ៗ ឯចំណែកកម្មករ ហើយនិងអ្នកបំរើក្នុងការកសាងប្រាសាទ   មានចំនួន៩៧,៨៤០ នាក់   ដែលក្នុងចំណោមនេះមានស្ត្រីរបាំចំនួន ១.០០០ នាក់ ផង ៗ ក្នុងមួយឆ្នាំមានបុណ្យទានធំ ៗ ចំនួន ១០ ដង   ហើយក្នុងមួយខែមានថ្ងៃបុណ្យ ១០ ថ្ងៃ   ដែលជាថ្ងៃសំដែងនូវទឹកចិត្តរបស់ខ្មែរ   ក្នុងថ្ងៃបុណ្យតាមប្រពៃណីសាសនា និង តាមពេលសំរាកលំហែ ៗ



ប្រាសាទព្រះខ័ន

មើលចំពីខាងលិចនៃខ្លោងទ្វារទី ១

# ប្រាសាទលលៃ

សាងនៅចុងសតវត្សទី ៩ "គ.ស ៨៩៣" ដោយព្រះបាទ យសោវរ្ម័ន បព្វាមរណៈព្រះនាម "បរមសិវលោក" ឧទ្ទិសចំពោះសាសនាព្រាហ្មណ៍ ថ្វាយចំពោះព្រះ ឥសូរ ក្រសួងអភិរក្សអង្គរ បានថែរក្សាតាំងពី គ.ស. ១៩៣២ រហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទលលៃស្ថិតនៅ តាមផ្លូវចូលទៅកាន់ប្រាសាទបាគង គឺមានចម្ងាយ ៥០០ ម៉ែត្រពីផ្លូវជាតិលេខ ១ តាមផ្លូវលំ ដែលចូលទៅកាន់ប្រាសាទនេះ ហើយស្ថិតនៅខាងជើងផ្លូវ សៀមរាប ភ្នំពេញ ត្រង់បង្គោលគីឡូម៉ែត្រលេខ ១៣ ហើយ មានចម្ងាយជាង ៤០០ ម៉ែត្រ ពីផ្លូវទៅប្រាសាទបាគង ។ នៅត្រង់ផ្លូវខ្វែងគ្នានេះ មានផ្លាកតាំងសំគាល់ ហើយមានចម្ងាយ ៥០០ ម៉ែត្រ ទៅតាមផ្លូវលំកាត់តាមស្រែ ដោយ ត្រូវបត់ទៅឆ្វេងតាមស្ពានតូចមួយ ។

គេ[illegible]ប្រាសាទនេះ[illegible]បាកយណាំ

ទិសខាងកើត ដែលហាក់ដូចជាកោះមួយស្ថិតនៅកណ្ដាលសមុទ្រាតត្ថក: ដែលជាបឹងមួយយ៉ាងធំបណ្ដោយ ៣៨០០ ម៉ែត្រទទឹង ៨០០ម៉ែត្រ ។ គេបានជីកបឹងនេះបានចាប់ផ្ដើមស្ថាបនា ៨ ថ្ងៃ ក្រោយពេលដែលព្រះបាទសូរ្យវរ្ម័នទី ១ ទ្រង់បានទទួលអភិសេក តាមសិលាចារឹកនៃទីក្រុងហរិហរាលយ ដែលបានបញ្ជាក់ទៀតថា សម្រាប់ផ្ដល់ទឹកផល់ទឹកលនៅក្បែរបឹងនោះ ។

តាមសិលាចារឹក បកស្រាយដោយលោក សឺដែស មានសេចក្ដីថា ប្រាសាទនេះសាងថ្វាយ សមុទ្រាវម៉ស្វរ: ដើម្បីជាគុណស្សាវរីយ៍ដល់ព្រះបិតានៃព្រះបាទ យសោវរ្ម័ន ហើយមានរៀបរាប់អំពីការកសាងរមណីយដ្ឋានមួយផ្សេ មានឈ្មោះថា យសោធរតាស្រះ ហើយសាងឡើងអនុលោមទៅតាមពាក្យរបស់ព្រះឥន្ទ្រជន ។

ស្ថានភាពនៃប្រាសាទនេះ ត្រូវបំផ្លិចបំផ្លាញអស់ជាច្រើនណាស់ទៅហើយ តួប្រាសាទគេប្រទះឃើញមានជណ្ដើរតែ ហើយ

មានទៀនផ្ចាំងសាច់ពីថ្ពុយក្រៀម ចិនមានត្បើជណ្តើរ ៤ ទៀតតូច ៗ នៅតាមស័ក្ស តាក់តែងលំអរដោយរូបគោនៅ មាត់ជណ្តើរ ហើយមានត្បើជាបង្អួចទឹកបញ្ចេញពីទីលានថ្នាក់ ខាងលើផង ។ ថ្នាក់ទី ១ មានប្រវែងទទឹង ៩ ម៉ែត្រ ហើយវែងជុំវិញទទឹង ២ ម៉ែត្រ តភ្ជាប់ទៅនឹងសណ្ឋានកន្ទុល នៃរូបធាតុកជ ៗ ថ្នាក់ទី ២ ពីកើតទៅលិចប្រវែង ៩០ ម៉ែត្រ ពីជើងទៅត្បូងប្រវែង ៨០ ម៉ែត្រ ខ្ពស់ ២ ម៉ែត្រ ៤០ " វែង " ជាវែងជុំវិញទទឹង ២ ម៉ែត្រ ៤០ តភ្ជាប់ទៅនឹង កំពែង ដែលជាផ្ចាំងទល់ទ្រនៃផ្នែកខាងលើ ដែលមាន បាក់ដីបំពេញ ។

ប្រាសាទនេះមានប្រាង្គ ៤ សាងពីកថ្មសិលាចៅជាប់ ៗ គ្នាលើផ្ទៃគ្រឹះជាមួយគ្នា ។ សព្វថ្ងៃនេះដួលរលំហើយមាន ទម្រង់ពីរជួរគឺជួរខាងក្រោមមានលំដោយជាន់គេ ដោយមានសាង ជាថ្នាក់ ៗ នៅជាន់ខាងលើមានតាបលោយទឹកកំពោរ តែ សព្វថ្ងៃនេះរលប់បាត់អស់ហើយ ព្រោះសំរាមជាន់គេគឺនៅ

ផ្នែកខាងជើងឆៀងខាងកើត ចំណែកប្រាជ្ញនៅផ្នែកខាងត្បូង ឆៀងខាងកើត ឆៀងខាងលើត្រូវវិនាសខូចខាតអស់ហើយ ។ ឯការស្តាបនាប្រាង្គទាំងពីរបែកខាងជើង ដែលស្ថិតនៅស្រប និងផ្លូវដើរពីកើតទៅលិចនោះ គឺជាឧទាហរណ៍មួយអាចនាំ ឲ្យយល់នូវទម្រង់ដើមដែលមានប្រាង្គពីរជួរ ដូចនៅប្រាសាទ ព្រះគោដែរ ឯប្រាង្គពីរទៀតនោះ ស្ថិតនៅក្នុងសភាពដូច ទើបនឹងព្រោងៗមួយក៏ ត្រូវវិនាសខូចខាតអស់ ។





ប្រាសាទព្រះគោ

( មើលពីខាងកើត )

# ប្រាសាទព្រះគោ

សាងនៅចុងសតវត្សទី ៩ "គ.ស. ៨៧៩" ដោយព្រះបាទ "ឥន្ទ្រវរ្ម័នទី ១" បច្ឆាមរណៈ ព្រះនាម "សិវលោក" ថ្វាយចំពោះព្រះឥសូរ ក្នុងសាសនាព្រាហ្មណ៍ ។ ក្រសួងអភិរក្សអង្គរ បានថែរក្សាតាំងពី គ.ស. ១៩៣២ រហូតមកដល់សព្វថ្ងៃនេះ ។

ព្រះគោសាងឧទ្ទិសចំពោះដល់វិញ្ញាណក្ខន្ធព្រះបាទជ័យវរ្ម័នទី ២ ព្រមទាំងបុព្វបុរសនៃព្រះបាទឥន្ទ្រវរ្ម័នទី ១ ។ ប្រាសាទនេះ ស្ថិតនៅខាងលិចផ្លូវចូលទៅកាន់ប្រាសាទបាគង ហើយស្ថិតនៅខាងត្បូងផ្លូវជាតិលេខ ៦ សៀមរាប ភ្នំពេញ ចម្ងាយ ៥០០ ម៉ែត្រ ។ ប្រាង្គទាំងឡាយនៃប្រាសាទនេះ បែរមុខទៅទិសខាងកើត ហើយសាងឡើងនៅលើផ្ទៃដី ប្រវែងពីកើតទៅលិច ៥០០ ម៉ែត្រ ពីជើងទៅត្បូង ៤០០ ម៉ែត្រ ដោយគិតរួមទាំងស្រះជុំវិញផង ហើយជាប្រាសាទសាងដោយឥដ្ឋនិងបាយក្រៀម ។ មានផ្តាំងសិលាចារឹកមួយ មាន

ទាំងបន្ទាយយ៉ាំងក្រុមស្ថិតនៅទីនគរបុរៈកំពែងទី ១ សិលាចារឹកនេះ ថ្លែងសេចក្តីបូជាចំពោះព្រះឥស្សូរ ហើយបន្ទាប់មកថ្លែងកិត្តិបុណ្យ គុណភាពនៃព្រះបាទឥន្ទ្រាវរ្ម័ន ចារជាអក្សរសំស្ក្រឹតយ៉ាងវែង ពោលអំពីការគោរពបូជាព្រះទេវរាជ ដែលស្ថិតនៅលើ មហេន្ទ្រា គឺភ្នំគូលែន ព្រមទាំងបញ្ជាក់អំពីការកសាងបដិមា-ករ ក្នុង គ.ស. ៨៧៩ គឺព្រះឥស្សូរ និង ទេវី ៗ នៅ មុខសិលាចារឹកមួយទៀត មានចុះជាភាសាខ្មែរ រៀបរាប់ បញ្ជាក់កាលពី គ.ស. ៨៩៣ ក្នុងរជ្ជព្រះបាទ យសោវរ្ម័ន ដែលទ្រង់បញ្ជាក់ឲ្យកសាងរូប ឋាបេសូរៈ ដាក់នៅខឿនប្រាង្គ ជាខាងកើត ហើយនិងរូប ត្រិទ្វីវិក្រមៈ ដាក់នៅប្រាង្គខាង ត្បូង ។ មានសិលាចារឹកមួយទៀតចារចុះកំណត់កាល សតវត្សទី ១១ " គ.ស. ១០០៥ " ដែលបញ្ជាក់ឲ្យដឹងថា ក្នុងការព្រះបាទ ជ័យវីរវរ្ម័ន ដែលគ្រងរាជ្យពី គ.ស. ១០០២ ដល់ គ.ស ១០១០ ព្រមទាំងបង្ហាញឲ្យដឹងថាការដណ្តើមបក រាជ្យពីព្រះអង្គ ដោយព្រះបាទសុរិយវរ្ម័នទី ១ ។



ប្រាសាទបាគង

មើលពីជ្រុងខាងជើង ខាងលិច

# ប្រាសាទបាគង

សាងនៅចុងសតវត្សទី ៩ គ.ស. ៨៨១ ដោយព្រះបាទឥន្ទ្រវរ្ម័នទី ១ បច្ឆាមរណៈ ព្រះនាម "ឥសូរលោក" ថ្វាយចំពោះព្រះនារាយណ៍ ។ ការថែរក្សាដោយក្រសួងអភិរក្សអង្គរ ចាប់តាំងពី គ.ស. ១៩៣៦ រហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទបាគង ស្ថិតនៅតាមផ្លូវដើរមួយប្រឡកដោយដីខ្សាច់ចម្ងាយ ១៥០០ ម៉ែត្រ ពីផ្លូវលេខ ១ នៅត្រង់ផ្លូវខ្វែងដែលមានសញ្ញាចម្ងាយ ១៣ គីឡូម៉ែត្រពីសៀមរាបក្រុង តាមផ្លូវ "សៀមរាបភ្នំពេញ" ។ ផ្លូវដើរនេះតម្រង់ទៅជ្រុងប្រាសាទធំទិសឧត្តរមើលពីចំហៀង ។ នៅទិសក្លៀសាទមានជញ្ជាំងកំពែងទី ២ អមជុំវិញរហូតដល់ចុងទិសខាងកើតនៅមុខគោបុរៈទី ២ ។

បាគងជាប្រាសាទមានខពងជាសាជី ស្ថិតនៅក្នុងកំពែងទី ៣ គឺជាប្រាសាទភ្នំ មានទ្រង់ទ្រាយប្រហែលគ្នានឹង

ប្រាសាទអកយំ ដែលស្ថិតនៅទិសនិរតីក្រុងសៀមរាបហើយ និងប្រាសាទរោងចិន នៅលើភ្នំគូលែន ។ ប្រាសាទនេះជាប្រាសាទកណ្តាលនៃក្រុងមួយឈ្មោះ "ហរិហរាល័យ" សាងឡើងថ្វាយចំពោះព្រះអាទិទេព ។ នៅប្រាសាទនេះគេឃើញមានគោររូបមួយ ជាជំណាន់ដំបូងខ្មែរសាងដែលនៅ ជិតកជជាតិខ្មែរ ។ ប្រាសាទនេះប្រហែលចាប់ផ្តើមសាង ឡើងក្នុងរជ្ជកាលព្រះបាទ "ជ័យវរ្ម័នទី ២" ក្រោយពេលដែលព្រះអង្គទ្រង់យាងចាកចេញពីភ្នំគូលែន ។

ប្រាសាទទាំងឡាយនៅអង្គរ សុទ្ធតែមានទំហំសាង ឡើងជាថ្នាក់ៗ បន្តបន្ទប់លើគ្នា ។ ប្រាសាទនេះគេគាប់ប្រៀប នៅនឹងភ្នំព្រះសុមេរុដែលជាភ្នំនៅកណ្តាលទ្វីប ព្រោះសាងឡើង មាន ៥ ថ្នាក់ ព្រមទាំងមានតាំងរូបនាគ គ្រុឌ ឆ្មាំទ្វារ និង យក្ស នៅគ្រប់មុខប្រាសាទទាំង ៤ ទិស តាំងពីថ្នាក់ក្រោម រហូតដល់ថ្នាក់លើ ។

ប្រាសាទនេះស្អាតល្អសមណាស់. មានទំហំយ៉ាង

ល្អ ៗ ព្រមទាំងមានលំអដោយរូបការក្បូរក្បាច់ និងជារូបស្រីជាដើម សុទ្ធតែជារូបដែលគេធ្វើសក្ការបូជារាល់ថ្ងៃ ដើម្បីសេចក្ដីសុខចំរើនព្រមទាំងមានរូបសង្គ្រាមជាមួយអគ្គ ដែលគេតែងគោរពបូជាមួយឆ្នាំម្ដងរៀងរាល់ឆ្នាំ គឺសុទ្ធតែជានិទស្សនៈមួយថ្ងៃៗ ដែលបង្ហាញឲ្យឃើញនូវភាពស្រឡះហើយនិងមានលំអដោយរូបមនុស្សដាក់ហូរហែតាមដំណើរ ប្រៀបបាននិងដំណើរមួយនៅស្ថានសួគ៌ ជាកសិណសាក្សីមួយបង្ហាញនូវក្រឹត្យវិន័យនៅបូពាទិស ។

បាគងជាប្រាសាទមួយមុនគេ សាងអំពីថ្មភក់ប្រកបដោយនិម្មាបនកម្មយ៉ាងប្រសើរ ដោយព្រះបាទ "ឥន្ទ្រាវរ្ម័ន" ដែលទ្រង់បានឲ្យឈ្មោះថាជា " ប្រាសាទថ្មនៃឥសៈ " ។

សិលាចារឹកមួយរកឃើញដោយលោក ទ្រូវ កាលពី គ.ស. ១៩៣៥ មានឆ្លាក់ជាអក្សរយ៉ាងល្អ ៗ ហើយរៀបរាប់អំពីការបួងសួង និងការរំលឹកអំពីកិត្តិសព្ទនៃព្រះបាទ " ឥន្ទ្រាវរ្ម័ន " ដែលទ្រង់បានកសាងកាលពី គ.ស. ៨៨១

នូវរូបសិរីលិទ្ធ "ស្រីឥន្ទ្រាសួរ" ហើយនិងតំពីការកសាងរូបព្រះ នារាយណ៍ ៨ យ៉ាង សមស្របទៅតាមទ្រង់ទ្រាយនៃប្រាសាទទាំង ៨ ដែលនៅជុំវិញផ្នែកខាងក្រោម, នៅខាងលើបាទដ្ឋានមានជណ្តើរនៅគ្រប់ទិស ។ ប្រាសាទនេះមានរូបសំណាកជាច្រើនទៀតសាងនៅក្នុងប្រាង្គធំ ព្រមទាំងមានគាវៈរូបជាច្រើនទៀត និងរូបសំណាកខ្លះមានភាពទាក់ទងទៅនឹងរូបមនុស្សស្លាប់ មិនតែប៉ុណ្ណោះ មានរៀបរាប់អំពីការកសាងបឹងមួយនៅប្រាសាទលលៃ មានឈ្មោះថា "ឥន្ទ្រតដាក:" ។

3



ល្អ ៗ ព្រមទាំងមានលំអដោយរូបតារ័ក្សក្ខកតា និងជារូបស្រីជាដើម សុទ្ធតែជារូបដែលគេធ្វើសក្ការបូជារាល់ថ្ងៃ ដើម្បីសេចក្តីសុខចំរើនព្រមទាំងមានរូបសង្ស្រកជមួយអគ្គ ដែលគេតែងគោរពបូជាមួយឆ្នាំម្តងរៀងរាល់ឆ្នាំ គឺសុទ្ធតែជានិទស្សនៈមួយថ្លៃថ្លា ដែលបង្ហាញឲ្យឃើញនូវភាពស្រឡះហើយនិងមានលំអដោយរូបមនុស្សដាក់ហូរហែតាមដំណើរ ប្រៀបបាននឹងដំណើរមួយនៅស្ថានសួគ៌ ជាគសិណាសាក្សីមួយបង្ហាញនូវក្រឹត្យវិន័យនៅបូព៌ាទិស ៗ

បាគងជាប្រាសាទមួយមុនគេ សាងអំពីថ្មភក់ប្រកបដោយនិម្មាបនកម្មយ៉ាងប្រសើរ ដោយព្រះបាទ "ឥន្ទ្រាវរ្ម័ន" ដែលទ្រង់បានឲ្យឈ្មោះថាជា " ប្រាសាទថ្មនៃឥសៈ " ៗ

សិលាចារឹកមួយរកឃើញដោយលោក ទ្រូវេ កាលពី គ.ស. ១៩៣៥ មានឆ្លាក់ជាអក្សរយ៉ាងល្អ ៗ ហើយរៀបរាប់អំពីការបួងសួង និងការរំលឹកអំពីកិត្តិសព្ទនៃព្រះបាទ " ឥន្ទ្រាវរ្ម័ន " ដែលទ្រង់បានកសាងកាលពី គ.ស. ៨៨១

នូវរូបសិរីលិង្គ "ស្រីឥន្ទ្រាសូរ" ហើយនិងអំពីការកសាងរូបព្រះ នាកយណ៍ ៨ យ៉ាង សមរម្យទៅតាមទ្រង់ទ្រាយនៃប្រាសាទតាំង ៨ ដែលនៅជុំវិញផ្នែកខាងក្រោម, នៅខាងលើបាទផ្លានមានជណ្តើរនៅគ្រប់អ័ក្ស ។ ប្រាសាទនេះមានរូបសំណាកជាច្រើនទៀតសាងនៅក្នុងប្រាង្គថ្ម ព្រមទាំងមានគារវៈរូបជាច្រើនទៀត និងរូបសំណាកខ្លះមានភាពពាក់ចងទៅនឹងរូបមនុស្សស្លាប់ មិនតែប៉ុណ្ណោះ មានរៀបរាប់អំពីការកសាងបឹងមួយនៅប្រាសាទលលៃ មានឈ្មោះថា "ឥន្ទ្រតដាកៈ" ។

53



# ប្រាសាទបន្ទាយសំរ៉ែ

បន្ទាយសំរ៉ែ សាងក្នុងសតវត្សទី ១២ ក្រោមឥទ្ធិពលនៃ " វិស្ណុនិយម " ។ គេបានកាប់ឆ្កាព្រៃចេញនៅក្នុងឆ្នាំ ១៩៣០ ហើយបានជួសជុលរៀបចំឡើយដោយក្រសួងអភិរក្សអង្គរ ក្នុងឆ្នាំ ១៩៣៦ រហូតមកដល់សព្វថ្ងៃនេះ ។

ការធ្វើដំណើរទស្សនាបន្ទាយសំរ៉ែនេះ គាបធ្វើស្របគ្នានឹងការទស្សនាបន្ទាយស្រីតែក្នុងរយៈមួយព្រឹកប៉ុណ្ណោះ ដោយត្រឡប់ពីបន្ទាយស្រី បត់មកខាងត្បូងតាមភូមិប្រដាក ជិតដល់ផ្លូវបត់ខាងស្តាំនៃវង់ធំ យើងត្រូវធ្វើដំណើរអស់ ១៧០០ ម៉ែត្រ តាមទំនប់ខ្ពស់នៃបារាយណ៍ចាស់ខាងកើត ដែលឆ្ងាយជាង ៥០០ ម៉ែត្រពីផ្លូវទី ១ នាំចូលតាមទ្វារខាងកើតនៃប្រាសាទ ហើយបត់មកខាងស្តាំចម្ងាយ ៣០០ ម៉ែត្រ មានស្ពានបង្ហាញពីផ្លូវវែង យើងតម្រង់ឆ្ពោះទៅដល់មុខទ្វារកូលខាងកើតដែរ ។

បើសិនជាយើងធ្វើដំណើរទស្សនាតែម្តងតាមផ្លូវវង់ធំដែលមានផ្លូវដើរប្រកបដោយដីខ្សាច់ ហើយពីបាកធ្វើដំណើរតាម

រ៉ឺម៉ក ឬ កង់ បាញ់ត្រង់ទៅចំណុចដែលមានចម្ងាយ ១៨ គីឡូម៉ែត្រពីសៀមរាប ហើយនៅចន្លោះប្រែរូបនិងមេបុណ្យខាងកើតរហូតដល់ច្រកចូលមកផ្លូវខាងកើត នៃប្រាសាទដែលមានចម្ងាយ ៥ គីឡូម៉ែត្រ ហើយត្រូវធ្វើដំណើរចូលមើលក្នុងពេលព្រឹក ។



255



ប្រាសាទបន្ទាយស្រី

មើលចំពីមុខ ខាងកើតនៃខ្លោងទ្វារទី ៣

# ប្រាសាទបន្ទាយស្រី

បន្ទាយស្រីសាងនៅក្នុងសតវត្សទី ១០ គឺពីឆ្នាំ ៩៦៧ ដោយព្រះកជាតិព្រះអគ្គគី ព្រះបាទរាជេន្ទ្រវរ្ម័ន បច្ឆាមរណៈ ព្រះនាម "សិវៈលោកា" ក្រោយមកព្រះបាទជ័យវរ្ម័នទី ៥ បច្ឆាមរណៈព្រះនាម "បរមវីរៈលោកា" ឧទ្ទិសចំពោះព្រហ្មញ្ញសាសនាថ្វាយដល់ព្រះឥសូរ ។ ការថែរក្សាដោយក្រសួងអភិរក្សអង្គរ ពី គ.ស. ១៩២៨ ហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទបន្ទាយស្រី ស្ថិតនៅចម្ងាយជាង ២០ គីឡូម៉ែត្រ ពីទិសឦសាននៃប្រាសាទបាយ័ន នៅត្រើយស្តាំស្ទឹងសៀមរាប ដែលហូរចុះពីភ្នំគូលែន ឆ្ពោះទៅបឹងទន្លេសាប ។ ប្រាសាទនេះគ្របដណ្តប់ដោយដើមព្រឹក្សាធំ ៗ យ៉ាងប្រណីតគ្រប់បែប ក្នុងដងព្រៃស្រោងស្រឹងគួរឲ្យស្រងេះស្រងោចក្រៃពេក ។ ក្រសួងអភិរក្សអង្គរបានរៀបចំជួសជុលឡើងវិញ ក្នុងឆ្នាំ ១៩៣១ ដល់ឆ្នាំ ១៩៣៦ ដើម្បីឲ្យបានគង់វង់សមទៅតាមសភាពដើម នៃប្រាសាទ ។ ឥឡូវ

នេះផ្លូវចូលទៅកាន់ប្រាសាទ មានប្រវែង ២៤ គីឡូម៉ែត្រ ក្រាលដោយគ្រួសបាយក្រៀម ដូច្នេះរថយន្តអាចចេញចូលបានគ្រប់ផ្លូវ ។

លុះចេញពីវត់ធំតម្រង់ទៅទិសខាងជើង ត្រង់ចន្លោះប្រាសាទប្រែរូបនិងប្រាសាទមេបុណ្យទិសបូព៌ ដែលមានចម្ងាយ ១៥ គីឡូម៉ែត្រពីសៀមរាប តាមផ្លូវចូលឆ្លងកាត់ភូមិប្រដាក ដើម្បីនឹងបែកចំទៅប្រាសាទនេះដែលមានចម្ងាយ ៦ គីឡូម៉ែត្រយ៉ាងឆ្ងាយ ហើយផ្លូវនេះត្រូវបែកឆ្ពោះទៅទិសឦសាន រួចបែកទៅទិសពាយ័ព្យភ្ជាប់ទៅដល់ភ្នំគូលេន ដែលមានចម្ងាយ ៩ គីឡូម៉ែត្រ ។

នៅតាមផ្នែកខ្លះប្រកបដោយសម្រស់យ៉ាងឆើតឆាយ ដែលហូរចេញពីបន្ទាយស្រីនូវការកត់សំគាល់នៃភាពគង់វង់ និងភាពយ៉ាងត្រចះត្រចង់ខាងបច្ចេកទេស ក្នុងការតុបតែងលំអដោយក្បាច់ចម្លាក់យ៉ាងរស់រវើកដូចប្រាសាទអង្គរ យើងអាចវិនិច្ឆ័យបានថា សោភណភាពទាំងនេះ ជាសិល្បៈយ៉ាងចំណាននៃ

# ប្រាសាទបន្ទាយស្រី

បន្ទាយស្រីសាងនៅក្នុងសតវត្សទី ១០ គឺពីឆ្នាំ ៩៦៧ ដោយព្រះរាជាពីរព្រះអង្គគឺ ព្រះបាទរាជេន្ទ្រវរ្ម័ន បព្វាមរណៈព្រះនាម "សិវៈលោកា" ក្រោយមកព្រះបាទជ័យវរ្ម័នទី ៥ បព្វាមរណៈព្រះនាម "បរមវីរៈលោកា" ឧទ្ទិសចំពោះព្រហ្មញ្ញសាសនាថ្វាយដល់ព្រះឥសូរ ។ ការថែរក្សាដោយក្រសួងអភិរក្សអង្គរ ពី គ.ស. ១៩២៤ រហូតមកដល់សព្វថ្ងៃនេះ ។

ប្រាសាទបន្ទាយស្រី ស្ថិតនៅចម្ងាយជាង ២០ គីឡូម៉ែត្រ ពីទិសឦសាននៃប្រាសាទបាយ័ន នៅត្រើយស្តាំស្ទឹងសៀមរាប ដែលហូរចុះពីភ្នំគូលែន ត្រោះទៅបឹងទន្លេសាប ។ ប្រាសាទនេះគ្របដណ្តប់ដោយដើមព្រឹក្សាធំ ។ យ៉ាងប្រណីតគ្រប់បែប ក្នុងដងព្រៃស្រោងស្រឹងគួរឲ្យស្រងេះស្រងោចក្រៃពេក ។ ក្រសួងអភិរក្សអង្គរបានរៀបចំជួសជុលឡើងវិញ ក្នុងឆ្នាំ ១៩៣១ ដល់ឆ្នាំ ១៩៣៦ ដើម្បីឲ្យបានគង់វង្សឋិតនៅតាមសភាពដើមនៃប្រាសាទ ។ តម្រូវ

នេះផ្លូវចូលទៅកាន់ប្រាសាទ មានប្រវែង ២៤ គីឡូម៉ែត្រ ក្រាលដោយគ្រួសបាយក្រៀម ដូច្នេះរថយន្តអាចចេញចូលបានគ្រប់រដូវ ។

លុះចេញពីវត់ចំគម្រង់ទៅទិសខាងជើង ត្រង់ចន្លោះប្រាសាទប្រែរូបនិងប្រាសាទមេបុណ្យទិសបូពិ ដែលមានចម្ងាយ ១៨ គីឡូម៉ែត្រពីសៀមរាប តាមផ្លូវចូលក្នុងកាត់ភូមិប្រដាក ដើម្បីនឹងបែកចំទៅប្រាសាទនេះដែលមានចម្ងាយ ៦ គីឡូម៉ែត្រយ៉ាងឆ្ងាយ ហើយផ្លូវនេះត្រូវបែកឆ្ពោះទៅទិសឦសាន រួចបែកទៅទិសពាយ័ព្យភ្ជាប់ទៅដល់ភ្នំគូលែន ដែលមានចម្ងាយ ៩ គីឡូម៉ែត្រ ។

នៅតាមផ្នែកខ្លះប្រកបដោយសម្រស់យ៉ាងធើតធាយ ដែលហូរចេញពីចន្ទាយស្រីខ្លូវការកត់សំគាល់នៃភាពគង់វង់ និងភាពយ៉ាងគ្រប់គ្រាន់ខាងបច្ចេកទេស ក្នុងការតុបតែងលំអដោយក្បាច់ចម្លាក់យ៉ាងរស់រវើកដូចប្រាសាទអង្គរ ហើយអាចវិនិច្ឆ័យបានថា លោកណាភាពតាំងនេះ ជាសិល្បៈយ៉ាងចំណាស់នៃ

- ស្នាដៃដ៏ល្អថ្លៃក ហើយចំនៃក្បាច់មានភាពជ្រៅៗ ខុសប្លែកពីប្រាសាទនានានៅអង្គរ ។ ប្រាសាទបន្ទាយស្រីជាគ្រឿងអលង្ការនៃសិល្បៈខ្មែរ ដែលបានទទួលការសរសើរពីគ្រប់មជ្ឈដ្ឋាន នៃអ្នកចំណូលសិល្បៈ និង ក្បាច់ចម្លាក់លើឈើ ឬថ្ម ។ គ្រឿងសម្ភារៈដែលយកមកប្រើប្រាស់ក្នុងការកសាងនេះ គឺមានថ្មភក់ពណ៌ផ្កាឈូកដ៏រឹងមាំ ដែលគេពុំដែលឃើញនៅប្រាសាទដទៃ ។ សំណង់ទាំងឡាយមានភាពតូចចង្អៀត តែបើទៅគន់មើលល្អ មានប្រាសាទខ្លះទៀតត្រូវខូចខាតសម្រស់ខាងវិជ្ជានិម្មាបនកម្ម គឺនៅសល់តែដំណែលគ្រឹះតែប៉ុណ្ណោះ ។

វិសាលភាពដ៏តូចនៃបន្ទាយស្រី ធ្វើឲ្យមានការណៀនជួល់ ហើយមិនអាចនឹងពន្យល់បាន ។

សិល្បករខ្មែរក្នុងសម័យនោះ មានការចាប់អារម្មណ៍ទៅលើការតុបតែងលម្អដោយក្បូរក្បាច់រចនាដ៏ល្អិតល្អន់ ជាងទៅលើទំហំភាពធំធេងទូលំទូលាយ ។ សព្វថ្ងៃក្បាច់ដែលសិល្បករ

យើងតែងហៅថាក្បាច់អង្គរនោះ គឺច្រើនតែក្បាច់ចម្លងចេញពីប្រាសាទបន្ទាយស្ត្រីនេះឯង ។ ឈ្មោះបន្ទាយស្រីដែលអ្នកស្រុកហៅប្រាសាទនេះ ប្រហែលជាយោលទៅតាមភាពតូចច្រឡឹង សោភណភាពល្អិតល្អន់ និងតុបតែងដោយក្បាច់រចនាវិចិត្រឡើងដូចជាគ្រឿងអលង្ការ ។ បន្ទាយស្រីជាប្រាសាទមួយដោយឡែក ក្នុងចំណោមប្រាសាទនានានៃអង្គរ ហេតុដូច្នេះបានជាអ្នកប្រាជ្ញបានបង្កើត ជារចនាបថមួយហៅថា " រចនាបថបន្ទាយស្រី " ក្នុងសិល្បៈខ្មែរ ។



# សៀវភៅសិក្សាដែលបោះពុម្ពផ្សាយចេញពីបណ្ណាគារ ភ្នំពេញ លេខ ១៥៩ វិថីប៉ាស្ទ័រភ្នំពេញ មានដូចតទៅនេះ៖

| | | |
|---|---|---|
| ១ | វចនានុក្រមបារាំង-ខ្មែរ និពន្ធដោយ គិច យក់, ជាវ គន់ តម្លៃ | ៤០០រ |
| ២ | វចនានុក្រមបារាំង-ខ្មែរសង្ខេប និពន្ធដោយ គិច យក់, ជាវ គន់, លីវគុង | ៣០០រ |
| ៣ | សព្ទានុក្រមបារាំង-ខ្មែរ ព្រះយោសធម្ម ប.ស. ឧម្ភាភម . | ២០០រ |
| ៤ | អនុវចនានុក្រមបារាំង-ខ្មែរ ឃិន ផៃ . . . . | ១៥០រ |
| ៥ | អនុវចនានុក្រមបារាំង-ខ្មែរ តូច ឃិន ផៃ . . . | ១០០រ |
| ៦ | កូនអនុវចនានុក្រមបារាំង-ខ្មែរ ស៊ឹម-ហុង . . . | ៥០រ |
| ៧ | វចនានុក្រមខ្មែរសង្ខេប ប្រជុំសាស្ត្រាចារ្យ . . . | ១២០រ |
| ៨ | អនុវចនានុក្រមខ្មែរ គួ ជាតិ . . . . . | ៥០រ |
| ៩ | វចនានុក្រម អង់គ្លេស-ខ្មែរ ឆាយ ហុក ហ៊ី . . . | ៧៥រ |
| ១០ | យើងរៀនអានថ្នាក់ទី ១២ ឈួក ឡុង ម៉ៅ, ហួរ ហេង . | ១៥រ |
| ១១ | យើងអានថ្នាក់ទី ១១ ហួរ ហេង . . . . . | ២៥រ |
| ១២ | យើងអានថ្នាក់ទី ១០ . . . . . . . | ២៦រ |
| ១៣ | យើងអានថ្នាក់ទី ៩ . . . . . . . | ៣០រ |
| ១៤ | យើងអានថ្នាក់ទី ៧ . . . . . . . | ៣០រ |
| ១៥ | កុមារដ្ឋាន ស-បិត្ត . . . . . . . | ១៥រ |
| ១៦ | វិជ្ជាខេមរៈភាសា កុមារដ្ឋាន . . . . . | ១៥រ |
| ១៧ | — បរិវេណដ្ឋាន . . . . . | ១៥រ |
| ១៨ | — អាទិកដ្ឋាន . . . . . | ១៥រ |

១៩ វិទ្យាសាស្ត្រអនុវត្តថ្នាក់ទី ៨ - ៧ . . . . . ៣៥រ
២០ — ៨ . . . . . . . ១៨រ
២១ សុភាវធម៌ ល្បក ម៉ុង មៅ . . . . . ៣០រ
២២ សង្គមវិជ្ជា . . . . . . . . ៣៥រ
២៣ ផ្កាស្រពោន . . . . . . . . ២៣រ
២៤ កូលាបប៉ៃលិន . . . . . . . . ២០រ
២៥ រៀនភាសាបារាំងដោយខ្លួនឯង . . . . . ៤០រ
២៦ កិត្តិយស ឬ ស្នេហា (Le cid) . . . . . . ២៣រ
២៧ លិខិតពីរោងត្បាល់បក់ខ្ញុំ (លុក ផៃ) . . . . ២០រ
២៨ គ្រូពេទ្យភិសតាល្អ (បាន់ ម៉ុ ផារី) . . . . . ២០រ
២៩ អ្នកមានឃ្លានយស (ហ៊ុ ស៊ុ សាផន) . . . . ៣៥រ
៣០ ក្បួនតព្វត្ត ឈឹម សុខ . . . . . . ៧៥រ
៣១ អនុពាក្យថ្មី ឧត្តមថ្នាន . . . . . . ២៥រ
៣២ សរសេរតាមសូត្រ លី គាម ពេង . . . . ១៨រ
៣៣ ប្រមូលសរសេរតាមសូត្រ ឧត្តមថ្នាន . . . . ១៧រ
៣៤ សរសេរតាមសូត្រឧទ្ទម ជិម ពៅ . . . . . ២០រ
៣៥ តែងសេចក្តីឧទ្ទម សែម សួរ . . . . . ២២រ
៣៦ មូលដ្ឋានអក្សរសាស្ត្រ ហ៊ិន តិម សៀ . . . . ២០រ
៣៧ តែងសេចក្តី អ៊ុង ហុង សាន . . . . . ២០រ
៣៨ វិជ្ជានិពន្ធខ្មែរបំរុះ សែម សួរ . . . . . ៣៥រ
៣៩ តែសេចក្តីខ្មែរបំរុះ សែម សួរ . . . . . ៣៥រ
៤០ សិក្សារឿងកាកី សែម សួរ . . . . . ២៥រ

| | | |
|---|---|---|
| ៤១ | សិក្ខាកថារឿងទុំទាវ ឥុក សាម៉ន | ៣៨៛ |
| ៤២ | បរមាធិប្បាយពិសេស ថ្នាក់ទី ១ សែម សូរ | ៤០៛ |
| ៤៣ | សិក្ខាមហាវេស្សន្តរជាតក សែម សូរ | ៤០៛ |
| ៤៤ | អធិប្បាយសុភាសិតស្រីហិតោបទេស សែម សូរ | ៣០៛ |
| ៤៥ | វិញ្ញាសាមធ្យមសិក្សាប័ត្រ សែម សូរ | ៤០៛ |
| ៤៦ | ប្រជុំវិញ្ញាសាពិសេស ថ្នាក់ទី ៦ សែម សូរ | ៤០៛ |
| ៤៧ | វិញ្ញាសាពួកយើង ថ្នាក់ទី ៦ សេង ឆយ | ៤០៛ |
| ៤៨ | ភាសិតសំភាយ តៅ ហ៊ុង | ២៥៛ |
| ៤៩ | រឿងចៅស្រទបចេក | ៣៥៛ |
| ៥០ | ខរណាមាតា | ៣៥៛ |
| ៥១ | ស័ង្ខសិល្បជ័យ | ៣៥៛ |
| ៥២ | លិខិតឆ្លើយឆ្លងបារាំង, អង់គ្លេស, ខ្មែរ | ១០៛ |
| ៥៣ | រឿងធនញ្ជ័យ | ១២៛ |
| ៥៤ | ពស់កេងកង | ៥៛ |
| ៥៥ | សុចិនកុមារ | ៧៛ |
| ៥៦ | មាយាស្រី | ៥៛ |
| ៥៧ | មាយើង | ៥៛ |
| ៥៨ | ច្បាប់ប្រុស | ៥៛ |
| ៥៩ | ច្បាប់ស្រី | ៥៛ |
| ៦០ | ច្បាប់ប្រុស - ស្រី | ៧៛ |
| ៦១ | រឿងរួមថ្នាក់ទី ៦ | ១៧៛ |
| ៦២ | ច្បាប់រួមថ្នាក់ទី ៥ | ១០៛ |

264




៤១ សិក្សាកថារឿងទុំទាវ អ៊ុក សាមិន . . . . . ៣៨រ

៤២ បរមាធិប្បាយពិសេស ថ្នាក់ទី ១ សែម ស្វរ . . . ៤០រ

៤៣ សិក្សាមហាវេស្សន្តរជាតក សែម ស្វរ . . . . ៤០រ

៤៤ អធិប្បាយសុភាសិតស្រីហិតោបទេស សែម ស្វរ . . ៣០រ

៤៥ វិញ្ញាសាមធ្យមសិក្សាប័ត្រ សែម ស្វរ . . . . ៤០រ

៤៦ ប្រជុំវិញ្ញាសាពិសេស ថ្នាក់ទី ៦ សែម ស្វរ . . . ៤០រ

៤៧ វិញ្ញាសាពួកយើង ថ្នាក់ទី ៦ សេង ឋយ . . . . ៤០រ

៤៨ ភាសិតសំរាយ តៅ ហ៊ុង . . . . . . ២៥រ

៤៩ រឿងចៅស្រទបចេក . . . . . . . ៣៥រ

៥០ ឧរណមាតា . . . . . . . . ៣៥រ

៥១ ស័ង្ខសិល្បជ័យ . . . . . . . . ៣៥រ

៥២ លិខិតផ្ញើឃ្លងបារាំង, អង់គ្លេស, ខ្មែរ . . . . ១០រ

៥៣ រឿងធនញ្ជ័យ . . . . . . . . ១២រ

៥៤ ពស់កេងកង . . . . . . . . ៥រ

៥៥ សុបិនកុមារ . . . . . . . . ៧រ

៥៦ មាយាស្រី . . . . . . . . ៥រ

៥៧ មាយើង . . . . . . . . ៥រ

៥៨ ច្បាប់ប្រុស . . . . . . . . ៥រ

៥៩ ច្បាប់ស្រី . . . . . . . . ៥រ

៦០ ច្បាប់ប្រុស-ស្រី . . . . . . . ៧រ

៦១ រឿងរូបថ្នាក់ទី ៦ . . . . . . . ១៧រ

៦២ ច្បាប់រួមថ្នាក់ទី ៥ . . . . . . . ១០រ